# រូបសំគាល់សកម្មភាព

 ១. អ៊ីស្រាអែល

 ២. អត្ថបទ

 ៣. រឿងអោយគិត

 ៤. ប្រើក្បាល

 ៥. បណ្តាញ

 ៦. ចុតហ្មាយ

# មាតិកា:

# <u>គោលបំណង</u>

ដោយសារក្បាលធ្ងន់ពេក ហើយសម្បូរទៅដោយរបស់គ្មានប្រយោជន៍ទើបចង់យកវាចេញខ្លះដើម្បីអោយស្រាលបន្តិចស្រួលយកតាមខ្លួន តែមិនដឹងថាយកពួកវាទៅបោះចោលកន្លែងណា ទើបសម្រេចចិត្តទម្លាក់វាលើទំព័រសៀវភៅមួយក្បាលនេះទៅ។

ម្យ៉ាងទៀតដោយមើលឃើញពីឱកាស និង មានបំណងចែកជូននូវចំណេះដឹង បទពិសោធន៍ជីវិត រួមទាំងការសង្កេតផ្ទាល់ខ្លួន ទាំងឡាយដែលបានជួបប្រទះតាំងពីកើត និងនៅប្រទេសអ៊ីស្រាអែលនេះ ដល់មិត្តនិស្សិតទាំងអស់ លោកគ្រូអ្នកគ្រូពូមីង លោកតាលោកយាយ ជនរួមឈាមទាំងអស់គ្នា ហើយជាពិសេសប្អូនៗសិស្សានុសិស្សទុកជាមេរៀនក្រៅខ្លួន សម្រាប់ញុំាងអោយជីវិតអ្នកទាំងអស់គ្នាកាន់តែសម្បូរបែបទៅដោយគតិ ទស្សនៈ គំនិតក្នុងដំណើរជីវិតរៀងៗខ្លួន។

ជាការពិតណាស់ វាមិនមែនជាភាពអស្ចារ្យចម្លែកអ្វីទេសម្រាប់សៀវភៅមួយក្បាលនេះ ប៉ុន្តែវាគ្រាន់តែជាអ្វីដែលពលរដ្ឋម្នាក់ក្នុងជាតិសាសន៍មួយអាចធ្វើបានទុកសម្រាប់អោយកូនចៅប្រុសស្រីរបស់កសិករ ដែលធ្លាប់ដាំស្រូវអោយគេទទួលទានអ្នកនេសាទដែលធ្លាប់ចាប់ត្រីអោយគេទទួលទាន គ្រូនៅបឋមសិក្សាដែលធ្លាប់បានបង្រៀនគេទុកជាមេរៀនសិក្សាប៉ុណ្ណោះ។

ទោះជាយ៉ាងណា ក្ដីរំពឹងមួយដែលនឹងក្លាយជាការពិត គឺកំហុសឆ្គងខាងអក្ខរាវិរុទ្ធ ច្បាស់ជានឹងកើតមានឡើងជាមិនខាននៅក្នុងសៀវភៅនេះ ព្រោះថាវាជាការសាកល្បងសរសេរលើកដំបូងតែប៉ុណ្ណោះ ដូច្នេះសូមកុំព្យាយាមក្ដិចត្រួយអី៕

អ៊ីស្រាអែល ថ្ងៃទី២៤ ខែកញ្ញា ឆ្នាំ២០១០

# សង្ខេបអ៊ីស្រាអែល



រាជធានី: ហ្សឺរូសាឡែម

ភាសាផ្លូវការ: ហ្សិបប្រ៊ូ និងអារ៉ាប់

ក្រុមជាតិសាសន៍: ជ្វីប(៧៥,៣%) អារ៉ាប់(២០,៥%) ផ្សេងៗ(៤,២%)

រដ្ឋាភិបាល: លទ្ធិប្រជាធិបតេយ្យអាស្រ័យសភា

ទទួលបានឯករាជ្យ: ១៤ ឧសភា ១៩៤៨

ផ្ទៃដី: ២០ ៧៧០ គីឡូម៉ែត្រក្រលា

ប្រជាជន: a) (២០១១) ៧ ៧៤៦ ០០០នាក់ b) (២០០៨) ៧ ៤០៦ ៩០០នាក់

c) ដង់ស៊ីតេ ៣៦៥,៣នាក់/គីឡូម៉ែត្រការេ

ចំណូលក្នុងប្រជាជនម្នាក់: ២៨ ៦៨៥ដុល្លារ/ឆ្នាំ

"ទឹកដីតូច ប្រជាជនតិច គ្មានធនធានធម្មជាតិ សត្រូវច្រើន

ប៉ុន្តែប៉ះមិនបាន"

*អ៊ីស្រាអែលមានទីតាំងស្ថិតនៅភាគខាងកើតនៃសមុទ្រមេឌីទេរ៉ាណេ ហើយព័ទ្ធជុំវិញដោយប្រទេស**លីបានុន** Lebanon នៅភាគខាងជើង **ស៊ីរី** Syria នៅភាគខាងជើងឈាងខាងកើត **ហ្សកដង់** Jordan នៅភាគខាងកើត និង**អេស៊ីប** Egypt នៅភាគខាងត្បូងឈាងខាងលិច។ ដែនដីកាន់កាប់ដោយអ៊ីស្រាអែល ដោយមិនរាប់បញ្ចូលទឹកដីដែលវាយដណ្តើមបាននៅកំឡុងសង្គ្រាម៦ថ្ងៃ នៅឆ្នាំ១៩៦៧ គឺប្រមាណ២០ ៧៧០គីឡូម៉ែត្រការេសរុបទាំងមូល ដែល២ភាគរយគឺជាផ្ទៃទឹក។ ផ្ទៃដីសរុបស្ថិតក្រោមក្របខ័ណ្ឌច្បាប់ ពេលដែលរាប់បញ្ចូល **ហ្ស៊ីរូសាឡែមខាងកើត** East Jerusalem និង **ហ្គោលឡែនហៃ** Golan Heights គឺ២២ ០៧២គីឡូម៉ែត្រការេ និងផ្ទៃដីសរុបក្រោមការគ្រប់គ្រងរបស់អ៊ីស្រាអែល រួមបញ្ចូលការគ្រប់គ្រងដោយយោធា និងដែនដីគ្រប់គ្រងជនជាតិប៉ាលេស្ទីននៅផ្នែកខ្លះនៃតំបន់ **វេស្សប៊ែង** West Bank មាន២៧ ៧៩៩គីឡូម៉ែត្រការេ។*

*និយាយពីអាកាសធាតុវិញ អ៊ីស្រាអែលមាន២រដូវគឺរដូវរងា(វិច្ឆិកាដល់មេសា) និងរដូវក្តៅ(ឧសភាដល់តុលា)។ ចាប់ពីខែមេសា ដល់ខែកញ្ញា ការធ្លាក់ភ្លៀងគឺវាខ្វះខាតណាស់ ដូច្នេះហើយទើបអ៊ីស្រាអែលបានកែច្នៃបច្ចេកទេសសន្សំសំចៃទឹកជាច្រើន រួមមាន ប្រព័ន្ធ**ធារាសាស្រ្តតំណក់ទឹក** Drip Irrigation ការបន្សាបទឹកសមុទ្រ(ពីទឹកប្រៃមកទឹកសាប)ជាដើម និងតម្លើងថ្លៃចំពោះអ្នកប្រើប្រាស់ទឹកច្រើន(លើកលែងកសិកម្ម) ដើម្បីដោះស្រាយ ភាពខ្វះខាតទឹកនេះ។ **ព្រះអាទិត្យគឺជាលុយ** Sun is money អ៊ីស្រាអែលទទួលបានជោគជ័យណាស់ ក្នុងការទាញប្រយោជន៍ពីថាមពលព្រះអាទិត្យដ៏សន្ធឹកសន្ធាប់ សម្រាប់ជាប្រភពផ្គត់ផ្គង់ជាថាមពលអគ្គិសនីបានមួយផ្នែកធំ សម្រួលដល់ការប្រើប្រាស់របស់ប្រជាពលរដ្ឋ គេនឹងឃើញនៅលើដំបូលផ្ទះនីមួយៗមានផ្ទាំងពិលសូឡាទាំងអស់។*

*អ៊ីស្រាអែលមានភាសាផ្លូវការ២គឺ **ភាសាហ៊ីបប្រ៊ូ** Hebrew និង**ភាសាអារ៉ាប់** Arabic។ ហ៊ីបប្រ៊ូជាភាសាដើមរបស់រដ្ឋ ហើយត្រូវបាននិយាយដោយប្រជាជនភាគច្រើន ឯភាសាអារ៉ាប់វិញត្រូវបាននិយាយដោយជនជាតិភាគតិចអារ៉ាប់។ ជនជាតិអ៊ីស្រាអែល*

ចំនួនច្រើន អាចធ្វើការទំនាក់ទំនងគ្នាជាភាសាអង់គ្លេសបានយ៉ាងល្អ ដូចដែលកម្មវិធីទូរទស្សន៍ជាច្រើនបានផ្សាយជាភាសានេះ ណាមួយភាសាអង់គ្លេស គឺត្រូវបានដាក់ក្នុងកម្មវិធីសិក្សា អោយបង្រៀនតាំងពីថ្នាក់ដំបូងនៅបឋមសិក្សាមកម្ល៉េះ។ ជាប្រទេសតែមួយគត់នៅលើពិភពលោក ដែលនៅរិលរស់នឹង**ប្រតិទិនហ៊ីបប្រ៊ូ** HebrewCalender ហើយថ្ងៃឈប់សម្រាករបស់ការងារ និងសាលារៀនត្រូវកំណត់ដោយ**ថ្ងៃឈប់សម្រាករបស់ជាតិជ្វីប** Jewish Holidays។

អ៊ីស្រាអែលប្រើប្រព័ន្ធសភានិយម ដូចនឹងសាធារណរដ្ឋប្រជាធិបតេយ្យ ជាមួយនឹងការបោះឆ្នោតសកល។ ប្រធានាធិបតីអ៊ីស្រាអែលគឺជាប្រមុខរបស់រដ្ឋ ប៉ុន្តែករណីយកិច្ចរបស់លោកមានកំណត់ និងភាគច្រើនផ្តោតទៅលើពិធីជាតិផ្សេងៗ។ សមាជិកសភាម្នាក់ ដែលគាំទ្រដោយមតិភាគច្រើនក្នុងសភា ត្រូវក្លាយជានាយករដ្ឋមន្ត្រី ជាទូទៅលោកជាប្រធានរបស់គណបក្សឈ្នះឆ្នោតមានសំឡេងច្រើនជាងគេបង្អស់ ហើយលោកគឺជាប្រមុខរដ្ឋាភិបាល និងគណៈរដ្ឋមន្ត្រី។ មួយទៀតអ៊ីស្រាអែលត្រូវបានអភិបាលដោយសមាជិកសភាចំនួន១២០រូប។ ការបោះឆ្នោតសភាត្រូវប្រារព្ធឡើងរៀងរាល់៤ឆ្នាំម្តង ប៉ុន្តែការបោះឆ្នោតដកសេចក្តីទុកចិត្តពីសភាអាចរំលាយរដ្ឋាភិបាលបានមុនកាលកំណត់។ ច្បាប់ជាមូលដ្ឋានរបស់អ៊ីស្រាអែល ដើរតួនាទីជារដ្ឋធម្មនុញ្ញមិនរៀបរយមួយ ដែលនៅក្នុងឆ្នាំ២០០៣ សភាបានចាប់ផ្តើមពង្រាងធម្មនុញ្ញជាផ្លូវការមួយអាស្រ័យលើច្បាប់អស់ទាំងនេះ។

អ៊ីស្រាអែលមានប្រព័ន្ធតុលាការ៣ថ្នាក់ ថ្នាក់ទាបបំផុតគឺតុលាការដំបូងដែលតាំងនៅជាប់នឹងមូលដ្ឋានផ្ទាល់ ក្នុងក្រុងនីមួយៗនៃផ្ទៃប្រទេស។ ឯតុលាការបន្ទាប់គឺតុលាការស្រុក ដែលមុខនាទីបម្រើអោយទាំងតុលាការឧទ្ធរណ៍ រឺតុលាការដោះស្រាយជម្លោះឡើងវិញ។ តុលាការថ្នាក់ទី៣ រឺខ្ពស់បំផុតក្នុងប្រទេសអ៊ីស្រាអែលគឺតុលាការកំពូល មានទីតាំងនៅ**ហ្សឺរូសាឡែម** និងមានមុខនាទីទ្វេរ ទី១ជាតុលាការខ្ពស់បំផុត

របស់ឧទ្ធរណ៍ និង ទី២ជាតុលាការយុត្តិធម៌ជាន់ខ្ពស់។ ក្នុងនាទីចុងក្រោយរបស់តុលាការកំពូល គឺអនុញ្ញាតបុគ្គលសាធារណៈគ្រប់ ទាំងប្រជាពលរដ្ឋ និងមន្ត្រីរាជការ ដាក់ពាក្យប្តឹងប្រឆាំងនឹងការសម្រេចចិត្តរបស់អាជ្ញធរ រឺអ្នកកាន់អំណាចរដ្ឋបាន។ ច្បាប់មូលដ្ឋាន=សេចក្តីថ្លៃថ្នូរ និងសេរីភាពរបស់មនុស្សជាតិ នៅក្នុងអ៊ីស្រាអែល មាននាទីការពារសិទ្ធ និងសេរីភាពរបស់ពលរដ្ឋអ៊ីស្រាអែលទាំងអស់។ អ៊ីស្រាអែលគឺជាប្រទេសតែមួយគត់ក្នុងតំបន់ ដែលត្រូវបានចាត់ថ្នាក់ថា "**សេរី**" ដោយមានការបង្កើត **ផ្ទះសេរីភាព** Freedom House ដោយសំអាងទៅលើកំរិតនៃសេរីភាពពលរដ្ឋ និងសិទ្ធនយោបាយ។

កងកម្លាំងការពារជាតិអ៊ីស្រាអែលរួមមាន: កងទ័ពជើងគោក កងទ័ពជើងអាកាស និងកងនាវា។ វាត្រូវបានស្ថាបនាឡើងកំឡុងសង្គ្រាមអារ៉ាប់អ៊ីស្រាអែលក្នុងឆ្នាំ១៩៤៨។ កងកម្លាំងការពារជាតិអ៊ីស្រាអែល បានចូលរួមក្នុងសង្គ្រាមសំខាន់ធំៗជាច្រើន និងជម្លោះព្រំដែនក្នុងប្រវត្តិសាស្ត្រដ៏ខ្លីរបស់គេ ដែលធ្វើអោយគេក្លាយជាប្រទេសមួយ ក្នុងចំណោមប្រទេសដ៏ទៃទៀត ដែលមានកម្លាំងទ័ពប្រដាប់អាវុធពូកែច្បាំងបំផុតក្នុងលោក។ ភារៈចំបងរបស់ជនជាតិអ៊ីស្រាអែលគឺការបំពេញកាតព្វកិច្ចយោធា នៅពេលដែលពួកគេម្នាក់ៗដល់អាយុ១៨ឆ្នាំ មនុស្សប្រុសត្រូវបម្រើការ៣ឆ្នាំ និងមនុស្សស្រីត្រូវបម្រើពី២ ទៅ៣ឆ្នាំ។ **ការបម្រើដែលខានមិនបាន គឺមនុស្សប្រុសត្រូវចូលរួមក្នុងទ័ពបម្រុង** រួចត្រូវបំពេញបេសកកម្មជាច្រើនសប្តាហ៍ក្នុងកិច្ចការជាទ័ពបម្រុងរៀងរាល់ឆ្នាំរហូតដល់ពួកគេមានអាយុ៤០ឆ្នាំ តែស្ត្រីភាគច្រើនត្រូវបានលើកលែងពីកិច្ចការទ័ពបម្រុងនេះ។ ជនជាតិអារ៉ាប់នៅអ៊ីស្រាអែល និងពលរដ្ឋដ៏ទៃទៀតដែលកំពុងជាប់រវល់នឹងការសិក្សាសាសនាពេញម៉ោង ក៏ត្រូវបានលើកលែងពីការបម្រើយោធាដែរ។ ជម្រើសផ្សេងទៀត សម្រាប់អ្នកដែលអាចទទួលការលើកពីកាតព្វកិច្ចយោធា គឺការបម្រើសេវាកម្មជាតិ ដូចជាកម្មវិធីសេវាកម្មនៅមន្ទីរពេទ្យសាលារៀន និងគម្រោងសកម្មភាពសុខមាលភាពសង្គមមួយចំនួនទៀត។ លទ្ធផល

នៃកម្មវិធីកេណ្ឌទាហាននេះហើយ ដែលធ្វើអោយកងកម្លាំងការពារជាតិអ៊ីស្រាអែល អាចរក្សាបានទាហានសកម្មប្រមាណ១៦៨ ០០០នាក់ និងទាហានបម្រុងបន្ថែមប្រមាណ ៤០៨ ០០០នាក់។ យោធាជាតិពឹងពាក់ជាខ្លាំងលើ ប្រព័ន្ធសព្វាវុធទំនើប ដែលចេញ ប្លង់ និងតម្លើងក្នុងប្រទេសអ៊ីស្រាអែលផ្ទាល់ ហើយក៏មាននាំចូលពីបរទេសខ្លះដែរ។ សហរដ្ឋអាមេរិចគឺជាអ្នកធ្វើវិភាគទានបរទេសគួរកត់សំគាល់មួយ ជាពិសេសជំនួយ យោធា ដែលគេរំពឹងទុកថាទឹកប្រាក់នឹងកើនឡើងដល់ ៦ពាន់លាន នៅទសវត្សរ៍ ក្រោយ ហើយសហរដ្ឋអាមេរិចបម្រុងនឹងផ្តល់ទឹកប្រាក់ ៣.១៥ពាន់លានរៀងរាល់១ឆ្នាំ ពីឆ្នាំ២០១៣ ដល់២០១៨។ អ៊ីស្រាអែលចំណាយ២៤% នៃប្រាក់ចំណូលជាតិសរុប លើវិស័យការពារ តែបច្ចុប្បន្នបរិមាណបានធ្លាក់ចុះមកត្រឹម៧.៣%វិញហើយ។

អ៊ីស្រាអែលរកស៊ីមុខរបរអ្វី? នាយករដ្ឋមន្ត្រីអ៊ីស្រាអែលដំបូងបាននិយាយថា **កសិកម្ម** គឺជាអ្វីដែលយើងត្រូវធ្វើមុនគេ ព្រោះយើងអាចនឹងចាញ់សត្រូវដោយមិន បានប្រយុទ្ធដោយសារតែការដាច់ពោះស្លាប់។ កសិកម្មរបស់គេប្រើបច្ចេកទេសខ្ពស់ ណាស់ ឯចំណែកទិន្នផលវិញទាំងបរិមាណ និងគុណភាពគឺគួរជាទីគាប់ចិត្ត។ គេ អាចផ្គត់ផ្គង់តម្រូវការក្នុងស្រុក ហើយថែមទាំងនាំចេញទៅក្រៅប្រទេសយ៉ាងសន្ធាប់ ទៀតផង។ លើសនេះទៀតអ៊ីស្រាអែលបានស្វែងរកមុខរបរដែលងាយរកចំណូល បានខ្ពស់ផ្សេងទៀតដូចយ៉ាង ការផលិតអាវុធ ការផលិតកម្មវិធីកុំព្យូទ័រ(software) ការច្នៃត្បូងពេជ្រ……………។

នៅថ្ងៃទី១៤ ខែឧសភា ឆ្នាំ១៩៤៨ ទីភ្នាក់ងារជាតិជ្វីប បានប្រកាសឯករាជ្យជារដ្ឋ អ៊ីស្រាអែលឯករាជ្យមួយ។ ថ្ងៃបន្ទាប់ សត្រូវប្រទេសអារ៉ាប់៤ រួមមាន: **អេស៊្សីប**Egypt **ស៊ីរី**Syria **លីបានុន**Lebanon **និងអ៊ីរ៉ាក់**Iraq បានបើកការវាយប្រហារអ៊ីស្រាអែលដោយ ចាប់ផ្តើមធ្វើ**សង្គ្រាមអារ៉ាប់អ៊ីស្រាអែល** Arab-Israeli **១៩៤៨**។ **សៅឌី អារ៉ាប៊ី** Saudi Arabia បានបញ្ជូនយោធាទៅធ្វើប្រតិបត្តិការចូលរួមជាមួយដែរ ដោយនៅក្រោម

បញ្ហាការរបស់យោធាអេស៊ីប ***យ៉េម៉ែន*** Yemen ក៏ដូចគ្នាបានប្រកាសសង្គ្រាម ប៉ុន្តែមិនធ្វើសកម្មភាពយោធានោះទេ។ បន្ទាប់ពីការប្រយុទ្ធស៊ីសាច់ហុតឈាមគ្នាអស់រយៈពេល១ឆ្នាំមក បទឈប់បាញ់ក៏ត្រូវបានធ្វើឡើង ហើយព្រំដែនបណ្តោះអាសន្នដែលស្គាល់ថា***ខ្សែបន្ទាត់បៃតង*** Green Line ក៏ត្រូវបានបង្កើតឡើង ជាមួយគ្នានឹងឧបសម្ព័ន្ធ ***ហ្ស៊កដង់*** Jordan ដែលបានស្គាល់ជា ***វ៉េស្ទប៊ែង*** West Bank និង***ហ្ស៊េរូសាឡឹមខាងកើត*** East Jerusalem។ រីឯអេស៊ីបវិញ បានកាន់កាប់តំបន់***ហ្គាស្សា ស្ទ្រីប*** Gaza Strip ហើយជនភៀសខ្លួនជាតិប៉ាលេស្ទីនប្រមាណ ៧០០ ០០០នាក់ ត្រូវបានបណ្តេញចេញ រឺភៀសខ្លួនចេញពីប្រទេសនៅកំឡុងពេលមានជម្លោះ។

អ្នកជាតិនិយមអារ៉ាប់ ដឹកនាំដោយប្រធានាធិបតី ***ហ្គាម៉ែល អ៊ែបដែល ណាសឺរ*** Gamal Abdel Nasser បានបដិសេធមិនទទួលស្គាល់រដ្ឋអ៊ីស្រាអែលឡើយ ហើយធ្វើការប្រកួកប្រកាសដើម្បីកំទេចថែមទៀតផង។ នៅឆ្នាំ១៩៦៦ ទំនាក់ទំនងរវាងអ៊ីស្រាអែល និងអារ៉ាប់បានប្រេះឆា យ៉ាប់យ៉ឺនឡើងៗឈានទៅរកចម្បាំងមួយយ៉ាងពិតប្រាកដរវាងរដ្ឋការអ៊ីស្រាអែល និងកងកម្លាំងអារ៉ាប់។ ក្នុងឆ្នាំ១៩៦៧ អេស៊ីបបានបណ្តេញ***ភ្នាក់ងាររក្សាសន្តិភាពរបស់អង្គការសហប្រជាជាតិ*** UN peacekeepers ចេញ ហើយថែមទាំងបានបោះទីតាំងនៅ***ឧបទ្វីបស៊ីណៃ*** Sinai Peninsula តាំងពីឆ្នាំ១៩៥៧ មកម្ល៉េះ លើសពីនេះទៀតអេស៊ីបបានប្រកាសពីការបិទផ្លូវគមនាគមន៍របស់អ៊ីស្រាអែលមិនអោយចេញចូលទៅកាន់***សមុទ្រក្រហម*** Red Sea ទៀតផង។ អ៊ីស្រាអែលបានចាត់ទុក សកម្មភាពទាំងនេះថាជាមូលហេតុនៃសង្គ្រាម ដែលវាពិតជាបានផ្ទុះឡើងមែនគឺ ***សង្គ្រាម៦ថ្ងៃ*** Six-Day War នាំអោយអ៊ីស្រាអែលអាចកាន់កាប់បាន ***វ៉េស្ទប៊ែង*** West Bank ***ហ្គាស្សា ស្ទ្រីប*** Gaza Strip ***ឧបទ្វីបស៊ីណៃ*** Sinai Peninsula ***ហ្គោលឡែនហៃ*** Golan Heaights ចំណែកព្រំដែនហ្ស៊េរូសាឡឹម គឺត្រូវបានពង្រីក ដែលរួមបញ្ចូល ***ហ្ស៊េរូសាឡឹមខាងកើត*** East Jerusalem បន្ថែមទៀត ហើយ ***ខ្សែបន្ទាត់បៃតង*** Green

Line ឆ្នាំ១៩៤៩ បានក្លាយជាព្រំដែនរដ្ឋបាលរវាងអ៊ីស្រាអែល និងបណ្តាប្រទេសដែលបានកាន់កាប់ជាប់ៗនោះ។

ជាថ្មីទៀត នៅថ្ងៃទី០៦ ខែតុលា ឆ្នាំ១៩៧៣ ជាតិថ្ងៃបរវងនូវ**សង្គ្រាមយ៉ុមគីបផ្ទូរ** ជាការវាយប្រហារគួរអោយភ្ញាក់ផ្អើលមួយរបស់អេស៊្សីប និងស៊ីរីប្រឆាំងនឹងអ៊ីស្រាអែល ហើយសង្គ្រាមនេះត្រូវបានបញ្ចប់ទៅវិញនៅថ្ងៃទី២៦ខែតុលា ដោយជ័យជំនះបានទៅលើអ៊ីស្រាអែល គឺគេបានវាយច្រានកម្លាំងទ័ពអេស៊្សីប និងស៊ីរី ប៉ុន្តែគេក៏ទទួលនូវការវិនាសបាត់បង់យ៉ាំងសហ្សើមណាស់ដែរ។

## ពួកយើងមិនអាចរស់នៅបានទេបើសិនណាជាខ្វះរបស់ពាយ៉ាងនេះ

១. បញ្ញា

២. បញ្ញា

៣. បញ្ញា

## ចុតហ្មាយ 

"សូមមើលទៅកូនលាដ៏តូចមួយក្បាលដែលកំពុង
តែស៊ីស្មៅនៅទីវាលនោះណ៎ា មិនថាវាជាលា
ឈ្មោលឬ ញីនោះទេ ប្រាកដណាស់ វានឹងត្រូវបាន
គេប្រើសំរាប់អូស ទាញ របស់ធ្ងន់ៗដាក់ជាមិនខាន
នៅពេលដែលវាធំពេញវ័យឡើង"







# សារៈរបស់សារពត៌មាន



ពត៌មានគឺជាឧបករណ៏មានឥទ្ធិពលបំផុតក្នុងការប្រាស្រ័យទាក់ទងគ្នា។ វាជួយផ្សព្វផ្សាយរឿងដែលត្រឹមត្រូវមួយ ហើយចំពេលល្អថែមទៀត មានន័យថាសមស្រប នឹងទេសៈ កាល។ វាផ្តល់ជូននូវ ការប្រាប់ពីការពិតទៅកាន់អ្នកស្តាប់ដ៏សន្ធឹកសន្ធាប់ ពីអ្វីដែលត្រូវ និងអ្វីដែលខុស។ ដូច្នេះក្តី បើពត៌មានត្រូវបានភ្ជាប់ទៅជាមួយនឹងការផ្សាយដំណឹងមិនពិតវិញ គឺវាហាក់ដូចជាភ្លើងសំរាប់ដុតរោលអញ្ចឹង ប៉ុន្តែបើគិតនៅក្នុងផ្លូវល្អវិញ វាជួយយើងច្រើនណាស់ ក្នុងការប្រាប់ពួកយើងពីការពិតដែលកើតមានឡើងជុំវិញពិភពដែលពួកយើងកំពុងរស់នៅនេះ។

ពួកយើងមិនអាចប្រកែកបានជាមួយនឹងការពិតដែលថា ពួកយើងត្រូវបានផ្សារភ្ជាប់ជាមួយនឹងបញ្ហាសង្គមយ៉ាងចាក់ស្រែះ ដែលវាពិបាកក្នុងការរលាស់ខ្លួនចេញណាស់។ បញ្ហាសង្គមវាជាដំបៅដែលប៉ះពាល់ផ្ទាល់ រឺដោយប្រយោលទៅលើសមាជិកសង្គមភាគច្រើន រឺក៏ទាំងអស់ ហើយគេអាចរាប់បញ្ចូលដូចជា ភាពក្រីក្រ អំពើហិង្សា អំពើពុករលួយ ការសង្កត់សង្កិនខាងសិទ្ធមនុស្ស ការរើសអើង និងបទឧក្រិដ្ឋជាដើម។ ពត៌មានដើរតួនាទីយ៉ាងមានប្រយោជន៍មួយសំរាប់សង្គម ដូចយ៉ាងបណ្តាញសារពត៌មានសព្វថ្ងៃ នៅតាមទូរទស្សន៍ក្តី រលកធាតុអាកាសក្តី ទំព័រសារពត៌មានក្តី គឺជាអ្នកបញ្ចេញបញ្ចូលលើបញ្ហាសង្គមមួយចំនួនធំ ដែលអនុញ្ញាតអោយពួកយើងអាចវាយតំលៃពីសភាពពិតជាក់ស្តែងបាន។ វាជាការពិតដែលនៅក្នុងយុគសម័យខ្លះ និងអាណាចក្រខ្លះ ពត៌មានមិនត្រូវបានផ្តល់ដោយសេរី និងឱកាសស្មើភាពគ្នាក្នុងការពិនិត្យពិច័យទៅលើបញ្ហារបស់សង្គមជាចំហ ដូចអ្វីដែលសង្គមទូទៅបានផ្តល់អោយនោះទេ ប៉ុន្តែយើងមិនអាចប្រកែកបានទេថា ការពិតដែលបញ្ចេញទាំងនោះគឺមានគោលបំណងផ្តល់ជូននូវភាពយុត្តិធម៌ជូនមនុស្សទូទៅ។

នៅអ៊ីស្រាអែលនេះ ប្រជាជនទូទៅមានការយកចិត្តទុកដាក់នឹងតាមដានពត៌មានណាស់ ពួកគេមើលទូរទស្សន៍ ស្តាប់វិទ្យុ អានកាសែតជារៀងរាល់ថ្ងៃមិនដែលខានឡើយទាក់ទងនឹង រឿងរ៉ាវដែលកើតមានឡើងនៅក្នុងតំបន់ដែលគេរស់នៅ និងប្រទេសរបស់ពួកគេ។ បើសួរថា ហេតុអ្វីបានជាពួកគេយល់ថាពត៌មានវាសំខាន់ នោះយើងនឹងបានចម្លើយមកវិញថា **ពត៌មានគឺជាអាហារខួរក្បាល** យើងត្រូវការហូបនំប៉័ងបន្លែ សាច់ ដើម្បីចិញ្ចឹមរូបរាងកាយរបស់យើងអោយរឹងមាំ និងមានសុខភាពល្អ ឯខួរក្បាលរបស់យើងក៏ត្រូវការចំណីល្អៗ ឆ្ងាញ់ៗដែរ ដើម្បីការរីកចំរើនធំធាត់របស់វា ហើយបើគ្មានអាហារសម្រាប់វាទេតើវាអាចនឹងរស់ដោយរបៀបណា ចុះបើខួរក្បាលទន់ខ្សោយទ្រុឌទ្រោម តើវានៅមានអ្វីទៀតដែលរឹងមាំ?

ចង់ដឹងធ្វើដំណើរនៅតាមផ្លូវនាព្រឹកព្រលឹម យើងនឹងឃើញសកម្មភាពមួយចំនួនដែលជាភស្តុតាងបញ្ជាក់ថាតើពួកគេអោយតំលៃទៅលើពត៌មានដល់កំរិតណា។ មានអ្នកខ្លះអង្គុយអានកាសែតនៅពេលដែលគេកំពុងអង្គុយរង់ចាំឡានក្រុង អ្នកខ្លះទៀតអានកាសែត នៅពេលគេអង្គុយនៅលើឡានក្រុងធ្វើដំណើរទៅធ្វើការតែម្តង ឯនៅតាមហាងអាហារ នីមួយៗ យើងនឹងឃើញមានអ្នកខ្លះអានពត៌មានខណ:គេកំពុងស្រស់ស្រូបអាហារពេលព្រឹក ងាកមកនៅក្នុងរថយន្តឯកជន នៅតាមផ្លូវឯណោះវិញ លឺសំលេងពិធីករ អានពត៌មានលាន់រំពងសឹងតែគ្រប់រថយន្ត។ ជាចុងក្រោយ រៀងរាល់ល្ងាចឡើង យើងនឹងឃើញមានកាសែតនៅពាសពេញកន្លែងសាធារណ: នេះហើយជាទម្លាប់នៃការចែករំលែក គេធ្វើបែបនេះគឺបញ្ចៀសការបោះចោល ដោយទុកវាអោយអ្នកដែលខាកខានមិនបានមើលកាលពីព្រឹក រឺអ្នកដែលគ្មានលទ្ធភាពចំណាយ។

មិត្តចាស់រៀនជាមួយគ្នាកាលនៅវិទ្យាល័យម្នាក់ បានប្រាប់ពីបទពិសោធន៍របស់ពូបង្កើតគេ ទាក់ទងនឹងពត៌មានថា កាលពីពូគេរៀននៅសកលវិទ្យាល័យ គាត់គឺជានិស្សិតម្នាក់ ដែលចូលចិត្តអាន និងស្តាប់ពត៌មាន តាមវិទ្យុនិងទំព័រកាសែតណាស់

ព្រោះគាត់យល់ថា ពតិមានគឺសំខាន់ សំខាន់ព្រោះរឿងអី ព្រោះវាប្រាប់ពីរឿងរ៉ាវដែលកើតមានឡើងមិនត្រឹមតែក្នុងប្រទេសប៉ុណ្ណោះនោះទេ ថែមទាំងព្រឹត្តិការណ៍ដែលកើតឡើងលើសកលលោកផងដែរដូចជាគ្រោះធម្មជាតិនានា រញ្ជួយដី ខ្យល់ព្យុះ បន្ទុះភ្នំភ្លើង ទឹកជំនន់.....វិបត្តិសេដ្ឋកិច្ច និងយុទ្ធសាស្ត្រក្នុងការដោះស្រាយរបស់ប្រទេសរីកចំរើនទាំងនោះ......។ មិនមែនពតិមានតែមួយមុខគត់ទេដែលយើងទទួលបាន វានៅមានចំណេះដឹងទូទៅផ្សេងទៀតដែលយើងអាចរៀនសូត្របន្ថែម ស្តីពីបរិស្ថាន ច្បាប់ ប្រវត្តិសាស្ត្រ សុខភាព នយោបាយ..........ហាក់បីដូចជាឃ្លាំងបណ្ណាល័យមួយអញ្ចឹង អនុញ្ញាតអោយយើងសិក្សាស្រាវជ្រាវយូរអង្វែងសឹងតែថាពេញមួយជីវិត។ គាត់បន្ថែមយ៉ាងដូច្នេះថា វាមិនជាការលំបាកអីនោះទេ គ្រាន់តែចំណាយពេលពី២ទៅ៣ម៉ោងក្នុង១ថ្ងៃ សំរាប់តាមដានពតិមាន ហើយយើងអាចទទួលបានមកវិញនូវចំណេះដឹងដ៏សន្ធាប់ ជាពិសេសគឺ **ឱកាស**ជារបស់មានតម្លៃឥតគណនា ដែលគាត់ទទួលបានពីពតិមាន។ ក៏ព្រោះតែទុកចិត្តនឹងសមត្ថភាពខ្លួនឯង បូកផ្សំនឹងឱកាសមកដល់តាមរយៈ ការតាមដាននេះ បានជំរុញអោយគាត់ហ៊ាន ប្រលោកនឹងការប្រកួតប្រជែង ដើម្បីបានទទួលអាហារូបករណ៍បន្តការសិក្សាថ្នាក់អនុបណ្ឌិតនិងបណ្ឌិតនៅបរទេស ហើយជាលទ្ធផលគាត់ទទួលបានជោគជ័យយ៉ាងគួរជាទីពេញចិត្ត។ គោលដៅនៅចំកណ្តាល អ្នកនៅទិសខាងជើង ឯគូប្រជែងអ្នកនៅទិសខាងត្បូង ទាំង២នាក់ស្ថិតនៅចំងាយស្មើគ្នាពីគោលដៅ មានន័យថា**បើអ្នកដើរទៅមុខ១ជំហានគឺអ្នកនឹងទៅដល់ទីស្មើនឹងគូប្រជែង តែបើអ្នកនៅស្ងៀមមួយកន្លែងមិនបោះជំហានគឺអ្នកនឹងទៅដល់ទីយឺតជាងគូប្រជែង១ជំហាន ហើយបើនាក់ភ័ន្តច្រឡំដើរថយក្រោយ១ជំហានគឺអ្នកនឹងទៅដល់ទីយឺតជាងគូប្រជែង២ជំហាន ចុះហេតុអ្វីបានជាអ្នកមិនរត់?** ជាមតិចុងក្រោយរបស់គាត់។

ខាងក្រោមនេះ ជាបទពិសោធន៍នៃការបង្កើតកម្មវិធី កាលដែលគាត់កំពុងសិក្សានៅសកលវិទ្យាល័យ:

*គាត់ចូលចិត្តអានពត៌មានណាស់ រៀងរាល់ព្រឹក ពេលធ្វើដំណើរទៅសាលារៀន គាត់តែងឈប់ទិញកាសែត១ច្បាប់ ជារៀងរាល់ថ្ងៃ មិនដែលខានឡើយ។ លុះពេលទៅដល់ថ្នាក់ អ្វីដែលមានផ្សាយនៅលើទំព័រកាសែត តែងត្រូវបាននិយាយតៗគ្នាពីមាត់មួយទៅមាត់មួយ បញ្ហាគ្រោះធម្មជាតិ គ្រោះថ្នាក់ចរាចរណ៍ ដំណឹងជ្រើសរើសបុគ្គលិកជាដើម ធ្វើអោយមិត្តក្នុងថ្នាក់ទាំងអស់គ្នា ដឹងលឺរាល់ហេតុការណ៍ដែលកើតឡើងប្រចាំថ្ងៃគ្រាន់តែមិនច្បាស់លាស់ ដែល**ភាពស្រពិចស្រពិលគឺជាគុណសម្បត្តិដ៏ប្រពៃរបស់មនុស្សល្ងង់**។ ដោយឃើញថាកើតប្រយោជន៍បែបនេះ ទើបគំនិតមួយបានលេចឡើងក្នុងខួរក្បាលរបស់គាត់ គឺគាត់ចង់អោយមានការផ្តល់ពត៌មានមកថ្នាក់ជារៀងរាល់ថ្ងៃ ដើម្បីអោយមិត្តរួមថ្នាក់ទាំងអស់បានអាននិងទាញសារៈពីវា ណាម្យ៉ាងគិតថា ធ្វើបែបនេះវាក៏អនុញ្ញាតអោយសិស្សប្អូន និងគ្រូអាចមើលបាន ព្រោះកាសែតពត៌មានទាំងនោះនឹងត្រូវទុកក្នុងថ្នាក់ជាឯកសារ ជា**សម្បត្តិរួម**។*

*ដូច្នេះ ជាដំបូងគាត់សំរេចចិត្តថា សារពត៌មាន២ច្បាប់ជាភាសាខ្មែរ១ច្បាប់ និង១ច្បាប់ទៀតជាភាសាអង់គ្លេស (ល្អសម្រាប់អ្នកចង់បង្កើនសមត្ថភាពខាងភាសា)។ បន្ទាប់មក គាត់បានគណនាចំនួនលុយ ដែលនឹងត្រូវចំណាយ ប្រហែលជា១៥ដុល្លារ (១ថ្ងៃ១ច្បាប់ស្មើនឹង១ ០០០រៀល ៣០ថ្ងៃ៣០ច្បាប់ស្មើនឹង៣០ ០០០រៀល រួចគុណវានឹង២ លុះនឹងឃើញ៦០ ០០០រៀលស្មើនឹង១៥ដុល្លារ)។ លុយច្រើនម្លឹងៗដែលត្រូវចំណាយ គាត់មិនអាចរ៉ាប់រងតែម្នាក់ឯងបានទេ ប៉ុន្តែគាត់សំរេចថានឹងចំណាយ ៥០ភាគរយ ឯចំណែក៥០ភាគរយទៀតត្រូវតែប្រមូលការចូលរួមពីមិត្តភ័ក្រ្តរបស់គាត់បន្ថែមទៀត ណាម្យ៉ាងគាត់មិនទាន់ច្បាស់ក្នុងចិត្តនៅឡើយទេថាមិត្តរួមថ្នាក់នឹងព្រមចូលរួមដែររឺអត់ទេ ដោយដឹងស្រាប់ហើយថា**មនុស្សមិនងាយចំណាយលុយដោយងាយៗទៅលើអ្វីដែលគេគិតថាឥតប្រយោជន៍នោះទេ សូម្បីតែ១០០រៀលក្តី**។ ធ្វើយ៉ាងម៉េចទៅអញ្ចឹងម្តងនេះ?*

មិនបង្អង់យូរ គាត់ក៏រៀបចំធ្វើក្រដាសបញ្ជីសំណួរមួយសន្លឹកឡើង ដែលមាន ២០សំណួរ ដើម្បីវាយតំលៃថាតើ មិត្តទាំងនោះមានចំណាប់អារម្មណ៍នឹងកម្មវិធីរបស់គាត់វីយ៉ាងណា។ ជាលទ្ធផលឃើញថាពួកគេមានចំណាប់អារម្មណ៍ជាខ្លាំងសឹងតែថា៩៩ភាគរយឯណោះ។ សប្បាយចិត្តមែនទែន មកដល់ផ្ទះវិញ គាត់ក៏ត្រៀមខ្លួនហាត់មាត់ហាត់សម្តី ដើម្បីពន្យល់បញ្ចុះបញ្ចូលមិត្តភ័ក្រ្ត ដាក់កម្មវិធីនោះអោយកើតជារូបរាងឡើង។ ជួបម្នាក់និយាយម្នាក់ ជួប៥នាក់និយាយ៥នាក់ ជាចុងក្រោយមិត្តរបស់គាត់ទាំងស្រីទាំងប្រុសស្ទើរតែទាំងអស់បានយល់ព្រមចូលរួម សូម្បីតែអ្នកមិនសូវដែលមកសាលាសោះ ក៏គាត់បានបញ្ចុះបញ្ចូលរហូតដល់ពួកគេយល់ស្រប ហើយព្រមបង់ប្រាក់ដែរ។ ***ចំណាយតែ៥០០រៀលប៉ុណ្ណោះក្នុង១ខែ តែអាចទទួលបានកាសែតមើលរាល់ថ្ងៃពេញ១ខែ មិនល្អទេអី? ៥០០រៀលផឹកទឹកអំពៅមួយកែវក៏អស់ដែរ*** ជាប្រយោគសំលាប់របស់គាត់។ សិស្សក្នុងថ្នាក់ទាំងអស់មាន៦០នាក់ ដូច្នេះអាចប្រមូលបានលុយ ៣០ ០០០រៀលស្មើនឹង៧.៥ដុល្លារ ស្មើនឹង៥០ភាគរយ។ ពេលសួរទៅគាត់ថា មិនមានភាពស្មើគ្នាទេដែល ៦០នាក់ចំណាយ៥០ភាគរយ ឯ៥០ភាគរយទៀតទុកអោយមនុស្សម្នាក់ទៀតជាអ្នកចេញនោះ គាត់ឆ្លើយមកវិញថា គាត់មិនបានគិតដល់រឿងស្មើគ្នា រឺមិនស្មើគ្នាអីនោះទេ ប៉ុន្តែអ្វីដែលគាត់បានគិតដល់នោះ គឺការចង់ឃើញមិត្តរួមថ្នាក់ទាំងអស់គ្នាចេះរួបរួមសាមគ្គីប្រមូលកំលាំងគ្នាធ្វើរឿងមួយ ដែលជាផលប្រយោជន៍ពួកគេដោយខ្លួនឯង ជាពិសេសបង្រៀនពួកគេដោយប្រយោលអោយចេះទាញប្រយោជន៍ពីសារពត៌មាននេះឯង។

ខែថ្មីបានចូលមកដល់ កាសែត២ច្បាប់(ភាសាអង់គ្លេស១ច្បាប់ និងខ្មែរ១ច្បាប់) ត្រូវបានយកមកដល់ថ្នាក់រៀនជារៀងរាល់ថ្ងៃ។ ដោយមិនអនុញ្ញាតអោយនរណាយកទៅផ្ទះនោះទេ គាត់ក៏សំរេចចិត្តទិញកញ្ច្រែងផ្តៅដាក់សៀវភៅ១ សំរាប់ដាក់វាជៀសវាងការបាត់ និងភាពរញ៉េរញ៉ៃអត់សណ្តាប់ធ្នាប់ នៃកាសែតទាំងនោះ។ ស្តាប់ទៅដូចម្យ៉ាងដែរ ចំណាយតែ៥០០រៀលសោះក្នុង១ខែ បែរជាអាចទទួលបានកាសែត

មើលរឿងរាល់ថ្ងៃពេញ១ខែ នរណាមិនចាប់អារម្មណ៍ ចង់មិនចង់ ក៏ត្រូវសាក១ខែមើលដែរ។

ចប់ហើយការអធិប្បាយដ៏ក្បោះក្បាយរបស់គាត់ ឯអត្ថបទសារៈសារពត៌មាននេះក៏ចប់ដូចគ្នា។ មិត្តទាំងអស់អាចស្វែងយល់បន្ថែមបាន ជួនកាលមិត្តអាចនឹងស្វែងរកឃើញអត្ថប្រយោជន៍ដ៏វិសេសវិសាលសម្រាប់ជីវិតពីវាដោយខ្លួនឯង នៅថ្ងៃណាមួយជាមិនខាន។

# វាចារបស់ស្ត្រី មន្ត្រីរាជការម្នាក់



"ខ្ញុំមានក្តីស្រមៃមួយថា: ថ្ងៃណាមួយរាល់អ្នកម្តាយជាតិថ្វីប
ទាំងអស់ប្រាប់ពីមូលហេតុដែលពួកគាត់បញ្ជូនកូនៗ
អោយទៅរៀនថា ម៉ែអោយកូនទៅរៀនគឺមិនមែនដើម្បី
អោយពួកកូនមានចំណេះដឹងខ្ពស់ មានការងារល្អៗ
រឺក៏ជីវភាពធូរធារនោះទេ
គឺដោយសារតែអ៊ីស្រាអែលត្រូវការពួកកូនៗ"



I
ISRAEL



# មិត្តលាទាំងពីរ



ក្នុងភូមិតូចមួយនៅទីជនបទឆ្ងាយពីទីរួមខេត្តគួរសមដែរ គ្រួសារកសិករមួយដែលកំពុងតាំងទីលំនៅជាលក្ខណៈដីភូមិ បានធ្វើស្រែចំការ ដាំបន្លែបង្ការ ដំណាំហូបផ្លែស្កេកស្កះ ហើយព្រមទាំងមានចិញ្ចឹមសត្វមួយចំនួនថែមទៀតផងរួមមានគោ ក្របី ជ្រូក មាន់ ទា និងកូនលាតូចៗចំនួន២ក្បាលផងដែរ ដែល**ពូស្នួរ**បានយកពួកវា មកពីកសិដ្ឋានរបស់ឪពុកក្មេករបស់គាត់។

ពងមាន់ និងពងទាត្រូវបានប្រមូលជារៀងរាល់ថ្ងៃ រួមជាមួយបន្លែស្រស់ៗខ្ចីៗ ល្វក់ត្រូវបានបេះយកមកទុកសំរាប់បោះអោយ ឈ្មួញកណ្តាលដែលនឹងមកយកដល់ផ្ទះ។ ចំនែកឯពពួកសត្វពាហនៈធំៗដែលនៅនឹងទ្រុងខាងក្រោយផ្ទះវិញ រួមមានគោក្របីត្រូវបានប្រើសំរាប់ជាកំលាំងអូសទាញ និងភ្ជួររាស់នៅខែធ្វើស្រែធ្វើភ្លឺ គឺលើកលែងតែកូនលាតូចៗ២ក្បាលនោះទេ ដែលមិនត្រូវបានប្រើធ្វើអីទាំងអស់ ព្រោះមាឌពួកវានៅតូចៗនៅឡើយ ណាមួយកំលាំងអូសទាញមានគ្រប់គ្រាន់រួចទៅហើយ ទើបគាត់សំរេចចិត្តលក់ពួកវាទាំង២នោះ ទៅអោយប្អូនប្រុសរបស់គាត់ទៅ ព្រោះនៅចំការប្អូនគាត់នៅខ្វះកំលាំងអូសទាញនៅឡើយ។

និយាយពីកូនលាទាំងពីរក្បាលនោះវិញ ឈ្មោលទាំង២។ ពួកវារស់នៅជាមួយគ្នា ស៊ីស្មៅនៅទីវាលជាមួយគ្នា ប្រលែងលេងជាមួយគ្នា និងដេកក្នុងទ្រុងជាមួយគ្នាតាំងពីនៅតូចៗរហូតពេញវ័យ គឺអ្វីៗទាំងអស់ ពួកវាស្ថិតក្នុងស្ថានភាពដូចគ្នា មិនដែលថា១ធ្វើនេះហើយ១ទៀតបែរជាធ្វើនោះផ្សេងទេ បើទុកជាមនុស្សវិញ ហាក់បីដូចជាបងប្អូនភ្លោះដែលមានចំណង់ចំណូលចិត្តប្រហាក់ប្រហែលគ្នា ព្រមទាំងរូបរាងក៏សឹងតែស្រដៀងគ្នាផងដែរ។

ក្រោយពីបានផ្លាស់ទីមកនៅក្នុងលំនៅថ្មី ពួកវាត្រូវបានដាក់ទ្រុងបែកពីគ្នាព្រោះទ្រុងនីមួយៗធំល្មមសត្វ១ក្បាលប៉ុណ្ណោះ ណាមួយវាងាយស្រួលចិញ្ចឹមថែទាំជាងដាក់

សត្វចាប់ពី២ក្បាលនៅក្នុងទ្រុងតែ១។ ពេលវេលាចេះតែកន្លងទៅ ពីមួយថ្ងៃទៅមួយថ្ងៃ ពួកវាទាំង២បានចំរើនវិញឡើងជាមួយនឹងរូបរាងដ៏រឹងមាំ ពណ៌សំបុរដ៏ស្រស់ស្អាតខុសប្លែកពីពពួកសត្វលាធម្មតា។ ឃើញដូច្នេះម្ចាស់ថ្មីរបស់វានឹកក្នុងចិត្តថាបើសិនជាមើលថែទាំពួកវាអោយបានដិតដល់ មានសុខភាពល្អ កំលាំងមាំមួន ធន់នឹងការងារធ្ងន់ និងអាចធ្វើការបានច្រើនម៉ោងទៀតនោះ គាត់នឹងអាចចំណេញបានប្រាក់ច្រើនក្រោយពេលដែលគាត់លក់វាទៅអោយផ្ទះដង្វៅក្នុងភូមិ ដែលត្រូវការពពួកពូជសត្វល្អៗសំរាប់ជាកំលាំងពលកម្ម។

ចំនីល្អៗត្រូវបានដាក់អោយលាទាំង២ស៊ីជារៀងរាល់ថ្ងៃ ឯទ្រុងដែលពួកវានៅក៏ដូចគ្នា គឺត្រូវបានសំអាតយ៉ាងទៀងទាត់ជាប់ជាប្រចាំការពារកុំអោយពួកវាធ្លាក់ខ្លួនឈឺជាដាច់ខាត។ ចំនែកការងារវិញក៏ដូចគ្នា ម្ចាស់វាបានសាកល្បងអោយពួកវាអូសទាញរបស់របរ តាំងពីទំងន់ស្រាលៗរហូតដល់ធ្ងន់ៗដើម្បីអោយពួកវាស៊ាំ ណាឯពេលវេលាការងារក៏ចេះតែកើនឡើងជាលំដាប់ ពីមួយពេលព្រឹកក្នុង១ថ្ងៃ រហូតតាំងពីពេលព្រឹកដល់ល្ងាចក្នុង១ថ្ងៃ។ យុទ្ធសាស្ត្រនេះហាក់អំណោយផលមែន ភាពធុននឹងការងារក៏ដូចជាសមត្ថភាពក្នុងការងាររបស់ពួកវាបានរីកចំរើនជាច្រើន។ ថៃដន្យថ្ងៃមួយ ម្ចាស់វាបានឆ្លោយមាត់នៅពេលគាត់កំពុងដាក់ចំនីអោយពួកវាថា: ពួកឯងកុំខ្ជិលអោយសោះ ហើយត្រូវតែឧស្សាហ៍ធ្វើការងារឡើង ព្រោះពួកឯងអាចនឹងទៅធ្វើការនៅឯផ្ទះលោកដង្វៅបាន បើសិនណាសមត្ថភាពការងាររបស់ពួកឯងខ្ពស់ជាងនេះ។

លឺសំដីម្ចាស់វាដូចនេះ លាទាំង២ ហាក់មានមោទនភាពចំពោះខ្លួនឯងរៀងៗខ្លួន រួចគិតថា ខ្លួនច្បាស់ជាត្រូវបានគេទិញយកទៅធ្វើការនៅផ្ទះដង្វៅជាក់ជាមិនខានដោយសារតែរូបរាងដ៏មាំទាំ និង សមត្ថភាពពិតៗរបស់ខ្លួនពួកវា។

ចាប់តាំងពីពេលនោះមក ពួកវាបានខិតខំប្រឹងប្រែងធ្វើការបញ្ចេញសមត្ថភាពរៀងៗខ្លួនដើម្បីអោយម្ចាស់ខ្លួនស្រលាញ់ ជាឧទាហរណ៍ គឺនៅពេលដែលលាណា១អាចដឹកជញ្ជូនស្រូវ១០រទេះក្នុង១ថ្ងៃ នោះអាមួយក្បាលទៀតនឹងខំប្រឹងអូសអោយបាន

១ពារទេះក្នុង១ថ្ងៃ ពេលនោះចិត្តចង់ឈ្នះចង់ចាញ់គ្នាបានកើតឡើងរវាងពួកវាទាំងពីរ ដែលធ្វើអោយ ចំណងមិត្តភាពរបស់ពួកវាចេះតែថយចុះពីមួយថ្ងៃទៅមួយថ្ងៃមិនដូចពីគ្រាមុនទៀតឡើយ។ ចំនែកម្ចាស់របស់ពួកវាវិញ កាលបើឃើញលាទាំង២កាន់តែខិតខំប្រឹងប្រែងធ្វើការងារគាត់ក៏កាន់តែសប្បាយចិត្ត ដែលនាំអោយគាត់ផ្តល់ចំណីទៅអោយពួកវាមិនបានស្មើគ្នា គឺនៅថ្ងៃណាដែលលាណាមួយធ្វើការបានច្រើននោះចំណីដែលវានឹងទទួលបានក៏កាន់តែបានច្រើនដូចនោះដែរ ដែលជាហេតុ១ផងដែរដែលនាំអោយកើតមានការច្រណែនឈ្នានីសរវាងពួកវាទាំង២។

ម្នាក់ៗនៅតែចង់បង្ហាញពីភាពអស្ចារ្យរបស់ខ្លួន ដោយធ្វើការធ្ងន់ៗហួសកំលាំងជាប្រចាំ ទាំងទំងន់ដែលពួកវាអូសទាញ ទាំងពេលវេលាធ្វើការ មិនយូរប៉ុន្មានពួកវាទាំង២បានធ្លាក់ខ្លួនឈឺរៀងៗខ្លួន ចំណែកផលទុនផលការងារក៏កាន់តែធ្លាក់ចុះជាលំដាប់ពីមួយថ្ងៃទៅមួយថ្ងៃរហូតឈឺធ្ងន់ធ្វើការលែងកើត។

ដោយឃើញសភាពធ្ងន់ធ្ងរពេកបែបនេះ និងគ្មានសង្ឃឹមថាអាចនឹងជួយព្យាបាលពួកវាអោយជាសះស្បើយឡើងវិញបាន គាត់ក៏សំរេចចិត្តលក់ពួកវាទាំង២ទៅអោយអ្នកលក់សាច់សត្វទៅ ជៀសវាងមុនពេលពួកវាងាប់ស្អុយនាំអោយខាត។

គិតៗទៅគួរអោយសោកស្តាយណាស់ ដែលមហិច្ឆិតាពួកវាចង់បាននោះ ត្រូវរលាយសាបសូន្យព្រមជាមួយនឹងចំណងមិត្តភាព ដែលពួកវាខំសាងតាំងពីដើមមកក៏ត្រូវបានបែកបាក់អស់ ឋសុភមង្គល ដែលពួកវាធ្លាប់មានជាមួយគ្នាទាំងប៉ុន្មានវានៅសល់ត្រឹមតែការចងចាំប៉ុណ្ណោះ ហើយសូម្បីតែអាយុជីវិតពួកវាផងដែរក៏ត្រូវបានផ្តាច់ក៏ដោយសារតែមូលហេតុអ្វីទៅណ៎ា? សូមជួយប្រាប់ផងមើល៎? ហើយពេលដែលដឹងច្បាស់ហើយកុំភ្លេចនិទានប្រាប់មនុស្សដែលខ្លួនស្រលាញ់ផង និងជាពិសេសប្អូនតូចៗរបស់ពួកយើង។

# វាចាមាសរបស់ម្ដាយ



ឯងសំបុរខ្មៅហើយ

តែចិត្តឯងកុំអោយខ្មៅទៀតអោយសោះកូនប្រុស









# បង្កើតសៀវភៅបង្វឹកខួរកូនក្មេងខ្មែរ



អ្វីទៅជា**ទេពកោសល្យ**? ជាសមត្ថភាពប៉ិនប្រសប់អំណោយផលពីធម្មជាតិលើវិស័យអ្វីមួយ ដូចអ្នកខ្លះប៉ិនប្រសប់ខាងគូរគំនូរ នោះគេនឹងហៅគេថាមានទេពកោសល្យខាងគំនូរ ប៉ិនប្រសប់ខាងច្រៀងមានទេពកោសល្យខាងចំរៀង។ តើគេអាចដឹងថា មនុស្សម្នាក់មានទេពកោសល្យលើវិស័យអ្វីមួយដោយរបៀបណា?

មានធ្លាប់លឺ ពីរបៀបពិសោធន៍របស់ជនជាតិជប៉ុនទៅលើក្មេងៗ ដើម្បីចង់ដឹងថាពួកគេម្នាក់ៗមានទេពកោសល្យលើវិស័យណាដែររឺទេ? ដាក់ក្មេងៗដែលមានអាយុក្រោម១០ឆ្នាំនៅក្នុងផ្ទះដ៏ធំមួយ ហើយនៅក្នុងផ្ទះនោះពោរពេញដោយរបស់របររាប់មិនអស់ដូចជាគ្រឿងអេឡិចត្រូនិច គ្រឿងសិល្បៈ គ្រឿងយន្ត គ្រឿងបរិក្ខារសំភារៈសិក្សា.....................។ ពេលណាគេឃើញក្មេងណាម្នាក់លេងស្និទ្ធនឹងរបស់ណាមួយនោះ គេនឹងសំគាល់វាទុក ហើយចាំមើលនៅថ្ងៃស្អែក អាទិត្យក្រោយ ខែក្រោយទៀត បើសិនណាក្មេងនោះនៅតែបន្តលេងតែរបស់ដដែលនោះ ហើយមិនខ្វល់នឹងរបស់របរផ្សេងទៀតនៅក្នុងផ្ទះនោះទេ គេនឹងសន្និដ្ឋានថាក្មេងនោះច្បាស់ជាមានទេពកោសល្យនឹងរបស់ដែលវាកំពុងលេងជាក់ជាមិនខាន បើវាមិនចូលចិត្តវាមិនលេងជាមួយនោះទេ។ ហើយពេលដែលក្មេងនោះចំរើនវ័យឡើងគេនឹង បណ្តុះបណ្តាលវាដោយផ្តោតសំខាន់ទៅតាមលទ្ធផលនៃការពិសោធន៍នោះ។ ប្រហែលការគិតបែបនេះជារឿងត្រឹមត្រូវហើយមើលទៅ បានជាប្រទេសជប៉ុនសំបូរអ្នកមានសមត្ថភាព និងស្ទាត់ជំនាញលើអាជីពដែលពួកគេធ្វើរៀងៗខ្លួនយ៉ាងនេះ។ វាជាវិធីសាស្រ្តគួរអោយសរសើរមួយ ក្នុងការចម្រាញ់យកអ្នកមានទេពកោសល្យលើផ្នែកណាមួយ មកបង្វឹកបង្ហាត់បន្ថែមអោយឆាប់ទទួលបានផ្លែផ្កា ដោយមិនចាំបាច់ប្រើកំលាំង និងពេលយូរក្នុងការបណ្តុះធនធានមនុស្សថ្មីស្រឡាង ដោយមិនដឹងពីចំណង់ចំណូលចិត្ត និងបំនិនប្រសប់ពីកំណើតរបស់គេនោះ។

ងាកមកមើលខ្មែរយើងវិញ ប្រាប់បានទេថា តើគេជ្រើសរើសមនុស្សមានទេពកោសល្យទៅធ្វើការងារដោយរបៀបណា? អ្នកទាំងអស់គ្នាមានយល់ដូច្នេះទេថា: “**ទេពកោសល្យគឺត្រូវបានជាន់ពន្លិចដោយទឹកប្រាក់បាត់ទៅហើយ**” ពួកយើងមិនបានអោយតំលៃទៅលើអ្នកដែលមានទេពកោសល្យលើការងារអ្វីមួយ និងលើកទឹកចិត្តគេអោយធ្វើកិច្ចការនោះទេ ប៉ុន្តែយើងបែរជាជំរុញគេអោយទៅធ្វើការងារណាដែលអាចរកបានចំណូលច្រើនទៅវិញ។ ជាក់ស្តែងណាស់ បើកូនឆ្លៀវឆ្លាសពូកែខាងរោហា សម្បូរទ្រឹស្តី ហើយមានបំណងចង់ក្លាយជាគ្រូទស្សនៈវិជ្ជានោះ គេនឹងត្រូវបានបង្អាក់ដោយឪពុកម្តាយ ទៅធ្វើអីអាការងារគ្រូបង្រៀនហ្នឹង ប្រាក់ខែចិញ្ចឹមខ្លួនឯងមិនរស់ទេ រកការងារអីផ្សេងធ្វើទៅ។ **យកសេះចំបាំងអោយទៅកិនម្សៅ** តើនេះមិនមែនជាការសម្រេចចិត្តរបស់ក្រុមមនុស្សល្ងង់ៗទេរឺ?

ធ្វើយ៉ាងម៉េចទៅចឹងពួកយើង ដើម្បីអាចស្រង់មនុស្សមានទេពកោសល្យយកទៅធ្វើការបាន កុំអោយចាញ់ដូនតាយើងនៅសម័យខ្មែរក្រហមណា៎ ពួកគាត់ពូកែណាស់ ដឹងច្បាស់ពីវិធីស្រង់អ្នកចេះដឹងយកទៅសំលាប់ចោល ដោយប្រើធមិត្រជាក់ស្ទើម។ ផ្អើលពីខ្មែរក្រហមរត់ចូលខ្មែរស ក្រែងលោអាចរស់រានមានជីវិត ស៊ីយដដែលគឺនៅតែធ្លាក់ក្នុងអន្ទាក់ដូនតាដ៏ឆ្លាតវៃរបស់ពួកយើងដដែល។ ការសម្លុត បន្លាចធ្វើអោយក្មេងខ្លាច ស្រែកយំជាទង្វើដ៏ល្ងង់ខ្លៅរបស់ឪពុកម្តាយខ្មែរយើង ពួកគេចិញ្ចឹមកូនដោយផ្តោតទៅលើកាយប៉ុណ្ណោះ មិនបានផ្តោតទៅលើការចិញ្ចឹមចិត្តរបស់កូនៗឡើយ សូមប្រាប់ថា**មនុស្សគឺចិត្ត និងកាយ ហើយវាទាំង២នេះរីកចំរើនធំធាត់ដំណាលគ្នា** ពួកគាត់មានចំណីសម្រាប់តែចិញ្ចឹមកាយកូនទេ ឯចំណីសម្រាប់ចិញ្ចឹមចិត្តកូនវិញគ្មានទេ នេះហើយជាកេរ្តិ៍តំណែលចោលម្សៀត ដែលពួកគាត់ខំថែរក្សាពីមួយជំនាន់ទៅមួយជំនាន់មិនអោយបាត់បង់នោះ។ កុំទាន់ថាអត់អោយសោះ យើងមានការធ្វើតេស្តរកសិស្សដែលពូកែដែរតើ ដែលធ្វើឡើងចាប់ពីថ្នាក់អនុវិទ្យាល័យឡើងទៅដល់ពេលពួកគេចប់ថ្នាក់វិទ្យាល័យ ហើយជ្រើសរើសពួកគេអោយចូលរៀនសកល

*វិទ្យាល័យទៅតាមមុខវិជ្ជាដែលពួកគេមានពិន្ទុខ្ពស់ទៀត។ ម្យ៉ាងមួយទៀត ពេលថ្មីៗនេះ ក្រសួងអប់រំទើបតែបានរៀបចំប្រព័ន្ធអប់រំទំនើបថ្មីមួយ អនុញ្ញាតអោយសិស្សនៅថ្នាក់វិទ្យាល័យជ្រើសរើសយកមុខវិជ្ជាវិទ្យាសាស្រ្តពិត រឺវិទ្យាសាស្រ្តសង្គមទៅតាមចំណង់ចំណូលចិត្តរបស់ខ្លួន ជាវិធីផលិតធនធានមនុស្សតាមរបៀបថ្មី ចូលចិត្តខាងអីរៀនខាងនឹងអោយពូកែ ប៉ុន្តែខ្ជិលឈប់លក់ក្រដាសមេរៀនណាស់ ឈប់នាំតែសិស្សទាំងនោះបានចិត្ត។ ចំណែកឯនៅប្រទេសសាំងហ្គាព័រវិញ គេបានប្រើវិធីនេះតាំងតែពីក្មេងៗរៀននៅបឋមសិក្សាមកម្ល៉េះ ដោយសារអ្វី? មានចាំសុភាសិតខ្មែរមួយទេ "**ពត់ឈើទាន់វានៅខ្ចី ប្រដៅកូនប្រុសស្រីទាន់ពួកវានៅក្មេង**" នេះហើយជាគន្លឹះដែលធ្វើអោយប្រទេសកូនកោះមួយនេះរីកចម្រើន ដោយសារតែការចូលរួមកសាងពីសំណាក់ធនធានមនុស្សអស់ទាំងនោះ។*

*ងាកមកប្រធានបទវិញ អ្វីទៅជាសៀវភៅបង្វឹកខួរកូនខ្មែរ? នរណាគេត្រូវជាអ្នកបង្កើតវាឡើង? ហើយអ្វីជាគោលបំណងក្នុងការបង្កើតសៀវភៅនេះ? វាជាថ្មសម្រាប់សំលៀងខួរក្បាលកូនក្មេងខ្មែរ អោយកាន់តែមុតស្រួចរវាសរវៃ ហើយ**ជនជាតិខ្មែរគ្រប់រូប** ប្រុសស្រី មានក្រ អាចចងក្រងវាឡើងបាន គ្រាន់តែអ្នកមានចំណេះដឹងទូទៅទូលំទូលាយ ជាសិស្សចប់មធ្យមសិក្សាទុតិយភូមិ គ្រូបឋមសិក្សា អាចារ្យព្រះសង្ឃ អ្នករកស៊ី ជាងកង់ម៉ូតូជាងឡាន អ្នកលក់ដូរ បុគ្គលិករាជការ........................ គឺអាចរៀបរៀងវាបានហើយ **ចាប់កាន់ប៊ិចទាំងអស់គ្នាឡើង** ព្រោះមានប្អូនៗ កូនៗ ក្មួយៗ ចៅៗ របស់អ្នកទាំងអស់គ្នាជាច្រើនពាន់នាក់រង់ចាំអានសៀវភៅរបស់បងៗលោកគ្រូអ្នកគ្រូ ឪពុកម្តាយ តាយាយ ពូមីង របស់ពួកគេ។ អ្នកទាំងអស់គ្នាកុំគិតថាវាអស្ចារ្យ ដោយគ្រាន់តែលឺឈ្មោះវាថាសុទ្ធតែ**បង្វឹកខួរកូនខ្មែរ**អីណានោះ ការពិតវាគ្រាន់តែសៀវភៅម្យ៉ាងដែលគួសវាស ដាក់ចង្វល់ ចោទសួរ ទាមទារការបកស្រាយចង់ដឹងសមត្ថភាព សាកល្បងប្រាជ្ញា ធ្វើអោយឈឺក្បាល និងសំរួចការគិតក្មេងអោយមុតស្រួច ចាក់ធ្លុះនូវបញ្ហាចោទទាំងឡាយ ដែលកើតឡើងជាទូទៅជុំវិញជីវិតរស់*

នៅរបស់គេ។ ដើម្បីកុំអោយមានមន្ទិលសង្ស័យច្រើន សូមលើកជាគំរូខ្លះៗ ដែលអ្នកទាំងអស់គ្នាអាចដាក់បញ្ចូលក្នុងសៀវភៅរបស់អ្នកទាំងអស់គ្នាបាន:

១. បើសិនកូនជាអ្នកគ្រប់គ្រងនៅសាលារៀនមួយ ហើយថវិកាសាលានៅសល់ ៤០០ ០០០រៀល។ មានការងារពាយ៉ាងបន្ទាន់ ដែលកូនត្រូវប្រើលុយទាំងអស់នោះធ្វើវាប៉ុន្តែជម្រើសមានតែ១គត់ ព្រោះថវិកាដែលត្រូវចំណាយមានតិចតួចពេក។ តើកូនជ្រើសយក ការប្រើលុយទៅលើការងារមួយណា?

**<u>ការងារទី១</u>** ដាំដើមឈើ ក្នុងសាលាបន្ថែមគ្រាន់ជាម្លប់ក្នុងឆ្លាសាលាអោយកូនសិស្សអង្គុយលេង ណាធ្វើអោយបរិស្ថានក្នុងសាលាស្រស់ស្អាតផង។



**<u>ការងារទី២</u>** ទិញសៀវភៅអាន ដាក់បណ្ណាល័យបន្ថែម ព្រោះសិស្សៗនៅខ្វះសៀវភៅអានខ្លាំងណាស់



**ការងារទី៣** ជួសជុលអាគារដែលចាស់ទ្រុឌទ្រោមអោយ បានប្រសើរឡើងវិញ ការពារការឆាប់ពុកផុយប្រើលែងកើត។



ការងារទាំង៣ខាងលើនេះសុទ្ធតែសំខាន់ទាំង៣ តើកូនៗយើងនឹងសម្រេចធ្វើការងារមួយណាទៅណ៎? ហើយគេមានហេតុផលអ្វីសម្រាប់គាំទ្រការយល់ឃើញរបស់គេ? ចុះអ្នកវិញ ជ្រើសធ្វើការងារមួយណាដែរហ្នឹង?

២. កូនបាំឥឡូវបានប្រឡងជាប់ជាមន្ត្រីរាជការហើយ កូនជាមន្ត្រីទទួលបន្ទុកគមនាគមន៍ រៀបចំសណ្តាប់ធ្នាប់ចរាចរណ៍អោយមានរបៀបរៀបរយ។ នៅក្នុងក្រុងដែលកូនកំពុងធ្វើការនោះសម្បូរទៅដោយផ្លូវខ្វាត់ខ្វែង ជាពិសេសផ្លូវបែកជាបួនដែលជាផ្លូវប្រសព្វគ្នា ងាយបណ្តាលអោយកកស្ទះ និងគ្រោះថ្នាក់ណាស់ ដែលមានកិច្ចការ២យ៉ាងកូនអាចធ្វើដើម្បីដោះស្រាយបញ្ហានេះ ប៉ុន្តែតម្រូវអោយកូនជ្រើសយកតែមួយទេ។ តើមួយណាដែលកូនគិតថាសក្តិសមបំផុតនោះ?

**កិច្ចការទី១** កូនត្រូវ**សង់ស្តុបចរាចរណ៍នៅគ្រប់ទិសទាំងអស់** បញ្ចៀសរាល់ការកកស្ទះ និងគ្រោះថ្នាក់បណ្តាលមកពីការប្រជល់ទិសគ្នា រឺការប្រជែងគ្នាទៅមុនទៅក្រោយ។



<u>***កិច្ចការទី២***</u> *កូនត្រូវ**សង់រង្វង់មូលនៅចំកណ្តាល** ផ្លូវប្រសព្វទាំង៤នោះ ធ្វើអោយអ្នកធ្វើដំណើរចូលរង្វង់ម្តងមួយៗ បញ្ចៀសបានការកកស្ទះ និងគ្រោះថ្នាក់បានដូចគ្នា*



*វានៅមានច្រើនរាប់មិនអស់ទៀត នៅក្នុងខួរក្បាលរបស់អ្នកទាំងអស់គ្នាម្នាក់ៗ ប៉ុន្តែប៉ុណ្ណឹងចុះ សង្ឃឹមថាអ្នកទាំងអស់គ្នាបានយល់ហើយពីរបៀប និងប្រភេទមេរៀនដែលត្រូវសរសេរចូលក្នុងសៀវភៅអ្នកនោះ។ ប្រាប់ម្តងទៀតណ៎ា កុំខ្ជិលហើយកុំគិតថាវាគ្មានប្រយោជន៍អោយសោះ ទាល់តែអ្នកធ្វើវាបាន១ក្បាលសិន នោះអ្នកនឹងដឹងថាខ្លួនអ្នកមានតំលៃប៉ុណ្ណា។ម្យ៉ាងទៀត កុំទាន់គិតរឿងទំព័រវែងខ្លីអី ព្រោះ*

វាមិនបានបញ្ជាក់ពីអត្ថន័យ និងគោលបំណងនៃការសរសេរឡើយ បើហោចណាស់ ដំបូងឡើយ ត្រឹម២០ ទៅ៥០ទំព័រគឺវាជារឿងអស្ចារ្យមួយបាត់ទៅហើយ។

១ឆ្នាំ១ក្បាល ចុះ២០ឆ្នាំទៅមុខទៀតរហូតដល់ពេលអ្នកចាកលោកទៅ នោះអ្នកនឹងបានបន្សល់ទុកសៀវភៅ២០ក្បាល ហើយបើសរសេរបាន១០នាក់ នោះយើងនឹងបានសៀវភៅ២០០ក្បាល ចុះបើសរសេរបាន១លានអ្នកនោះ តើកូនចៅយើងសម្បូរសៀវភៅមើលយ៉ាងណាទៅ? ហើយនៅពេលនោះការគិតរបស់ពួកគេ ស៊ីវិល័យជឿនលឿនយ៉ាងម៉េចដែរទៅ? ចង់ឃើញដល់ហើយ!!!!! កុំភ្លេចចូលរួមសរសេរទាំងអស់គ្នាណាជនរួមជំនាន់ទាំងឡាយ។

# យុទ្ធសាស្ត្រសង្គ្រាម៦ថ្ងៃ



ថ្ងៃទី០១ ខែមិនា ឆ្នាំ១៩៦៧ វេលាម៉ោង៧និង៤៥នាទី អ៊ីស្រាអែលបានបើកការវាយតែប៉ុន្មានម៉ោងប៉ុណ្ណោះកងយន្តហោះចំបាំង បានកំទេចកងទ័ពអេស៊្សីបបានជោគជ័យ ហើយត្រូវទប់ទល់នឹង សត្រូវ៣ច្រក ដែលបានរួមកំលាំងទ័ពបញ្ចូលគ្នាពីយោធាអារ៉ាប់៣ប្រទេស អ៊ីស្រាអែលបានយកឈ្នះដោយប្រើពេលត្រឹមតែ៦ថ្ងៃប៉ុណ្ណោះ។ តើរដ្ឋដ៏តូចមួយនេះអាចទទួលជ័យជំនះ លើសមរភូមិ ដ៏លំបាកក្នុងប្រវត្តិសង្គ្រាមនេះដោយរបៀបណា?

ភស្តុតាងដែលបង្ហាញអោយឃើញរួមមាន: ដំណើរផែនការដ៏សម្ងាត់តែ១គត់របស់យោធា ការដកពិសោធន៍សញ្ញាវុធ អ្នករាយការណ៍សម្ងាត់ពីសមរភូមិ បានធ្វើអោយអ៊ីស្រាអែលបានយក**ឈ្នះសង្គ្រាម៦ថ្ងៃ**។

នៅដើមខែមិថុនា ១៩៦៧ ភាពតានតឹងនៃការបូជាសាសនាបានកើតមានឡើង ប្រធានាធិបតីអេស៊្សីប **ហ្គាម៉ិល អ៊ាប់ឌុល ណារសឺ** Gamal Abdel Nasser បានអំពាវនាវរាល់ប្រទេសនៅអារ៉ាប់ទាំងអស់អោយកំទេចអ៊ីស្រាអែលចោល។



អ៊ីស្រាអែលត្រូវទប់ទល់នឹងប្រទេស៣ រួមមាន **អេស៊្សីប** Egypt **ស៊ីរី** Syria និង **ហ្សកដង** Jordan ដោយពួកគេបានរួមយោធាបញ្ចូលគ្នា ធ្វើអោយមានសក្តានុពលយ៉ាងខ្លាំងខាងចំនួនទាហានរថក្រោះ និងយន្តហោះចំបាំង។ មតិទូទៅគិតថាអ៊ីស្រាអែល នឹងមិនអាចទប់ទល់នឹងការវាយសន្ធាប់ដ៏ខ្លាំងក្លានេះបានទេ ប៉ុន្តែលទ្ធផលដែលផ្ទុយនឹងការគិតទុក បានកើតឡើង គឺមិនដល់១សប្តាហ៍ផង អ៊ីស្រាអែលវាយបំបាក់ប្រទេសទាំងនោះអស់គ្មានសល់។ យកឈ្នះបានយ៉ាងដូចម្តេចទៅហ្ន៎?

ដើម្បីយល់ ពីចក្ខុវិស័យដែលនាំអោយអ៊ីស្រាអែលទទួលជ័យជំនះ គឺចាំបាច់ណាស់ត្រូវបកទៅដើមឆ្នាំ១៩៦០ ពេលនោះដែល **យ៉ូអ៊ា ស៊ីដុន** Yo’ash Tsiddon ជាប្រធានផ្នែកផែនការនៃ**កងទ័ពជើងអាកាសអ៊ីស្រាអែល** IAF (Israel Air Force) ដែលគាត់យល់ឃើញយ៉ាងច្បាស់ថាវាមិនហួសពីឆ្នាំ១៩៦៨ទេ ពួកគេប្រាកដជាបើកការវាយប្រហារអ៊ីស្រាអែល។ ការពួតដៃគ្នារវាងយោធាអេស៊ីប និងស៊ីរី ធ្វើអោយអ៊ីស្រាអែលត្រូវច្បាំងទាំង២ទិសក្នុងពេលតែមួយដែលបានរំពឹងទុកថាអាចចេញពី **វាលខ្សាច់ស្សាយណៃ** Sinai Desert ពីខាងអេស៊្សីប និង **ហ្គោលឡែនហៃ** Golan Heights ពីខាងស៊ីរី។ សំណួរសួរថា តើអ្នកអាចការពារទប់ទល់នឹង ការប្រហារបានរឺទេ បើពួកគេបើកការប្រយុទ្ធព្រមគ្នា ចម្លើយឆ្លើយថាវាមិនអាចនោះទេ ដូច្នេះផែនការការពារត្រូវតែរឹងមាំ រឹងមាំតាមដែលអាចធ្វើទៅបានប៉ុន្តែយុទ្ធសាស្រ្តនេះបានចោទជាបញ្ហាឡើង គឺថាអ៊ីស្រាអែលមិនអាចបែងចែកកម្លាំង ដើម្បីប្រយុទ្ធនឹងអេស៊្សីបផងហ្សកដងផងនឹងស៊ីរីផងបានក្នុងពេលតែមួយនោះទេ គឺគេត្រូវប្រមូលផ្តុំកម្លាំងមកតែ១ក្រុមរួចផ្ចង់ស្មារតីប្រយុទ្ធជាមួយសត្រូវបានតែមួយប៉ុណ្ណោះក្នុងការច្បាំងម្តងៗ។ ដើម្បីបើកការវាយបកអោយបានខ្លាំងក្លា អ៊ីស្រាអែលត្រូវការបំពាក់សញ្ញាវុធទំនើបៗទៅលើកងទ័ពអាកាសរបស់គេ។

នៅឆ្នាំ១៩៦៤ ក្រុមរបស់**ស៊ីដុន** បាននឹកឃើញផែនការដ៏អស្ចារ្យមួយ គឺ**ផែនការវាយកំទេចផ្លូវឡើងចុះរបស់ទ័ពអាកាស** **ធ្វើយ៉ាងណាអោយយន្តហោះចំបាំងអារ៉ាប់នៅជាប់នឹងដីមិនអាចហោះឡើងបាន**។ ផែនការនេះស្តាប់ទៅហាក់ជាងាយស្រួលណាស់ ប៉ុន្តែបញ្ហាគឺនៅត្រង់ថា វាមានផ្លូវរត់ដល់ទៅ១០ ដែលមានផ្លូវអនុញ្ញាតអោយយន្តហោះ ហោះឡើងបានមានច្រើនជាង៥០កន្លែងទៅទៀតឯអ៊ីស្រាអែលមានយន្តហោះចំបាំងត្រឹមតែ២០៦គ្រឿងប៉ុណ្ណោះ។

*ការពិតវាស្ថិតលើ* ***កងទ័ពជើងអាកាសអ៊ីស្រាអែល*** IAF (Israel Air Force) *ថាតើពួកគេមានការហ្វឹកហ្វឺនដល់កំរិតណាសំរាប់ការប្រយុទ្ធនេះ សំណួរសួរថាតើ* IAF *អាចបែងចែកយន្តហោះចំបាំងរបស់ខ្លួនបានទៅគ្រប់គោលដៅប្រយុទ្ធបានឬយ៉ាងណា? ចំលើយមានដូចខាងក្រោម:*




*ពួកគេធ្វើការហ្វឹកហាត់យ៉ាងស្វិតស្វាញ ដែលផ្តោតសំខាន់លើ* ***ភាពរហ័សនៅនឹងដី*** *គឺពីរបៀបនៃការបំពាក់សព្វាវុធទៅយន្តហោះឡើងវិញ និងរបៀបនៃការចាក់ប្រេងសាំង បំពេញអោយយន្តហោះឡើងវិញ ដែលវាប្រើរយៈពេលមិនលើសពី ៧នាទីជាដាច់ខាត ព្រោះការធ្វើបែបនេះវាអនុញ្ញាតអោយ យន្តហោះចំបាំងនីមួយៗអាចបំពេញបានបេសកកម្មច្រើនជាងផងផង ក្នុងមួយថ្ងៃ ជាចំនួនអតិបរិមាត្រូវតែធ្វើអោយបាន ប៉ុន្តែដើម្បី សម្រេចបានលទ្ធផលបែបនេះ ពួកគេត្រូវប្រឈមនឹងគ្រោះថ្នាក់ខ្លាំងណាស់។*

*ការបំពាក់បំប៉ន អ្នកបើកយន្តហោះចម្បាំងគឺជារឿងចាំបាច់ ដែលវាមានដូចជាការផ្តល់រូបថតពីគោលដៅដែលត្រូវប្រយុទ្ធ ហើយអោយពួកគេស្វែងយល់ និងចងចាំវាជាប់នឹងក្រអៅបេះដូង ជាពិសេស (ទីបញ្ជាការផ្លូវរត់របស់យន្តហោះ ចំនួនផ្លូវរត់របស់យន្តហោះ ប៉មត្រួតពិនិត្យសុវត្ថិភាព និងឃ្លាំងស្តុកគ្រាប់) របស់សត្រូវ។ ពួកគេបានចំណាយពេលហ្វឹកហាត់អស់រយៈពេលលើសពី២ឆ្នាំទៅទៀត ដែលអោយឈ្មោះថា* ***ការយកចិត្តទុកដាក់*** *ហើយមានការធ្វើតេស្តសាកល្បង* ***១. ប្រកួតគ្នាពីភាពរហ័សនៅនឹងដី ថាអ្នកបើក១ណាមានសមត្ថភាពអាចគ្រប់គ្រងវាបានល្អ និង២. សមត្ថភាពចងចាំលំអិតពីបេសកកម្មរបស់ពួកគេដែលសូម្បីតែ យើងដាស់ពួកគេអោយភ្ញាក់ឡើងនៅពេលអាធ្រាតកណ្តាលយប់ក៏ដោយ ក៏ពួកគេដឹងច្បាស់ពីគោលដៅដែលពួកគេនឹងត្រូវទំលាក់គ្រាប់ដែរ។***

*ផ្ទុយពីអ៊ីស្រាអែល ការប្រុងប្រៀបខ្លួនប្រឈមនឹងសង្គ្រាមខាងប្រទេសអារ៉ាប់វិញគឺវាមិនដូចអ៊ីស្រាអែលទេ យោធាត្រូវបានបង្វឹក ហើយប្រើការគ្រាន់តែជាកំលាំងសំរាប់រក្សា*

ស្ថេរភាពក្នុងប្រទេសប៉ុណ្ណោះ មិនមែនសំរាប់ការប្រឈមមុខដាក់គ្នាជាមួយអ៊ីស្រាអែល នោះទេ។ ប៉ុន្តែវាបញ្ច្រាស់នឹង ប្រតិបត្តិការដែលមិនមានការតាំងចិត្តប៉ុន្មាននោះទេ នៅថ្ងៃអាទិត្យ ទី១៤ ខែឧសភា ឆ្នាំ១៩៦៧ ទាហានរបស់អេស៊្សីបបានបញ្ជូនទ័ពគេឆ្ពោះមកកាន់ **វាលខ្សាច់សៃណៃ** Sinai Desert និងច្រកចេញចូលរបស់អ៊ីស្រាអែល ទៅកាន់សមុទ្រក្រហម




ឆ្លើយតបនឹងការវាតទីនេះ អ៊ីស្រាអែលបានធ្វើការកេណ្ឌទ័ពបម្រុងរបស់ខ្លួន ប៉ុន្តែនៅថ្ងៃអាទិត្យ ទី០៣ ខែមិថុនា វានៅតែមិនមានការបើកប្រយុទ្ធគ្នានៅឡើយ ហើយប្រព័ន្ធផ្សព្វផ្សាយសារពត៌មានអ៊ីស្រាអែលបានចេញផ្សាយថា **ទាហានជាច្រើន បានអនុញ្ញាតអោយត្រឡប់មកផ្ទះវិញ ជាការសំរាកចុងសប្តាហ៍** ដែលវាហាក់ដូចជាមិនសមហេតុផលសំរាប់ក្បួនយោធា គឺថាគេមិនអាចអនុញ្ញាតអោយទាហានត្រឡប់ទៅផ្ទះវិញបានទេនៅចុងសប្តាហ៍ ខណៈដែលពួកគេត្រូវធ្វើសង្គ្រាមនៅដើមសប្តាហ៍បន្ទាប់នោះ ព្រោះពួកគេត្រូវការបង្វឹកខ្លួនឯងអោយខ្លាំងក្លា ហើយប្តេជ្ញាចិត្តយ៉ាងមោះមុត មុននឹងការប្រយុទ្ធចូលមកដល់។

នៅព្រឹកព្រហាមថ្ងៃច័ន្ទ ទី០៥ ខែមិថុនាឆ្នាំ១៩៦៧ មូលដ្ឋានទ័ពអាកាសអេស៊្សីបត្រូវបានទទួលការវាយប្រហារយ៉ាងតំណំដោយកងកំលាំងទ័ពអាកាសរបស់អ៊ីស្រាអែល យន្តហោះ

*ចំបាំងទាំងអស់របស់អេស៊្សីប ត្រូវបានកំទេច ហើយគ្មាន១ណាំនៃពួកគេអាចហោះឡើងរួច ពីដីបាននោះទេ ព្រោះផ្លូវរត់ត្រូវបានកំទេចជាមុនរួចទៅហើយ។ ផែនការរបស់អ៊ីស្រាអែល ដែលផ្តោតលើ**ការវាយប្រហារផ្លូវរត់របស់យន្តហោះ**ជាមុននោះ បានប្រព្រឹត្តទៅយ៉ាងរលូន។ តើយោធាអេស៊ីប ទទួលការវាយឆ្មក់ដោយមិនដឹងខ្លួនដោយរបៀបណា? ចំលើយគឺត្រូវបក ទៅខាងលើវិញ ដែលនិយាយពី **ការវិលទៅផ្ទះសម្រាកចុងសប្តាហ៍របស់យោធា** ដែលអ្នករាល់ គ្នានៅទីក្រុងឡុងដ៏ អាចមើលឃើញនៅទំព័រ**កាសែតហ្សីរូសាឡែម** ក៏មានន័យថាមនុស្ស គ្រប់គ្នា ជាពិសេសរាជធានីនៅអារ៉ាប់ ដឹងថាទាហានអ៊ីស្រាអែលបានឈប់សំរាក សំរាប់ការ ហ្វឹកហាត់ការហែលទឹក ជាមូលហេតុធ្វើអោយយោធាអេស៊ីប បន្ធូរការប្រុងប្រយ័ត្នរបស់ ខ្លួន។*

*ផែនការយោធាអ៊ីស្រាអែលបានសន្មត់យកពេលទៀបភ្លឺ ជាវេលាសម្រាប់បើកការ វាយប្រហារ។ ជាទូទៅ ដើម្បីប្រើពន្លឺព្រះអាទិត្យអោយចាំងចំភ្នែកយោធាសត្រូវ **បើសិនណា អ្នកប្រយុទ្ធពីទិសខាងកើតឆ្ពោះទៅទិសខាងលិច អ្នកត្រូវបើការប្រយុទ្ធនោះនៅពេលព្រឹក**។ ពេលជិតភ្លឺ ជាពេលដែលទ័ពអាកាសអេស៊ីបមានការប្រុងជើងការ និងហ្វឹកហាត់យ៉ាងសកម្ម បំផុត ប៉ុន្តែសកម្មភាពអស់ទាំងនេះវានឹងថមថយទៅវិញនាពេលបន្ទាប់ យោធានាំគ្នាចុះចត ដើម្បីស្រស់ស្រូបអាហារពេលព្រឹករបស់ពួកគេ នេះហើយជាឱកាសសម្រាប់អ៊ីស្រាអែល ចាប់យន្តហោះចំបាំងអេស៊ីបអោយជាប់នឹងដីមិនអាចហោះឡើងរួច គ្មានប្រេងគ្រប់គ្រាន់ និងគ្មានលទ្ធភាពនឹងតបត។ សំណួរសួរថា តើដោយរបៀបណាដែលអ៊ីស្រាអែលដឹងប្រាកដ ពីពេលវេលា(ទៀបភ្លឺ) ដ៏ពិសិដ្ឋដើម្បីបើកការវាយប្រហារនេះ? ចម្លើយឆ្លើយថា អ៊ីស្រាអែល ត្រូវការ**របស់៣យ៉ាង: ១.បញ្ញា ២.បញ្ញា ៣. បញ្ញា** ជាបញ្ញាដឹងអំពីទម្លាប់នៃសកម្មភាព របស់កងទ័ពអាកាសអេស៊ីប ដែលផ្តោតសំខាន់ទៅលើការលួចស្តាប់ខ្សែអាត់ទំនាក់ទំនងគ្នា រវាងយន្តហោះ និងទីបញ្ជាការកណ្តាល។*

*ម៉ោង៧និង៤៥នាទី ជាពេលដែលយន្តហោះចំបាំងអេស៊ីបនៅនឹងដី នេះហើយជា ចំណុចខ្សោយរបស់អេស៊ីបដែលអ៊ីស្រាអែលបានរកឃើញ។ លើសពីនេះទៀត ការហ្វឹក ហ្វឺនអ្នកបើកយន្តហោះចំបាំង បានទទួលលទ្ធផលយ៉ាងគាប់ប្រសើរ គឺពួកគេដឹងសឹងតែគ្រប់ ពីពតិមានសត្រូវ កន្លែងដែលយន្តហោះសំចត ឃ្លាំងផ្ទុកគ្រឿងផ្គត់ផ្គង់យោធា ឃ្លាំងគ្រាប់......... ទាំងនេះហើយ ជាសម្មិទ្ធិផលដែលទទួលបានពីការប្រើបញ្ញា។ ប៉ុន្តែ សួរថាតើអ្នកបើកយន្ត*

ចម្បាំងអ៊ីស្រាអែលទាំងនោះ ត្រូវធ្វើយ៉ាងណាទើបអាចគេចរួចពី រ៉ាដារបស់**ស្ថានីយ៍ប្រកាសអាសន្នអារ៉ាប់** បាន? គ្រោះថ្នាក់ខ្លាំងណាស់ គឺពួកគេត្រូវហោះអោយទាបជាងកំពស់រ៉ាដា គ្មានការទាក់ទងគ្នាអីទាំងអស់ គឺ**ស្ងាត់បំផុត**។



ពួកគេហោះទាបណាស់ គឺកៀកនឹងផ្ទៃទឹកសមុទ្រតែម្តង ហើយវាគ្មានកិច្ចការអ្វីដែលពួកគេត្រូវធ្វើក្រៅពី **យកចិត្តទុកដាក់បំផុត** គ្មានសោះឡើយការងាកឆ្វេងងាកស្តាំ បើពុំដូច្នោះទេ គេនឹងប្រហែស ប៉ះនឹងផ្ទៃទឹកសមុទ្រជាមិនខាន ហើយជាលទ្ធផល គ្មានអ្វីក្រៅអំពីចាញ់នោះទេ ប៉ុន្តែជាការតាំងចិត្តដ៏មោះមុតណាស់ គឺនៅទីបំផុតពួកគេធ្វើបានសម្រេច។ មិនភ្លេចទេសមាសភាពនៃយន្តហោះដែលគេប្រើ គឺវាមានបំពង់ប្រហោងដ៏ធំពីខាងមុខ មានតួនាទីស្រូបយកខ្យល់ពីខាងមុខមកជួយបន្ថយសម្លេងម៉ាស៊ីនមិនអោយលឺខ្លាំង និងជាពិសេសគេក៏បានបំពាក់**កាមេរ៉ា** ផងដែរ មាននាទីជាអ្នកផ្តិតយករូបភាពរាល់ការវាយប្រហារទាំងអស់ ដែលវាអនុញ្ញាតអោយអ្នកបើកអាចវាយតម្លៃពីភាពជោគជ័យនៃការវាយប្រហាររបស់ខ្លួន ទទួលយកបានវីក៏អត់ ចាំបាច់ធ្វើការវាយប្រហារជាថ្មីម្តងទៀតឬយ៉ាងណា?ទាំងនេះហើយជាគុណសម្បត្តិនៃយន្តហោះចម្បាំងដែលយោធាអ៊ីស្រាអែលបានប្រើ។

អស់ពេលមិនដល់១២ម៉ោងផង ទ័ពអាកាសអេស៊ីបត្រូវបានបោសសំអាត ហើយទ័ពថ្មើរជើងត្រូវបង្ខំចិត្តផ្លាស់ទីចូលសមរភូមិវាលខ្សាច់។ នេះសបញ្ជាក់អោយឃើញថាអ៊ីស្រាអែលបានទទួលជោគជ័យយ៉ាងឧត្តមខាងទ័ពអាកាស ដូច្នេះហើយវាបានផ្តល់លទ្ធភាពអោយទ័ពថ្មើរជើងខ្លួនបានបោះពួយទៅមុខ ឆ្ពោះទៅកាន់តំបន់កណ្តាល ដែលជាទីលានសម្រាប់ប្រយុទ្ធ គឺជាសមរភូមិវាលខ្សាច់សៃណៃ ជាកន្លែងប្រសព្វព្រំដែនគ្នារវាងអ៊ីស្រាអែល និងអេស៊ីប ហើយក៏ជាវាលខ្សាច់ដ៏ក្តៅហែងធំល្វឹងល្វើយពិបាកក្នុងការប្រយុទ្ធ។

*យោធាអេស៊្សីបបានសាងសង់លេណដ្ឋានការពារជាច្រើន ពាសពេញវាលខ្សាច់ដែលជាគ្រោះថ្នាក់ដ៏ធ្ងន់ធ្ងរចំពោះអ៊ីស្រាអែល ប៉ុន្តែសួរថាតើគេអាចយកជ័យជំនះដោយរបៀបណាលើឧបសគ្គនេះ?*








*ដើម្បីដោះស្រាយបញ្ហានេះ យោធាអ៊ីស្រាអែលចាំបាច់ចោះទម្លុះលេណដ្ឋានដ៏មាំមួនអស់ទាំងនោះទើបអាចកាច់បំបាក់យោធាអេស៊្សីបបាន ប៉ុន្តែលេណដ្ឋាននោះមានច្រើនណាស់មិនដឹងទិសមិនដឹងតំបន់ឡើយ និងលាតសន្ធឹងចូលក្បែរៗនឹងព្រំដែនខាងអេស៊្សីបទៀត។ ជាឧបសគ្គថ្មីដល់អ៊ីស្រាអែលទៀតហើយ គឺនៅសមរភូមិវាលខ្សាច់សៃណៃនោះសម្បូរទៅដោយខ្សាច់ម៉ត់ជ្រាយមិនឆ្លើយតបនឹងកង់យានយន្តទេដែលងាយនឹងផុងជាប់ណាស់ តែមិនជាថ្វីទេ អ៊ីស្រាអែលនៅតែអាចដោះស្រាយបានដដែល។ នៅឆ្នាំ១៩៦០អ៊ីស្រាអែលបានធ្វើការសាកល្បងបើកយានយន្តយោធាលើវាលខ្សាច់ប្រទេសខ្លួន យោធាត្រូវបើកបរលើវាលខ្សាច់ដ៏ទន់ល្មើយហើយពួកគេត្រូវសិក្សាពីរបៀបដែលអនុញ្ញាតអោយពួកគេអាចបើកចេញបាននៅពេលដែលពួកគេត្រូវជាប់ផុង។ បញ្ហាគឺនៅត្រង់ថាការប៉ះគ្នានៃសំបកកង់យានយន្តទៅនឹងខ្សាច់គឺវាមានតិចតួច ដូច្នេះគេត្រូវបន្ថយខ្យល់នៅក្នុងកង់ដែលវានឹងធ្វើអោយផ្ទៃនៃសំបកកង់ប៉ះនឹងខ្សាច់បានច្រើន នោះការបើកបរនឹងទៅមុខដោយរលូនគ្មានជាប់គាំងទៀតហើយ ជា*





ដំណោះស្រាយដ៏ឈ្លាសវៃដែលនឹកស្មានមិនដល់។ យ៉ាងនេះក្តី បញ្ហាខ្សាច់មិនមែនជារឿងតែម្យ៉ាងគត់ដែលអ៊ីស្រាអែលត្រូវដោះស្រាយ នៅក្នុងសមរភូមិវាលខ្សាច់សៃណៃនោះទេ។

រថពាសដែកទំនើបទាន់សម័យប្រកបជាមួយបច្ចេកទេសខ្ពស់របស់អេស៊្បីប ត្រូវបានប្រើនៅក្នុងសមរភូមិវាលខ្សាច់សៃណៃ ប៉ុន្តែរយៈអស់ពេលប្រមាណជា៤៨ម៉ោងប៉ុណ្ណោះ រថពាសដែករាប់រយត្រូវបានវាយកំទេចដោយកងយោធាតូចៗរបស់អ៊ីស្រាអែល។ តើជោគជ័យដ៏មិនគួរអោយជឿនេះកើតឡើងដោយរបៀបណា? ១កងពលរបស់អ៊ីស្រាអែល ត្រូវប្រឈមនឹង២កងពលអេស៊្បីប ដែលនៅពីក្រោយ២កងពលនោះមាន១កងពលជំនួយទៀត ដូច្នេះមានន័យថា ១កងពលអ៊ីស្រាអែលត្រូវទប់ទល់ជាមួយនឹង៣កងពលរបស់អេស៊្បីប ដែលក្នុងទ្រឹស្តីនៃអ្នកធ្វើសង្គ្រាមគេហាមមិនអោយប្រយុទ្ធជាដាច់ខាតកាលបើ យើងមានតែម្នាក់ហើយត្រូវប្រឈមនឹងសត្រូវ៣នាក់នោះ។ ឯកសារដែលនឹងបង្ហាញពីរបៀបដែលអាចអោយអ៊ីស្រាអែលទាញប្រយោជន៍ពីទីតាំងដ៏គ្រោះថ្នាក់នៃសមរភូមិនេះ ត្រូវបានរកឃើញដែលវាមានគោលបំណងក្នុងការស្វែងរកផ្លូវវាង ហើយអាចវាយប្រហារសត្រូវបានគ្រប់ពេល និងគ្រប់ទិសទាំងអស់។ ទីបំផុត ផែនទីដែលប្រាប់ពីផ្លូវដែលយានយន្តអាច និងមិនអាចធ្វើដំណើរបានត្រូវបានបង្ហាញ ដោយឆ្លងកាត់ការស្រាវជ្រាវអស់ពេលរាប់ឆ្នាំ ហើយជារឿងគួរអោយអស់សំណើចណាស់ថា ដោយសារការសិក្សាស្វែងយល់យ៉ាងម៉ត់ចត់ អ៊ីស្រាអែលបានដឹងពី យុទ្ធសាស្ត្រនៃការប្រើទីតាំងភូមិសាស្ត្រទឹកដីរបស់សត្រូវបានល្អជាងសត្រូវទៅទៀត។

ការប្រយុទ្ធគ្នារវាងរថពាសដែក នឹងរថពាសដែកក៏ជារឿងសំខាន់ ហើយចាំបាច់ត្រូវមានក៏យកចិត្តទុកដាក់ខ្ពស់ផងដែរ។ ទស្សនៈយល់ឃើញរបស់អ៊ីស្រាអែល គឺត្រូវជ្រើសទិញយករថពាសដែកណាដែលងាយនឹងធ្វើការកែច្នៃ ដោះដូរគ្រឿងបន្លាស់បាន ព្រោះពួកគេត្រូវធ្វើអោយប្រសើរឡើងនូវផ្នែកខ្លះ ដូចជាផ្នែកការពារ ផ្នែកបំលាស់ទី និងផ្នែកប្រយុទ្ធជាដើម។ គេបានប្តូរគ្រឿងខ្លះនៃរថពាសដែករួមមានៈ កាណុងផ្លោងគ្រាប់ដើមចោលដោយជំនួសដោយកាណុងផ្លោងគ្រាប់ថ្មី ដែលអាចផ្លោងបានរយៈចំងាយឆ្ងាយ ហើយមានភាពល្បឿនទាបបំផុត សារធាតុនៃទ្រនាប់កង់រថពាសដែកថ្មី ដែលសមស្របនឹងការផ្លាស់ទីលើវាលខ្សាច់ត្រូវបានដាក់ជំនួស និងសារៈធាតុស្រោបការពាររថពាសដែកត្រូវបានបំពាក់ទប់ទល់នឹងការប្រហាររបស់សត្រូវ។ ដោយសារការគិតគូរម៉ត់ចត់បែបនេះហើយទើបអ៊ីស្រាអែលសន្មត់ថាគេអាចនឹងយកឈ្នះលើកងពាសដែករបស់អេស៊្បីបបាន ព្រោះរថពាសដែករបស់គេមាន

*គុណសម្បត្តិល្អជាងអេស៊ីប ប៉ុន្តែបន្តិចបន្តួចប៉ុណ្ណោះ ដែលក្នុងទ្រឹស្តីសង្គ្រាមគេនិយាយថា: "**បើសិនណាអ្នកគ្រប់តែប្រសើរជាងសត្រូវអ្នកតែបន្តិចនោះ អ្នកនឹងឈ្នះ**"។ជាការពិតមែនគឺគ្រាន់តែប្រើពេលអស់៣៦ម៉ោងប៉ុណ្ណោះ កងពលនានា និងទ័ពពាសដែកអេស៊ីបបានធ្វើការដកថយ។*

*នៅថ្ងៃពុធ ទី០៧ ខែមិថុនា ឆ្នាំ១៩៦៧ យោធាអេស៊ីបបានដកថយទៅទិសខាងលិចឆ្ពោះមកកាន់ **ព្រែកជីកស៊ុយ** Suez Canal ដែលពួកគេ ត្រូវធ្វើការឆ្លងកាត់ច្រកភ្នំ៣។ នៅក្នុងស្ថានភាពភ័យស្លន់ស្លោបែបនេះ ធ្វើអោយពួកគេវង្វេងផ្លូវ ហើយក៏ត្រូវបានជាប់គាំង នៅនឹងច្រកភ្នំទាំង៣ និងទទួលការវាយប្រហារសង្គ្រប់បន្ថែមយ៉ាងដំណំ ដោយទ័ពអាកាសរបស់អ៊ីស្រាអែល។ វាមិនទាន់ចប់នៅឡើយទេ ទិដ្ឋភាពខ្លោចផ្សារនៅក្នុងពេលធ្វើការដកថយពីសមរភូមិវាលខ្សាច់នៅសៃណៃរបស់អេស៊ីប គឺនៅថ្ងៃដដែលនេះដែរ យោធាអេស៊ីបដែលជាឈ្លើសសឹក ត្រូវបានដោះលែងនៅវាលខ្សាច់ដ៏ស្ងឹងស្ងើយជាមួយនឹងការខ្សោះជាតិទឹក។ រាកមកខាងជនសកម្មប្រយុទ្ធអ៊ីស្រាអែលវិញហាក់ដូចជាមិនបង្ហាញពីសភាពនៃភាពខ្សោះទឹកសោះ ទោះបីជាសីតុណ្ហភាពនៅពេលនោះក្តៅយ៉ាងណាក៏ដោយ។ តើយោធាទាំង២ក្រុមនេះ មានការប្រុងប្រៀបខ្លួនខុសគ្នាដោយរបៀបណា នៅក្នុងស្ថានភាពសមរភូមិវាលខ្សាច់ក្តៅហែងបែបនេះ?*




*នៅពេលគ្រប់អាយុចូលបំរើយោធា គឺនៅថ្ងៃដំបូងរបស់យុទ្ធជនអ៊ីស្រាអែលទាំងអស់ពួកគេនឹងទទួលបានកង្ហារកំដៅមួយម្នាក់ ដែលវាប្រៀបបានទៅនឹងឡកំដៅអញ្ចឹងសម្រាប់ពួកគេ ជាការបន្សុំាខ្លួននឹងកំដៅអោយហើយ ជាពិសេសកំដៅនៅវាលខ្សាច់។ បទបញ្ជានៃការផឹកទឹកយ៉ាងតឹងរឹងមួយ ត្រូវបានដាក់អោយប្រតិបត្តិលើកងកម្លាំងយោធារបស់អ៊ីស្រាអែលទាំងអស់ គឺក្នុងន័យដើម្បី*



បង្ការរោគខ្សោះជាតិទឹក។ ពីដំបូងឡើយយោធាម្នាក់ផឹកទឹកត្រឹម ១លីត្រប៉ុណ្ណោះក្នុង១ថ្ងៃ តែដោយក្រុមពេទ្យទាហានបានធ្វើការពិសោធន៍មួយ ជាការពិសោធន៍ដែលធ្វើឡើងនៅខែសីហា(ខែក្តៅជាងគេ) ទៅលើយោធាមួយក្រុម។ ជាលទ្ធផល ពួកគេធ្វើការកត់សំគាល់ឃើញថា បើសិនណាជាយោធាទាំងនោះ ស្ថិតនៅក្នុងតំបន់ដែលក្តៅខ្លាំង ហើយធ្វើការងារដែលបញ្ចេញកម្លាំងច្រើន នោះបរិមាណនៃញើសពួកគេអាចដល់ទៅ១២លីត្រឯណោះក្នុង១ថ្ងៃ ដូច្នេះពួកគេបានផ្តល់ជាយោបល់ថា យោធាទាំងនោះត្រូវតែផឹកទឹក១លីត្រក្នុង១ម៉ោង។ បន្ទាប់ពីការពិសោធន៍ក្រោយឆ្នាំ១៩៥៩មក បទបញ្ជានៃការផឹកទឹកត្រូវបានកែប្រែ ពីយោធាម្នាក់ផឹកទឹក១លីត្រក្នុង១ថ្ងៃ ទៅជាយោធាម្នាក់ផឹកទឹក១លីត្រក្នុង១ម៉ោង ហើយរោគដាច់សរសៃឈាមក្នុងខួរក្បាល និងរោគខ្សោះជាតិទឹកក៏នឹងមិនកើតមានឡើយ។ **ណាប៉ូឡេអុង**និយាយថា **"ទាហានប្រយុទ្ធបានដោយអាហារ"** ដែលនេះប្រហែលជាការត្រឹមត្រូវចំពោះអឺរ៉ុប ប៉ុន្តែនៅមជ្ឈឹមបូព៌ា **"ទាហានប្រយុទ្ធបានដោយទឹក"** កត្តានេះហើយធ្វើអោយអ៊ីស្រាអែលយល់ថាការធានារ៉ាប់រងផ្គត់ផ្គង់ទឹកគឺជារឿងសំខាន់។

ផ្ទុយពីអ៊ីស្រាអែលវិញ យោធាអេស៊្សីបបានទទួលការប៉ះពាល់យ៉ាងធ្ងន់ធ្ងរដោយសារតែកង្វះការប្រុងប្រយ័ត្នទៅលើការផ្គត់ផ្គង់ទឹកដល់ពលទាហាន ហើយចំនួនកងទ័ពប្រមាណ ១០០ ០០០នាក់ត្រូវស្លាប់ដោយសារតែពួកគេបានបាក់ទ័ព ដាច់រ៉ូងចេញពីក្រុម និងជាពិសេសគឺត្រូវបានកាត់ផ្តាច់ពីការផ្តល់ទឹក។ ពួកគេត្រូវដើរ២០០គីឡូម៉ែត្រ អត់ដេកអត់ពួន អត់អាហារ អត់ទឹក អត់ថ្នាំព្យាបាល គឺអត់អ្វីគ្រប់បែបយ៉ាង ដែលនេះជាតំរុយមួយធ្វើអោយគេសន្និដ្ឋានបានថា យោធាអេស៊្សីបត្រូវបានបាត់បង់ភាគច្រើន មិនមែនដោយសារការវាយប្រហារពីកងកម្លាំងអ៊ីស្រាអែលទេគឺដោយសារតែការដាច់ពោះទៅវិញទេ។ ទីបំផុត នៅថ្ងៃសុក្រទី០៩ ខែមិថុនា ឆ្នាំ១៩៦៧ យោធាអេស៊្សីបត្រូវបានវាយបណ្តេញមកដល់**ព្រែកជីកស៊ុយ** Suez Canal វិញ។



អ៊ីស្រាអែលបានកាន់កាប់បាន **វែស្សប៉ែង** West Bank និង**ហ្សឺរូសាឡែម** Jerusalem ពី**ហ្សកដង** Jordan ក្រោយពីការប្រយុទ្ធគ្នាយ៉ាងខ្លាំងក្លាអស់រយៈពេលតែ២ថ្ងៃប៉ុណ្ណោះ។ ប៉ុន្តែនៅមិនទាន់មានការផ្ទុះអាវុធដាក់គ្នានៅឡើយទេ រវាងយោធាអ៊ីស្រាអែលនិងយោធាស៊ីរី ដូច្នេះ ឥឡូវចាប់និយាយពីសង្គ្រាមរវាងប្រទេសទាំង២នេះ ដែលផ្ទុះឡើងនៅ**ហ្គោលឡែនហៃ** Golan Heights ជាតំបន់ដែលហ៊ុំព័ទ្ធទៅដោយភ្នំ ដែលអំណោយផលដល់ស៊ីរីប្រើជារបាំងការពារខ្លួនបានយ៉ាងរឹងមាំ។ ពួកគេបានទាញប្រយោជន៍ពីភ្នំដែលចោទៗទាំងនោះ ដោយការសាងសង់ **សំណង់ការពារសឹកសត្រូវ** Fortification ជាបីៗជួរនៅជម្រាលភ្នំអស់ទាំងនោះ។

ដើម្បីមានឱកាសអាចនឹងយកឈ្នះ សមរភូមិនេះបាន អ៊ីស្រាអែលចាំបាច់ប្រមូលកងកម្លាំងប្រយុទ្ធទាំងអស់របស់ខ្លួន ទាំងកងកម្លាំងដែលបានយកឈ្នះលើសមរភូមិទាំង២មុនក៏ដោយ(នៅអេស៊ីប និងហ្សកដង)។ នៅថ្ងៃសៅរ៍ ទី១០ខែមិថុនា ឆ្នាំ១៩៦៧ អ៊ីស្រាអែលបានបានយកឈ្នះលើសមរភូមិនៅហ្គោលឡែនហៃនេះ ហើយកត្តាដែលញ៉ាំងអោយគេទទួលជោគជ័យបាន គឺដោយសារការវាយកំទេចរូងសំណង់ការពារសឹកសត្រូវ ដែលនៅតាមជម្រាលភ្នំរបស់ស៊ីរីបានសម្រេច។ សំណួរសួរថា: តើអ៊ីស្រាអែលដឹងដោយរបៀបណាពីទីតាំងកំបាំងខ្លួននៃសំណង់ការពារសឹកសត្រូវអស់ទាំងនោះ បើទីតាំងភូមិសាស្ត្រនោះមានភ្នំត្រៀបត្រាពិបាកយល់យ៉ាងនេះ? ចម្លើយគឺ **អ៊េលី ខូលន៍** Eli Cohen ជាចារបុរសដ៏ល្បីល្បាញបំផុតរបស់អ៊ីស្រាអែល។

**អ៊េលី**បានធ្វើការជាភ្នាក់ងារស៊ើបការណ៍សម្ងាត់អោយរដ្ឋាភិបាលអ៊ីស្រាអែល ដែលគេគឺជាជនជាតិជ្វីបកើតនៅអារ៉ាប់ ហើយគេដឹងច្បាស់ពីអារ៉ាប់ និងជាពិសេសទៅទៀតនោះគឺគេបានក្លាយជាមិត្តជិតស្និទ្ធនឹងអគ្គមេបញ្ជាការកងទ័ពជាតិរបស់ស៊ីរី ហើយត្រូវបានតែងតាំងជាសមាជិកនៃមេបញ្ជាការជាន់ខ្ពស់ទៀតផង។ **អ៊េលី** មានសេរីភាពក្នុងការដើរត្រួតពិនិត្យសេរីពីទីតាំងមូលដ្ឋានទ័ពនានារបស់ប្រទេស ហើយគេបានគូរប្លង់ផែនការណ៍យ៉ាងលំអិត និងប្រមូលបាននូវពត៌មានដ៏មានតំលៃយ៉ាងច្រើនសម្រាប់ជាតិសាសន៍កំណើតរបស់ខ្លួន។ ប៉ុន្តែជាអកុសល កិច្ចការសម្ងាត់របស់អ៊េលីត្រូវបានចាប់បានដោយរដ្ឋាភិបាលស៊ីរី ហើយត្រូវបានចាប់ខ្លួននៅខែមករាឆ្នាំ១៩៦៥ ពីបទបញ្ជូនសារសម្ងាត់ចេញពីផ្ទះរបស់ខ្លួន រួចក៏ត្រូវបានបញ្ជូនទៅតុលាការ និងទទួលទោសព្យួរកនៅទីសាធារណៈ។

*នៅថ្ងៃទី១៨ ខែឧសភា ឆ្នាំ១៩៦៥ គ្រួសាររបស់**អ៊េលី**បានមើលជាមួយនឹងសេចក្តីវន្ទត់បំផុតពីពិធីព្យួរក**អ៊េលី** នៅតាមប្រព័ន្ធផ្សព្វផ្សាយសារធារណៈរបស់ស៊ីរី។ ទោះបីជាយ៉ាងនេះក៏ដោយ អ៊េលីធ្វើបានសម្រេចនូវផែនការណ៍អីមានតំលៃមួយ គឺការឆ្លុះបញ្ចាំងអោយខាងអ៊ីស្រាអែលដឹងច្បាស់ពីទីតាំងលាក់ខ្លួននៃសំណង់ការពារសឹករបស់ស៊ីរី ពីព្រោះកាលពីពេលគេនៅក្នុងតំណែង គេបានផ្តល់អនុសាសន៍យ៉ាងគត់មត់ទៅកាន់មេបញ្ជាការជាន់ខ្ពស់ផ្សេងទៀត"**យុទ្ធជនរបស់យើងនឹងត្រូវរលាកដោយសារកំដៅថ្ងៃជាមិនខាន ដូច្នេះយើងត្រូវតែធ្វើអ្វីម្យ៉ាងដើម្បីការពារពួកគេពីកំដៅព្រះអាទិត្យ ហើយវិធីតែមួយគត់គឺដាំដើមឈើនៅតាមកន្លែងសំណង់ការពារសឹកអស់ទាំងនោះ**"។ នេះហើយជាតំរុយសម្រាប់អ៊ីស្រាអែល គឺពួកគេមើលទៅកាន់កន្លែងដែលដើមឈើអស់ទាំងនោះដុះឡើង នោះពួកគេនឹងដឹងថាសំណង់ការពារសឹកគឺនៅពីខាងក្រោមនោះ។ លើសពីនេះទៀត អ៊េលីបានផ្ញើរអោយយោធាអ៊ីស្រាអែលនូវផែនការណ៍យ៉ាងលំអិត ទីតាំងលាក់ខ្លួនរបស់យោធា និងចំនួនយោធា គឺគេដឹងទាំងអស់ពីពត៌មានគ្រប់បែបយ៉ាងពីយោធាស៊ីរីនៅតំបន់នោះ។ យ៉ាងនេះក្តី ក៏នៅតែមានការបូជាឈាមស្រស់មិនតិចទេ ដើម្បីធ្វើអោយខ្លួនអាចចាក់គ្រឹះបានមាំនៅហ្គោលឡែនហៃនោះ "**ជ័យជំនះនឹងមិនមានឡើយបើគ្មានពលីកម្មនោះ**"* "Victory does not come without sacrifice"។

*សមរភូមិចុងក្រោយនេះ គឺជាសមរភូមិលំបាកបំផុតនៅក្នុងសង្គ្រាម៦ថ្ងៃនេះ ព្រោះទីតាំងប្រយុទ្ធមានមូលដ្ឋានលើគំនរភ្នំភ្លើងចាស់ ដែលជាឧបសគ្គដល់មធ្យោបាយធ្វើដំណើររបស់រថពាសដែក។ តើអ៊ីស្រាអែលជំនះបញ្ហានេះដោយវិធីណា? នៅតែជាបញ្ហាដដែល។ ក្រុមពិសេសមួយត្រូវបានបង្កើតឡើង ជាក្រុមដែលនឹងអាចជៀសផុតពីវិបត្តិនៃមធ្យោបាយធ្វើដំណើរ និងអាចវាយឆ្មក់យោធាស៊ីរីមិនអោយដឹងខ្លួន។ បន្ទាប់ពីសង្គ្រាមបានប្រព្រឹត្តទៅអស់រយៈពេល៤ថ្ងៃជាមួយនឹងជោគជ័យគួរជាទីគាប់ចិត្តមក ពេលនេះស្ថានភាពគឺបានឈានដល់ភាពរីកវរហើយសម្រាប់អ៊ីស្រាអែល។ ឧបសគ្គចំបងនៅទីនេះគឺជាវាយប្រហារនៅក្នុងរូងការពារសឹករបស់ស៊ីរី ដែលជាសំណង់ដ៏រឹងមាំ មានច្រកខ្វាត់ខ្វែងពិបាកយល់ ហើយងាយនឹងគ្រោះថ្នាក់បំផុត ប៉ុន្តែសួរមកវិញថាតើ អ៊ីស្រាអែលមានដំណោះស្រាយយ៉ាងម៉េចទៀត ហើយជាមួយនឹងសំណង់ការពារដ៏ស្មុគស្មាញនេះ។ ការជ្រើសរើសប្រភេទអាវុធគឺជាវិធីមួយដ៏សមស្របបំផុត វាជាកាំភ្លើងយន្តដែលមានប្រសិទ្ធិភាពក្នុងការប្រហារទីជិត។*

អ៊ីស្រាអែលបានឆ្នៃកាំភ្លើងយន្តសម្រាប់ខ្លួនឯង ឈ្មោះថា**អ៊ូស៊ីប៉ុរមីលីម៉ែត្រ UZI 9mm** ប៉ុន្តែជាដំបូងគេបានធ្វើការប្រៀបធៀបវាជាមួយនឹងកាំភ្លើងយន្តផ្សេងមួយទៀតគឺ**អាកា៤៧ Ak47**។ ភាពខុសគ្នារវាងកាំភ្លើងយន្តទាំង២នេះមាន:

**អ៊ូស៊ីប៉ុរមីលីម៉ែត្រ UZI 9mm** **អាកា៤៧ Ak47**





**អ៊ូស៊ីប៉ុរមីលីម៉ែត្រ UZI 9mm**

១. មានប្រសិទ្ធិភាពក្នុងរយៈចំងាយជិត
២. ងាយប្រើ និងងាយផ្លាស់ប្តូរបង់គ្រាប់



**អាកា៤៧ Ak47**

១. ប្រសិទ្ធិភាពរយៈចំងាយឆ្ងាយ
២. កម្លាំងខ្លាំង ពិបាកក្នុងការប្តូរបង់គ្រាប់



តូច ងាយស្រួលកាន់ និងងាយបត់បែននៅក្នុងទីចង្អៀត ដូច្នេះ**អ៊ូស៊ីប៉ុរមីលីម៉ែត្រ UZI 9mm** ត្រូវបានជ្រើសយកទៅប្រើក្នុងការវាយប្រហាររូងការពារសឹកស៊ីរីហើយជាការពិតមែនគឺវាផ្តល់ជាជំនួយយ៉ាងខ្លាំងដល់កងកំម្លាំងអ៊ីស្រាអែល។ នៅពេលព្រឹកថ្ងៃអាទិត្យ ទី១០ខែមិថុនា យោធាស៊ីរីដែលលាក់ខ្លួននៅតាមសំណង់ការពារសឹកទាំងនោះបានធ្វើការដកថយ ហើយសង្គ្រាម៦ថ្ងៃក៏ត្រូវបានបញ្ចប់។ មិនដល់១សប្តាហ៍ផង អ៊ីស្រាអែលបានយកឈ្នះដល់ទៅ៣សមរភូមិផ្សេងគ្នាឯណោះ ដំបូងអេស៊ីប ហ្សកដង់ និងចុងក្រោយគេស៊ីរី។ តើអ្វីទៅដែលជំរុញអោយមានជោគជ័យដ៏អស្ចារ្យបែបនេះកើតឡើងទៅ? មួយផ្នែកគួរគាត់សំគាល់នោះគឺ**ការគ្មានសាមគ្គីគ្នា(ស្រុះគ្នា)** រវាង៣ប្រទេសនេះ ធ្វើការវាយប្រហារអ៊ីស្រាអែលព្រម

គ្នាក្នុងពេលតែមួយ និងមួយផ្នែកទៀតគឺការប្រុងប្រៀបខ្លួននឹងសង្គ្រាមបានយ៉ាងល្អរបស់អ៊ីស្រាអែល គេមានផែនការ ហើយវាបានអនុវត្តន៍បានត្រឹមត្រូវតាមលំដាប់លំដោយ មានការហ្វឹកហាត់បានច្បាស់លាស់ និងដំណើរការទៅជាមួយនឹងសំណាង។ សង្គ្រាម៦ថ្ងៃវឺ? អ៊ីស្រាអែលត្រៀមខ្លួនរួចជាស្រេច។

***"បើអ្នកមិនដឹងពីរបៀបយកឈ្នះនោះទេ អ្នកត្រូវដឹងថាធ្វើយ៉ាងណាទើបចាញ់"***

<u>ចុតហ្មាយ</u> 

បងស្រលាញ់អូនតែបងក៏ស្រលាញ់
ក្មេងៗដែលរៀននៅសាលាជិតផ្ទះអូន
ពូ មីងដែលរស់នៅស្រុកកំណើតអូន
តា យាយដែលរស់នៅស្រុកកំណើតឪពុកម្ដាយ
អូនដែរ









# ស្អែករងាជាងនេះទៀត



ក្នុងគ្រួសារមួយដែលមានកូនប្រុសទោលម្នាក់ កំព្រាម្តាយមានតែឪពុកនៅមើលថែទាំតាំងពីគេមានអាយុ៥ឆ្នាំមកម៉្លេះ។ ឪពុករបស់គេគឺជាគ្រូបង្រៀននៅសាលាមធ្យមសិក្សាម្នាក់ ចំណែកក្មេងប្រុសនោះពេញកំលោះហើយនិង កំពុងសិក្សានៅថ្នាក់ទី១១ ដែលមធ្យមសិក្សាទុតិយភូមិនឹងមកដល់នៅឆ្នាំក្រោយ។

ស្លឹកឈើចាប់ផ្តើមជ្រុះ ខ្យល់ត្រជាក់បានធ្លាក់ពីមួយថ្ងៃទៅមួយថ្ងៃ ដែលជាសញ្ញាបញ្ជាក់ថារដូវរងា នឹងឈានចូលមកដល់នាពេលឆាប់ៗខាងមុខនេះហើយ។ ល្ងាចថ្ងៃមួយ ក្រោយពេលបញ្ចប់ការពិភាក្សាកិច្ចការសាលានៅផ្ទះមិត្តភក្តិរួចមក ដាវិនបានមកទាន់ពេលល្មមដែល ឪពុកខ្លួនកំពុងតែចំអិនអាហារពេលល្ងាច ដូច្នេះគេក៏ប្រញាប់ដាក់សំពៀតចុះ រួចទៅជួយរៀបចំចាន និងហុចនេះហុចនោះអោយឪពុកដែលកំពុងចំអិន ទាំងពីរនាក់ឪកូនក៏និយាយគ្នាពីនេះពីនោះរហូតដល់រួចរាល់។

ដាវិនបានទៅប្តូរខោអាវ និងងូតទឹកសំអាតខ្លួនមុនពេលមកតុអាហារ បាយម្ហូបត្រូវរៀបចំរួចជាស្រេច ឪពុកក៏ហៅកូន

ឪពុក: ដាវិនញ៉ាំបាយកូន

ដាវិន: បាទ! ពុក

ឪពុក: ម៉េចកូនធ្វើមុខធ្វើមាត់ហាក់ដូចជារងាខ្លាំងម៉្លេះកូន?

ដាវិ: វារងាណាស់ពុកឥឡូវ ងូតទឹកអំបាញ់មិញត្រជាក់ស្ទើងស្លាប់ទៅហើយ

ឪពុកញញឹមបន្តិចរួចតបយ៉ាងសម្លីយ៉ាងផ្អែមថា

ឪពុក: ថ្ងៃស្អែកនេះវានឹងត្រជាក់ជាងនេះទៅទៀតណាកូន

ដាវិនងាកមើលមុខឪពុកដោយងឿងឆ្ងល់រួចក៏សួរយ៉ាងប្រញាប់ថា

ដាវិន: មានន័យថាម៉េចពុក កូនអត់យល់ទេ

ឪពុក: ចាំពុកនិទានរឿងមួយអោយស្តាប់អញ្ចឹង

!!!!! មានអ្នកជំនួញដើរសំពៅម្នាក់ មានបំណងនាំយកគ្រឿងសំភារៈប្រើប្រាស់មួយចំនួនយកទៅជួញដូរនៅឯស្រុកឆ្ងាយមួយ ព្រោះនៅទីនោះមិនសូវសំបូរគ្រឿងសំភារៈឧបករណ៍ប្រើប្រាស់អស់ទាំងនោះទេ ដែលវាជាឱកាសមួយអាចអោយគាត់ចំនេញប្រាក់បានច្រើន។ ឧបសគ្គមួយធំណាស់ដែលរារាំងគាត់ មុននឹងអាចអោយគាត់អាចទៅដល់ស្រុកមួយនោះ វាគឺការត្រូវចំណាយពេលកន្លះខែឯណោះដើម្បីឆ្លងកាត់សមុទ្រទឹកកកមួយ។ វាជារឿងដ៏លំបាកមួយព្រោះភូមិស្រុកដែលគាត់កំពុងរស់នៅនោះមិនដែលធ្លាក់ទឹកកកផងហ្នឹង ណាមួយបើត្រជាក់បំផុតនោះក៏នៅតែត្រជាក់១០ដងតិចជាងសមុទ្រទឹកកកនោះទៅទៀត។

កូនគិតទៅមើលថាតើ គាត់នឹងឆ្លងកាត់ស្ថានភាពនេះយ៉ាងដូចម្តេចទៅទើបអាចទៅដល់ស្រុកនោះ។ ចាំទុកក្នុងចិត្តរបស់កូនថា មនុស្សខ្លាំងកើតមកគឺដើម្បីដោះស្រាយបញ្ហា មិនមែនត្អូញត្អែរនឹងបញ្ហា រឺរត់ចោលបញ្ហានោះទេ បើកូនមិនចេះធ្វើម្តងកូនត្រូវប្រើភ្នែក និងត្រចៀកដើម្បីសង្កេតពីរបៀបធ្វើ ពីពុក មិត្តភក្តិ រឺនរណាក៏ដោយអោយតែមានឱកាស ដែលលីសម្តីអ្នកប្រាជ្ញចិនម្នាក់និយាយទេថា មនុស្សគ្រប់រូបនៅជុំវិញខ្លួនយើងសុទ្ធតែជាគ្រូរបស់យើង ហើយចាំបាច់ជាងនេះទៅទៀតគឺកូនត្រូវសាកល្បងដោយខ្លួនឯងទើបជាការប្រសើរ។ បកមកអ្នកដើរសំពៅនោះវិញ គាត់មានការប្តេជ្ញាចិត្តមាំទាំណាស់ គឺថាគាត់ត្រូវតែយកទំនិញទាំងនោះទៅលក់អោយខានតែបាន អោយតែមានការតស៊ូលះបង់ប្តូរផ្តាច់មួយកើតឡើងកូន នោះការផ្លាស់ប្តូរមួយនឹងកើតមានឡើងជាក់មិនខាន ជាដំបូងគាត់បានគិតពិចារណាជាច្រើនដងទៅលើបញ្ហារបស់គាត់ដែលវាគឺជាភាពត្រជាក់នោះឯង គិតហើយគិតទៀតក៏នឹកដល់យុទ្ធសាស្រ្តទ័ពពីបុរាណស្តីពីវិធីការពារខ្លួនពីខ្មាំងសត្រូវ ថាតើពាក់អាវក្រោះការពារខ្លួន រឺមួយក៏ហាត់វិជ្ជាឆ្អឹងដែកស្បែកស្ពាន់ វាដូចជាត្រូវស្លៀកសំលៀកបំពាក់អោយក្រាស់ៗ រឺមួយក៏ត្រូវហាត់បន្សាំខ្លួនទៅនឹងភាពត្រជាក់ គាត់យល់ថាបើប្រើសំលៀកបំពាក់ក្រាស់ៗ វាច្បាស់ណាស់អាចជួយកាត់បន្ថយភាពត្រជាក់បានមួយ

ចំនែកពិតមែនតែមិនអាចបានរហូតពេញរយៈពេលកន្លះខែនោះទេច្បាស់ជាត្រូវធ្លាក់ខ្លួនឈឺជាក់ជាមិនខាន ហើយនឹងមិនងាយនឹងព្យាបាលជាឡើយនូវជំងឺផ្តាសាយចាញ់ត្រជាក់នេះ ដូច្នេះគាត់គិតថាមិនប្រើជំរើសទី១នេះទេ រួចក៏បកទៅគិតលើជំរើសទី២វិញគឺការបន្សុាំខ្លួន តើមធ្យោយបាយនោះវាយ៉ាងម៉េចទៅ?

ជាការស្រួលណាស់ ជាដំបូងគាត់ក៏សម្រេចចិត្តផ្លាស់ប្តូរផ្ទះគឺរើទៅរស់នៅកន្លែងដែលមានអាកាសធាតុត្រជាក់ មានព្រិល និងទឹកកកធ្លាក់ផងដែរ។ ពិតណាស់វាលំបាកដូចការស្មានទុកមែន គាត់មិនអាចចេញទៅណាបានទេក្រៅពីអង្គុយនៅក្នុងផ្ទះអាំងភ្លើង រួចត្រូវពាក់អាវក្រាស់ៗជាច្រើនជាន់ ដូចនេះហើយនៅតែមិនបាត់ត្រជាក់ទៀត តែមិនថ្វីឡើយសម្រាប់គាត់។ មួយសប្តាហ៍ក្រោយមកគាត់ក៏សាកល្បងស្លៀកពាក់ក្រាស់ៗតែមិនប្រើភ្លើងកំដៅខ្លួនទៀតឡើយ បន្ទាប់មកទៀតដេកដោះសំលៀកបំពាក់នៅក្នុងផ្ទះ មិនយូរប៉ុន្មានគាត់ក៏ប្រថុយដេកក្រៅផ្ទះនៅរដូវរងារដោយគ្រាន់តែស្លៀកសំលៀកបំពាក់ធម្មតាប៉ុណ្ណោះ ធ្វើដូចនេះអស់ជាច្រើនសប្តាហ៍ទើបបន្សុាំខ្លួនបាន លើសពីនេះទៅទៀតគាត់បានដេកដោះអាវនៅក្រៅផ្ទះ ហើយថែមទាំងងូតទឹកសមុទ្រលេងពេលយប់នារដូវរងាទៀតផង។

ធ្វើហើយធ្វើទៀតសាកហើយសាកទៀត អស់ជាច្រើនខែមក នៅទីបំផុតគាត់ក៏បន្សុាំខ្លួនបានទៅនឹងភាពត្រជាក់បាន ព្រមទាំងបានឆ្លងកាត់សមុទ្រទឹកកកបដោយជោគជ័យនិងបានលក់ទំនិញអស់ចំនេញបានប្រាក់ត្រឡប់មកវិញជាទីគាប់ចិត្ត។ !!!!!!

និយាយចប់ឪពុកក៏ងាកមើលមុខដារិន រួចសួរថា

ឪពុក: យ៉ាងម៉េចទៅហើយកូន? វាមិនមែនជារឿងសំខាន់អ្វីទេកាលដែលថាវាត្រជាក់នៅថ្ងៃនេះនោះ អ្វីដែលសំខាន់គឺថាកូននឹងត្រូវប្រុងប្រៀបខ្លួនយ៉ាងដូចម្តេចដើម្បីទប់ទល់នឹងភាពត្រជាក់នៅថ្ងៃស្អែក ពុកធ្លាប់លឺសម្តីទស្សនៈវិទូនិយាយថា **វាលែងមានទៀតហើយថ្ងៃនេះឆ្នាំមុន តែថ្ងៃនេះឆ្នាំក្រោយនៅមាន** និង **បើសិនជាអ្នករៀបរយអស់ហើយ**

***នៅថ្ងៃនេះ នោះថ្ងៃស្អែករបស់អ្នកនឹងល្អឥតខ្ចោះជាក់ជាមិនខាន។***

*អ្វីដែលពុកចង់និយាយនៅត្រង់នេះ គឺចង់អោយកូនចេះប្រុងប្រៀបអោយបានរួចជាស្រេចនូវរាល់សព្វកិច្ចការ ដើម្បីមានជំហរពេញលេញក្នុងការដោះស្រាយបញ្ហាដែលនឹងកើតឡើងនាពេលឆាប់ៗខាងមុខនេះ ណាម្យ៉ាងទៀត សូមកូនកុំគិតថាការលំបាកស្មុគស្មាញដែលកូនកំពុងជួបប្រទះសព្វថ្ងៃនេះវាលំបាកណាស់ណានោះ វានៅមានអាលំបាកជាងនេះទៅទៀតនៅថ្ងៃខាងមុខ អោយតែកូនប្រុសពុកនៅតែដកដង្ហើម។*

*កូនញញឹមបន្តិចរួចងក់ក្បាល និយាយថាកូនយល់ហើយពុក ការពិតពុកចង់អោយកូនចេះគិតអោយបានវែងទៅមុខ និងយល់ពីស្ថានភាពខ្លួនឯងបច្ចុប្បន្នថាតើត្រូវរៀបចំខ្លួនយ៉ាងដូចម្តេចអោយបានរួចរាល់ជាស្រេច មុននឹងចេញទៅធ្វើការអ្វីមួយដូចជាគតិមួយកូនធ្លាប់លឺគ្រូនិយាយថា* ***ការដែលដឹងពីចំណុចខ្វះខាតរបស់ខ្លួនឯង គឺជាចំណុចចាប់ផ្តើមនៃការអភិវឌ្ឍន៍។*** *ឪពុកញញឹម បន្ទាប់មកទាំងពីរនាក់ឪកូនក៏ទទួលទានអាហារពេលល្ងាចនោះយ៉ាងសប្បាយរីករាយទៅ។៕។៕*

# ចុតហ្មាយ

"ប្រាប់កូនអ្នកទៅមើល៍ថា
តើជីតារបស់គេបានធ្វើអ្វីខ្លះសម្រាប់កម្ពុជា?"










# *ហេតុអ្វីសត្វខ្យងមានសំបក?*



*តាំងពីតូចក្រូចឆ្មាមក បើនិយាយពីសត្វខ្យងហាក់ដូចជាមិនដែលបានគិតទៅដល់ខ្យងធំៗ ដែលគេយកមកទទួលទាននោះទេ គឺស្គាល់ និងឃើញជាញឹកញាប់តែពពួកខ្យងរមាស់ ដែលតោងវារលើដើមឈើទាបៗ និងកូនខ្យងខ្មៅដែលគេស្ងោរទូលលក់តែប៉ុណ្ណោះ។ មិនដឹងដែរថាប្រភេទសត្វខ្យងនេះ ខ្លះមានសំបកស្រាប់តាំងពីកំណើត រឺប្រភេទខ្លះទៀតគ្មានសំបកតាំងពីកើតរហូតវារស់ជីវិតនោះទេ នៅទីនេះចង់សង្កត់ធ្ងន់ទៅលើប្រភេទដែលមានសំបក ដែលអាចអោយវាលាក់ខ្លួននៅពេលវាអាសន្ន រឺគ្រោះថ្នាក់បានយ៉ាងងាយស្រួល ថាតើមូលហេតុអ្វីបានជាវាធំឡើងជាមួយសំបកយ៉ាងធ្ងន់ដែលត្រូវអូសតាមខ្លួនជារៀងរាល់ថ្ងៃដូច្នេះ ម្យ៉ាងមានសំគាល់ឃើញទេថាវាមានដំណើរយឺតយ៉ាវណាស់ដោយសារតែ សំបកនេះ។*

*បើយើងគិតមកជាមនុស្សវិញ វាហាក់ដូចជា មនុស្សម្នាក់ដែលត្រូវទៅណាមកណាជាមួយតវ៉ាន់ ពី១០ទៅ២០គីឡូជាប់ជាប្រចាំ រឺក៏ដូចជាស្ត្រីមានផ្ទៃពោះម្នាក់ដែលត្រូវមានដំណើរមួយៗ ព្រោះត្រូវទ្រទំងន់មួយផ្នែកទៀតទៅតាមខ្លួនជាប់ជានិច្ច តើវាមានការលំបាកយ៉ាងណាទៅហ្ន៎?*

*មានមិត្តភ័ក្រ្តម្នាក់ ជាកូនសិស្សសាលាភាសាចិនបាននិទានរឿងដែលទាក់ទងនឹងសត្វខ្យងនេះ ប្រាប់ពីដំណើរដើមទង ដែលនាំអោយពួកវាមានសំបកមកដល់សព្វថ្ងៃនេះដូចតទៅនេះ៖*

!!!!! *កាលដើមឡើយសត្វមួយចំនួនមិនទាន់វិវត្តន៍មក រកសភាពលក្ខណៈដូចជាបច្ចុប្បន្ននេះទេ ដូចយ៉ាងសត្វខ្យងនេះឯង វាគ្មានសំបកជាប់នឹងខ្លួនស្អីនោះទេ។ ដោយសារធម្មជាតិចេះតែប្រែប្រួលទៅៗ ពីភ្លៀងផ្គរផ្លាស់ប្តូរទៅហួតហែង រួចបកមកភ្លៀងផ្គរវិញ ទៅតាមរដូវជារៀងរាល់ឆ្នាំ គឺរដូវវស្សាធ្លាក់ភ្លៀងនេះឯងដែលធ្វើអោយពពួកសត្វតូចធំជួបប្រទះការលំបាក ក្នុងការស្វះស្វែងរកជំរកសុវត្ថិភាព*

កក់ក្តៅនោះ ជាពិសេសពពួកសត្វល្អិត វាងាយនឹងលិចលង់បាត់បង់ជីវិតណាស់ បើកាលណាមានភ្លៀងធ្លាក់ច្រើន ហើយមានទឹកលិចនោះ ព្រោះជំរកពួកវាភាគច្រើន គឺនៅទាបជាប់នឹងដីផ្ទាល់តែម្តង។ ពពួកសត្វល្អិតល្អោចនោះរួមមានដូចជាៈ ស្រមោច សង្អារ ចង្រិត កណ្តូបតូចធំជាដើម ដែលបានខំស្វះស្វែងរកជំរកជ្រកភ្លៀងយ៉ាងលំបាក នៅពេលរដូវវស្សាម្តងៗ ចំណែកសត្វខ្យងឯណោះវិញ ក៏មិនខុសពីពួកវាប៉ុន្មានដែរ គឺត្រូវហាលខ្យល់ហាលភ្លៀង ដោយសារតែខ្លួនវានៅទទេនលោលគោកគ្មានអ្វីសំរាប់ ជ្រកទេ។

ដំណាលថា មានថ្ងៃមួយដែលភ្លៀងបង្អុរចុះយ៉ាងខ្លាំង ជាពេលដែលពពួក សត្វល្អិតអស់ទាំងនោះ កំពុងស្វែងរកកន្លែងជ្រកដ៏កក់ក្តៅ និងមានសុវត្ថិភាព គេចពី ពីការរងាស្លាប់ និងដំណក់ទឹកភ្លៀងដ៏ធ្ងន់ៗដែលក៏ជាមូលហេតុងាយធ្វើអោយពួកវា រងរបួសបាត់បង់ជីវិតបានផងដែរ។ ក្នុងចំណោមពួកវានោះ គឺសត្វខ្យងនេះឯងដែល បានប្រទះឃើញជំរកជ្រកមុនគេ វាជាសំបកទទេយ៉ាងក្រាស់មួយ ហាក់បីដូចជាថ្ម យ៉ាងរឹងអាចការពារខ្យល់ ការពារភ្លៀង និងលាក់ខ្លួនគេចពីសត្រូវបានយ៉ាងងាយ។ ឃើញដូចនេះ ពួកស្រមោចសង្អារក្តី ចង្រិតក្តី កណ្តូបក្តីបានមកសុំខ្យងជ្រកជាមួយ ផងព្រោះភ្លៀងចេះតែបង្អុរមិនឈប់អស់ជាច្រើនថ្ងៃមកហើយ ដែលធ្វើអោយពួក វាពិបាកស្វែងរកចំណី រងាហេវហត់អស់កំលាំង ហើយបើសិនជាគ្មានកន្លែងជ្រកនោះ ទេពួកវាច្បាស់ជារងាដាច់ពោះស្លាប់ជាក់ជាមិនខាន។

ចិត្តដាច់ណាស់ ខ្យងមិនបានយល់ព្រមទេហើយប្រាប់ទៅពួកវាវិញថា នេះគឺជា ជំរករបស់យើងតែម្នាក់គត់ យើងមិនអោយពួកឯងជ្រកទេ ណាមួយខ្យងខ្លាចថាសត្វ ទាំងនោះជ្រកហើយមិនព្រមចេញពីសំបករបស់វា។ ការភ័យក្លាយថាពពួកសត្វល្អិតៗ ទាំងនោះលួចសំបករបស់វា ទើបខ្យងមិនហ៊ានចេញទៅណាមកមកណាទេគឺសូម្បី តែទៅរកចំណីក៏ដោយ គឺវានៅចាំតែក្នុងសំបករបស់នោះយ៉ាងប្រុងប្រយ័ត្ន។ ដោយ សារតែភ្លៀងចេះតែបង្អុរចុះមិនឈប់មិនឈរ ជាច្រើនសប្តាហ៍មក ធ្វើអោយពួក

ស្រមោច ចង្រិត កណ្តូបរងាដាច់ពោះងាប់ជាបន្តបន្ទាប់។ ងាកមកមើលខ្យងវិញបាន ជ្រកយ៉ាងសុខស្រួលនៅក្នុងសំបករបស់វាដោយមិនហ៊ានចេញរាល់ខណៈណាឡើយ។

ព្រះអាទិត្យបានរះឡើងនៅថ្ងៃបន្ទាប់មក ផ្ការីកស្គេកស្គះ សំលេងសត្វស្លាប បានរំពងឡើងពេញព្រៃហាក់ជាសញ្ញាប្រាប់ថា មេឃស្រលះហើយ លែងមានភ្លៀង ទៀតហើយ ឯទេសភាពក៏ស្រស់បំព្រង ក្រោយពីបានទទួលទឹកភ្លៀងយ៉ាងជោគជាំជា ច្រើនថ្ងៃមក ឃើញដូច្នេះ ខ្យងក៏សំរេចចិត្តចេញពីសំបកដើម្បីទៅស្វែងរកចំណី ព្រោះបានក្រៀមក្រពះហេវហត់អស់ជាច្រើនថ្ងៃមកហើយ។ រឿងចំឡែកមួយបាន កើតឡើង គឺនៅពេលដែលវាចង់វារចេញពីសំបក ក៏ស្រាប់តែទទួលអារម្មណ៍ថាខ្លួន វាត្រូវបានជាប់ស្អិត ទៅនឹងសំបកជាទីស្រលាញ់យ៉ាងណែនចេញមិនរួច ទោះបីជាខំ ទើបំរាស់ខ្លួនយ៉ាងណាក៏ដោយក៏មិនអាចវាចេញបានឡើយ។ ខ្យងបានសាកល្បងវា ចេញជារឿយៗផងដែរ តែលទ្ធផលគឺបរាជ័យរាល់លើក ដោយអស់សង្ឃឹមវាក៏បោះ បង់ការព្យាយាមនោះចោលទៅ ដែលជាហេតុធ្វើអោយសត្វខ្យងមានសំបកយ៉ាងធ្ងន់ ត្រូវស្ពាយទៅស្ពាយមកទៅគ្រប់ទីកន្លែងចាប់តាំងពីពេលនោះមក។ !!!!!!

យ៉ាងម៉េចដែររឿងនេះ គួរអោយចាប់អារម្មណ៍ម្យ៉ាងដែរតែកុំភ្លេចសួរសំណួរ ទៅក្មេងៗដែលអ្នកនិទានរឿងនេះផង ចាតើមូលហេតុអ្វីបានជាខ្យងត្រូវតែអូស សំបកទៅជាមួយគ្រប់ពេលដូច្នេះ?

ចុតហ្មាយ 

"សួរខ្លួនអ្នកថាៈ តើអញមានការទទួលខុសត្រូវ
ពេញលេញហើយឬនៅ
ចំពោះឯកសណ្ឋានដែលអញកំពុងតែពាក់នេះ?"



# ១០០រឿងរំលែកក្ដីស្រលាញ់



*វប្បធម៌នៃការធ្វើការងារជាក្រុម ដែលមានសមាជិកចាប់ពី ២នាក់ឡើងទៅ របស់ជនជាតិខ្មែរយើង ជាទូទៅគឺទទួលបានលទ្ធផលបរាជ័យ ទោះជាមានគតិអប់រំ របស់ដូនតាជាច្រើន ដូចចង្រ្កឹះមួយបាច់កាច់មិនបាក់ រឺកំណាព្យសាមគ្គីអង្រ្គងរបស់ លោក**ប៊ុនច័ន្ទម៉ុល** នៅក្នុងសៀវភៅ**ចរិតខ្មែរ**ជាដើម។ យ៉ាងនេះក្ដី ក៏គោលគំនិត ទាំងនេះមិនបានជ្រាបជក់ជាប់ខួរក្បាលរបស់ជនជាតិយើងឡើយ។ តើពួកយើងគួរតែ ស្វែងរកមូលហេតុទាំងអស់គ្នា រកវិធីសាស្រ្តដោះស្រាយ ជជែកដេញដោលពីវិធី សាស្រ្តទាំងនោះ រួមប្រមូលកំលាំងគ្នាដោះស្រាយបញ្ហានោះអោយបានសំរេច ដើម្បី ជាប្រយោជន៍សំរាប់ជនជាតិយើង ឬយ៉ាងណា?*

*តាមយោបល់ និងបទពិសោធន៍ផ្ទាល់ខ្លួន ដែលធ្លាប់ឆ្លងកាត់កន្លងមកតាំងពី បឋមសិក្សា រហូតមកដល់វិទ្យាល័យ គ្មានទេការងារជាក្រុមដូចជាធ្វើកិច្ចការផ្ទះជាក្រុម រឺចែកគ្នាជាក្រុមពិភាក្សាលើប្រធានបទណាមួយ ភ្លេច!! នៅមានម្យ៉ាងដែលធ្វើជាក្រុម គឺវេនបោសសំអាត ដែលម្នាក់ៗឧស្សាហ៍ភ្លេចហើយបើធ្វើ គឺតែងបញ្ចាំរឺមើលបំណាំ គ្នា ខ្លាចលើសខ្លាចខ្វះ។ ប៉ុន្តែ ពេលឈានមកដល់ថ្នាក់បរិញ្ញាប័ត្រ ទើបមានការធ្វើការ ងារជាក្រុមនេះ តែនៅមានលក្ខណៈរអាក់រអួលនៅឡើយ ព្រោះជាសកម្មភាពថ្មីសុទ្ធ សាធ មិនធ្លាប់ធ្វើទាល់តែសោះ អៀនមាត់អៀនកមិនហ៊ាននិយាយ ណាត្រូវអង្គុយ ជុំៗគ្នា បញ្ចេញមតិ និងគំនិតដែលខ្លួនមាន ស្ដាប់គំនិតរបស់មិត្តរួមក្រុម ធ្វើការ តស៊ូការពារគំនិតខ្លួនទល់នឹងគំនិតមិត្តម្នាក់ៗក្នុងក្រុម។ ជាទូទៅលទ្ធផលបរាជ័យរឺ ទទួលលទ្ធផលមិនជាទីគាប់ចិត្តឡើយ ចំណុចមួយចំបងជាឧបសគ្គគឺ **ការមាន:** ដែលវា មាន៣យ៉ាង:*

*ទី១. **យើងខ្ពស់ជាងឯង:** ចំនេះដឹង បទពិសោធន៍យើងខ្ពស់ជាងឯង មូលហេតុ*

អី យើងត្រូវស្តាប់ឯង សម្តីឯងហាក់ជាសាបបន្តិច ចាំឯងរៀនបានខ្ពស់ជាងនេះ ចាំមកនិយាជាមួយយើង ទើបសម្តីឯងវាប្រៃ ហើយយើងស្តាប់ចូលត្រចៀក។

ទី២. **យើងស្មើឯង:** រៀនគ្រូជាមួយគ្នា ថ្នាក់ជាមួយគ្នា ជំនាន់ជាមួយគ្នាសោះហ្នឹង! ធ្វើឯងបញ្ចេញគំនិតមក ធ្វើដូចឯងជាអ្នកប្រាជ្ញស្អីណា ខ្ពើមស្តាប់ណាស់ ចាំឯងរៀនរហូតក្លាយជាគ្រូអញសិន ទើបអញស្តាប់។

ទី៣. **យើងទាបជាងឯង:** ឯងរៀនដល់ថ្នាក់បណ្ឌិត ហើយចេញមកពីសាលាល្បីៗថែមទៀតផង ចំណែកយើងវិញ បញ្ចប់ការសិក្សាត្រឹមថ្នាក់បរិញ្ញាប័ត្រកំប៉ិចកំប៉ុក មិនអាចប្រៀបនឹងឯងបានទេ ដូច្នេះឯងនិយាយអីក៏ត្រូវដែរ យើងសុខចិត្តចាញ់ឯងគ្រប់បែបយ៉ាង។ ខ្ជិលស្តាប់ណាស់!!!

មិនព្រមស្តាប់ហេតុផលតក្កអ្វីទាំងអស់ ការទោមនស្ស អំណួត តែងកើតមានឡើង មិនសុខចិត្តរៀងៗខ្លួន(**រឹងក្បាល**) ប្រកាន់ថាខ្លួនឯងជាអ្នកត្រូវ។

ទីនេះវិញ សូមលើកការពិតមួយ ដែលមិនមាននៅក្នុងសៀវភៅទេ ប៉ុន្តែជាការអនុវត្តន៍ជាក់ស្តែងតែម្តងរបស់ជនជាតិ**ជ្វីប** គឺជាការដែលពួកគេ និយមយកកូនបន្តឆ្នាំគ្នា(ជាប់ៗគ្នា) ដោយគល្លាតពីកូនម្នាក់ទៅម្នាក់ទៀតយ៉ាងច្រើន២ ទៅ៣ឆ្នាំប៉ុណ្ណោះ ដែលវាជាដើមទងមួយយ៉ាងសំខាន់ ក្នុងការជួយពួកគេអោយចេះធ្វើការងារជាក្រុមតាំងពីតូចៗ ដោយសារតែ ពួកគេមានក្រុមរួចជាស្រេច សំរាប់លេងជាមួយជជែកជាមួយជាដើម នោះពេលគេចេញក្រៅផ្ទះ ប្រឡូកក្នុងសង្គម រឺមជ្ឈដ្ឋានដែលគេប្រាស្រ័យទាក់ទងជាមួយ ងាយស្រួលណាស់សំរាប់ពួកគេសំរបខ្លួន ណាមជ្ឈដ្ឋានដែលជិតស្និទ្ធជាងគេ គឺសាលាពួកគេទៀតសោត បានបញ្ចូលទៅក្នុងកម្មវិធីសិក្សាតាំងពីកំរិតដំបូងមកម្លេះ ពីសារៈរបស់ការងារជាក្រុមនិងផលប៉ះពាល់ នៃការបែកបាក់ក្រុម ព្រោះគេយល់ច្បាស់ណាស់ អំពីឥទ្ធិពលនៃសាមគ្គីភាព ហើយពន្យល់ថា **ដើម្បីសំរេចការងារធំៗបាន គេមិនអាចធ្វើវាតែម្នាក់ឯងបាននោះទេ ហោចណាស់ក៏ត្រូវមានការពិភាក្សាមូលមតិគ្នាលើចំណុចមួយ រួចជួយប្រោមជ្រែងគ្នាទៅវិញទៅមក**

**ជារឿងដែលជៀសមិនរួច។** អោយកូនតូចៗទាំងនោះ ស្តាប់ពីរឿងក្រុមបាល់ទាត់ក្រុមយោធា បើកាលណាបែកបាក់ផ្ទៃក្នុងលទ្ធផលនឹងទៅជាយ៉ាងណា និងលើកយកសម្តីរបស់ **អាប្រាហាមលីនខូលន៍** Abraham Lincoln ថា A house devided against itself cannot stand **ផ្ទះមួយ ដែលធ្វើការប្រឆាំងបែងចែកខ្លួនឯង គឺស្តាល់តែវិនាសប៉ុណ្ណោះ។**

បញ្ជ្រាបហើយបញ្ជ្រាបទៀត អនុវត្តន៍អោយមើលម្តងហើយម្តងទៀត រហូតទាល់តែ គំនិតទស្សនៈនេះ វាបានចាក់ឬសយ៉ាងជ្រៅក្នុងខួរក្បាលរបស់ក្មេងៗពួកគេ។

ឥឡូវ ងាកមកនិយាយពីទំនាក់ទំនងរបស់អ្នក ជាមួយនឹងសាលារៀនរបស់អ្នកវិញ តើវាមានភាពស្និទ្ធស្នាលដល់កំរិតណាទៅ? សូមអង្គុយស្រមៃ៣០នាទី សាលានៅបឋមសិក្សា១០នាទី មធ្យមសិក្សា១០នាទី និងវិទ្យាល័យ១០នាទី មួយណានៃពួកវាដែលអ្នកមានភាពស្និទ្ធស្នាលជាងគេ មានមនោសញ្ចេតនាច្រើនជាមួយហើយអនុស្សាវរីយ៍អ្វីខ្លះដែលអ្នកនៅចងចាំ មិនអាចបំភ្លេចបានរហូតមកដល់សព្វថ្ងៃនេះ?

សព្វថ្ងៃនេះអាចនិយាយថាមិនហ៊ានអារកាត់បានទេ តែបើនៅជំនាន់វារៀនវិញ ចំពោះឥរិយាបថក្នុងការសិក្សា សូមនិយាយថា សកម្មភាពនៅសាលាស្ទើរតែគ្មានសោះ ក្រៅពីអ្វីដែលតំរូវដោយបទបញ្ជាផ្ទៃក្នុងរបស់សាលា និងការអង្គុយស្តាប់គ្រូពន្យល់មេរៀនរៀននៅម៉ោងរដ្ឋ រួចរៀនគួរបន្ថែមលើមុខវិជ្ជាសំខាន់ៗ ដើម្បីពង្រឹងសមត្ថភាពតែប៉ុណ្ណោះ ប៉ុន្តែនៅចាំបានថា សកម្មភាពសាលាតែ៣យ៉ាងគត់តាំងពីបឋមសិក្សា រហូតបញ្ចាប់ថ្នាក់វិទ្យាល័យ ដែលវាបានចូលរួមគឺ: ទី១. ការប្រលងសិស្សពូកែ ទី២. បុណ្យសាលា ទី៣. ពិធីដង្ហែរ**សព**ម្តាយរបស់នាយកសាលា។

អ្នកធ្លាប់គិតថានឹងធ្វើយ៉ាងណាអោយសាលារៀន និងថ្នាក់រៀនដែលអ្នកកំពុងរៀនមានផាកសុខភាព ភាពរស់រវើក ភាពសុខដុម និងការរីកចំរើនដែរឬទេ? បើសិនណាជាចំលើយឆ្លើយថាទេ នោះមិនបាច់សួរទៅ សិស្សច្បងដែលធ្លាប់រៀននៅសាលារបស់អ្នក និងសិស្សប្អូនដែល នឹងមករៀននៅសាលារបស់អ្នកថា ពួកគេធ្លាប់គិតនោះទេ។ **បើសិនណា អ្នកមិនយល់ថាសាលាដែលអ្នកកំពុងរៀនវាជាអណ្តូងរ៉ែ ដែល**

***មិនចេះរឹងស្អូតរបស់អ្នក ជារបស់កូនអ្នក ចៅអ្នក........នោះទេ ហើយ ធ្វើអោយមិត្តរួមថ្នាក់ រួមជំនាន់របស់អ្នកយល់ដូចអ្នកនោះទេ ពួកគេ នឹងមិនដឹងថាត្រូវធ្វើយ៉ាងណា ដើម្បីថែរក្សាវាអោយបានគង់វង្ស និងស៊ី តកូនតចៅនោះទេ។***

*វ័យកុមារ វ័យជំទង់ និងយុវវ័យ គឺជាវ័យដែលពួកយើងលូតលាស់ ទាំងរូបរាងកាយ និងចិត្តគំនិត ហើយវាកន្លងទៅឆាប់រហ័សណាស់ ហាក់ដូចជាផ្លេកបន្ទោរអញ្ចឹង វាផ្ទុយនឹងមជ្ឈិមវ័យ និងវ័យជរា ដែលជាវ័យស្មុគស្មាញ សំបូរដោយបញ្ហាដែលត្រូវដោះស្រាយ ទុំឌទ្រោម ហើយមាន រឺគ្មានសុភមង្គលអាស្រ័យនឹង អ្វីដែលគេបានសាង កាលពីការចាក់គ្រឹះដំបូងនៃជីវិតរបស់គេម្លេះ។ ត្រង់នេះ អាចបញ្ជាក់ថាពីវ័យកុមារ រហូតដល់យុវវ័យគឺសំខាន់ណាស់ ព្រោះវាអាចឆ្លុះបញ្ចាំងពីមជ្ឈិមវ័យ និងវ័យជរារបស់ពួកយើងបាន ដែលត្រង់នេះសុំផ្ដោតទៅលើ**ចំណោះដឹង** ហើយសួរថាចំណោះដឹងនេះពួកគេអាចរកបាននៅឯណា? អាចឆ្លើយបានថាគ្រប់ទីកន្លែង និងពេលវេលា ប៉ុន្តែកន្លែងសំខាន់ជាងគេបំផុតរបស់ពួកគេគឺ **សាលារៀនដែលចាត់ទុកថាជាផ្ទះទី២របស់ពួកគេ**។ ពាក្យផ្ទះមានន័យថា កន្លែងដែលយើងរស់ជាអចិន្ត្រៃយ៍ ចេញចូលញឹកញប់ បាយព្រឹក បាយថ្ងៃត្រង់ បាយល្ងាច ហើយមិនអាចខ្វះបាន តើកូនចៅខ្មែរសព្វថ្ងៃចាត់ទុក សាលារៀនជាផ្ទះរបស់ពួកគេហើយរឺនៅ? មានវិធីអាចធ្វើអោយពួកគេចាត់ទុកដូចនេះទេ?*

*សូមជួយគិតទាំងអស់គ្នាទៅមើល៉ គឺការមាន**កម្មវិធីកាន់តែច្រើន ការចូលរួមកាន់តែច្រើន ភាពស្និទ្ធស្នាលរវាងសិស្សនិងសាលាក៏កានតែជិតស្និទ្ធ** តើអាចនិយាយបានទេថាចំនួនសិស្សដែលស្អប់សាលា ព្រោះតែការធុញ នឹងកាលវិភាគដ៏ទៀតទាត់គ្មានការកំសាន្តអ្វីបន្តិចសោះនោះ ក៏អាចនឹងថយចុះផងដែរ ម្យ៉ាងសាលាគួរតែផ្ដល់អោយពួកគេនូវផាកសុកភាព ចំណោះដឹង ការលើកទឹកចិត្ត ការកំសាន្ត និងអនុស្សាវរីយ៍កុមារភាពដ៏ល្អមិនអាចបំភ្លេចបានទៅពួកគេ។ ទោះបីជានៅក្នុងខ្សែភាពយន្តក៏មានស្ថានភាពស៊ាំញ៉ាំ ឈុតកំសត់ស្រក់ទឹកភ្នែក ផ្ទុះសំណើចដែរ ឯនៅក្នុងកម្មវិធី*

ទូរទស្សន៍ក៏ដូចគ្នា តែងមានភ្ជាប់ការកំសាន្តខ្លីមួយ ដើម្បីសំរួលភាពតានតឹងរបស់អ្នកទស្សនាដែរ ដូចគ្នានឹងកម្មវិធីអប់រំយើងដែរ វាមានពេលកាលត្រូវលត់ដំ ត្រូវមមាញឹកនឹងកិច្ចការសាលា រឺរំលឹកមេរៀនសំរាប់ប្រលងផងដែរ តែហេតុអ្វីមិនមានពេលវេលាសំរាប់កំសាន្តសំរាប់ពួកគេទៅវិញ រឺមួយអ្នកយល់ថា**វិស្សមកាល**វាគ្រប់គ្រាន់ហើយសំរាប់ពួកគេ? ការគិតបែបនេះគឺវាខុសឆ្គងសម្បើមណាស់ ហើយវាគ្មានការផ្លាស់ប្តូរអ្វីទេ ថែមទាំងកាន់តែយ៉ាប់យឺនទៅទៀត។

មានកម្មវិធីជាច្រើនណាស់ ដែលពួកយើងអាចបង្កើតវាឡើង ហើយវាផ្តល់ផលប្រយោជន៍ដល់សិស្ស ជាពិសេសទាក់ទងនឹង ការងារសប្បុរសដើម្បីបង្រៀនចិត្តពួកគេអោយចេះជួយគ្នាតាំងពីតូចអោយហើយ ក៏អាចដូចជាការប្រកួតដែលនាំទៅរកការរីកចំរើន គឺជាអ្វីដែលជនជាតិយើង មិនសូវចូលចិត្តនោះទេគឺការប្រកួតប្រជែងនេះឯង តែបើប្រកួត គឺស៊ីសាច់ហុតឈាមគ្នាតែម្តង រឿងទាំងនេះវាអាចធ្វើបានជាឧទាហរណ៍: ការប្រកួតកីឡា ការប្រកួតគូរគំនូរ ការនិពន្ធរឿងអប់រំ ការបង្រៀនរបាំប្រពៃណី កម្មវិធីវៃអង្កៀសថវិកាសំរាប់ក្មេងកំព្រា.......................... ឯកម្មវិធីថ្មីមួយទៀត គឺការចែកជូនបទពិសោធន៍ និងចំណេះដឹងទូទៅរបស់រៀមច្បងទៅកាន់ប្អូនៗ និងការបន្សល់ទុកអនុស្សាវរីយ៍ល្អៗមុននឹង ពួកគេបញ្ចប់ការសិក្សាពីសាលាពួកគេ។

ជាការពិតណាស់ ដើម្បីដំណើរការកម្មវិធីអស់ទាំងនេះ វាទាមទារអោយមានសមាសភាពច្រើនណាស់ថវិកា ធនធានមនុស្សដែលទទួលខុសត្រូវចំពោះដំណើរការកម្មវិធីនីមួយៗ ការបំផុសអោយមានការចូលរួមពីសិក្សានុសិស្ស ដែលការពិតជាក់ស្តែងសាលានីមួយៗពិបាក ក្នុងការរៀបចំចាត់ចែងខ្លាំងណាស់ **ប៉ុន្តែវាមិនមែនជាទីបញ្ចប់នៅឡើយនោះទេ** A little bit wider **អោយវាទូលាយជាងនេះបន្តិចកូនប្រុស** ជាសម្តីរបស់គ្រូម្នាក់ គឺថាដំណោះស្រាយនឹងលេចឡើង គិតបន្តិចទៀត។ ឃ្លាមួយនេះល្អណាស់ **ទាំងអស់គ្នាដើម្បីទាំងអស់គ្នា** ការចូលរួមគឺសំខាន់ណាស់ ផ្តល់តែ

គំនិតទៅបានហើយ ទុកអ្វីៗអោយពួកគេធ្វើទាំងអស់ ទាំងពីការប្រមូលផ្តុំគ្នាបង្កើត ទាំងការចំណាយ ការរៀបចំ ការទទួលប្រយោជន៍។

មាន វាមិនអត់ទេអ្នកដែលរៀននៅសាលាមួយ រឺធ្វើការនៅស្ថាប័នមួយ រួច ហើយចង់ឃើញសាលា រឺស្ថាប័នរបស់ខ្លួនមានការរីកចំរើន និងស្រស់បំព្រងនោះ ប៉ុន្តែគេមិនដឹងថានឹងធ្វើយ៉ាងម៉េច? ហើយបើមានគំនិតនឹងធ្វើ ក៏មិនហ៊ានបញ្ចេញ ព្រោះខ្លាចថាវាមិនត្រូវ ខ្លាចគេសើច គ្មានអ្នកគាំទ្រ រួចក៏បំភ្លេចវាទៅវិញទៅ។ ដោយ ហេតុតែការខ្លាចថានឹងបំភ្លេចចោលឥតប្រយោជន៍នោះ ទើបនឹកឃើញចង់សរសេរ វាទុក ចែកជូនមិត្តយុវជនរួមជំនាន់ជាមួយគ្នា គ្រាន់នឹងជួយគិត វាគឺជាកម្មវិធីមួយ ត្រូវបានអោយឈ្មោះថា **១០០រៀលរំលែកក្តីស្រលាញ់** អនុវត្តន៍ត្រឹមថ្នាក់មធ្យមសិក្សា ចុះ ដែលនឹងរៀបរាប់លំអិត ដូចខាងក្រោម:

**គោលបំណង:** ១. ចេះធ្វើការងារជាក្រុម

២. ចេះជួយគ្នាទៅវិញទៅមក បងធំជួយប្អូនកណ្តាល ឋប្អូនកណ្តាលជួយប្អូនពៅ

៣. បង្កើតសាមគ្គីភាព តាមរយៈការចែករំលែក (ចំណេះ ដឹង បទពិសោធន៍ ក្តីស្រលាញ់..........)

**អ្នកចូលរួម:** នាយកសាលា គ្រូៗ សិស្ស (ពីបឋមរហូតដល់វិទ្យាល័យ)

**ថវិកាចំណាយ:** ម្នាក់ ១០០រៀលក្នុង១ថ្ងៃ នោះនឹង៣ ០០០រៀលក្នុង១ខែ ៤០នាក់ក្នុង១ថ្នាក់ នោះនឹង ១២០ ០០០រៀលក្នុង១ខែ ១២០ ០០០រៀល អាចរៀបចំកម្មវិធីជួបជុំ១បាន

**ដំណើរការ:** ***ក្រុម១.*** វិទ្យាល័យជួយពង្រឹងអនុវិទ្យាល័យ

x ថ្នាក់ទី១២ ជួយ ថ្នាក់ទី៩

x ថ្នាក់ទី១១ ជួយ ថ្នាក់ទី៨

x ថ្នាក់ទី១០ ជួយថ្នាក់ទី៧

ក្រុម២. អនុវិទ្យាល័យជួយពង្រឹងបឋមសិក្សា

x ថ្នាក់ទី៩ ជួយ ថ្នាក់ទី ៥ និង៦

x ថ្នាក់ទី៨ ជួយ ថ្នាក់ទី ៣ និង៤

x ថ្នាក់ទី៧ ជួយ ថ្នាក់ទី ២ និង១

ប្រធានបទសិក្សា:

សំរាប់ក្រុម១ (គ្រោះថ្នាក់ចរាចរណ៍ សីលធម៌សង្គម បរិស្ថាន បទពិសោធន៍ជីវិត បទពិសោធន៍សិក្សា……………..)

សំរាប់ក្រុម២ (សុជីវធម៌ អនាម័យខ្លួនប្រាណ សារ:នៃការធ្វើលំហាត់ប្រាណ គូរគំនូរ និទានរឿងកុមារ……….)

## តើនរណាគេនឹងចេញទៅធ្វើកម្មវិធីនេះអោយចេញជារូបរាងឡើង? តើគុណសម្បត្តិអ្វីខ្លះដែលគេម្នាក់នោះត្រូវមាន?

# *ប្រស្នា*



*ក្នុងសួនច្បារមួយមានផើងផ្កាដ៏ធំមួយ ដែលអាចបែងចែកជាផើងតូចៗចំនួន៥។ ជាទូទៅផើងតូចៗនោះអាចដាំកូនរុក្ខជាតិគ្រប់ប្រភេទបានចំនួន៣ដើម។ ម្ចាស់សួនច្បារបានសម្រេចចិត្តដាំ គ្រាប់សណ្តែកក្នុងផើងនីមួយៗ តែជាអកុសលនៅក្បែរនោះមានដើមឈើធំមួយ ដែលមានចាប២ក្បាលរស់នៅក្បែរនោះ ហើយចាំលួចស៊ីគ្រាប់សណ្តែកទាំងនោះ។ ចាបទី១គឺចាបស្រុក ហើយវាបានចុះទុំលើផើងចំនួន៣ដង ដែលរាល់ការចុះរបស់វាម្តង វាលេបគ្រាប់សណ្តែក១គ្រាប់ ហើយវាជុះចេញមកវិញនូវគ្រាប់ល្ពៅ១គ្រាប់ ចំណែកចាបទី២វិញគឺចាបព្រៃ វាបានចុះទុំចំនួន១ដង ដែលរាល់ការចុះរបស់វាម្តង វាលេបគ្រាប់សណ្តែក២គ្រាប់ ហើយវាជុះចេញមកវិញនូវគ្រាប់ត្រលាច២គ្រាប់។*

*លើសពីនេះទៅទៀត ម្ចាស់សួនច្បារមានចិញ្ចឹមឆ្មា២ក្បាល ហើយជាចៃដន្យពួកវាទាំង២ បានប្រលែងគ្នានៅក្បែរផើងផ្កានោះ ពួកវាបានធ្វើបែកផើងម្នាក់មួយ។ ផើងដែលបានបែកទី១ ជាផើងដែលចាបព្រៃបានទុំ ចំណែកផើងទី២ជាផើងដែលចាបស្រុកមិនបានទុំ។ សំនួរបានសួរថា តើមានដើមសណ្តែកប៉ុន្មានដើម នឹងដុះនៅរយះពេល២សប្តាហ៍ខាងមុខ?*

# សាកល្បងទេរបៀបរស់នៅបែបមនុស្សឆ្លាត

នេះជាលំដាប់លេខរៀងពី១ដល់១០ របស់ប្រទេសដែលមានជនឆ្នើមច្រើនជាងគេ:

១. ជ្វីប ២. អាល្លឺម៉ង់ ៣. ចក្រភពអង់គ្លេស
៤. សហរដ្ឋអាមេរិច ៥. បារាំង ៦. អូស្ត្រាលី
៧. ស៊ុយអ៊ែដ ៨. ស្វីស ៩. អ៊ីតាលី ១០. ហូឡង់។

ជនជាតិជ្វីប តែងតែទៅនៅលើគេជានិច្ចខាងបញ្ញាឆ្លាតវាងវៃ នេះមិនដឹងថាតំណពូជ ដែលអំណោយផលពីកំណើត ឬមួយក៏យ៉ាងណានោះទេ ដូចជាសត្វស្វាដែលវាមានបញ្ញា រវៀសរវៃជាងជ្រូកជាលក្ខណៈពីធម្មជាតិអញ្ចឹងដែរ។ ធ្លាប់លឺថាជនជាតិជ្វីបនេះ មានគោលិកាឈាមម្យ៉ាងនៅក្នុងខ្លួនរបស់ពួកគេ ដែលគោលិកាឈាមនេះហើយ ជាមូលហេតុនាំអោយពួកគេវៃឆ្លាតលើសពូជសាសន៍ដ៏ទៃទៀត។ មិនអាចឈ្វេងយល់អោយបានស៊ីជំរៅនោះទេ គ្រាន់តែសង្កេតបានខ្លះ(តិចតួចបំផុត) ពីមាយាទអត្តចរិតរបស់ជនជាតិដែលឆ្លាតជាងគេនេះ។ វាមានដូចខាងក្រោម:

<u>ស្នេហាជាតិ:</u> សម្ដីរបស់ប្រធានាធិបតីសហរដ្ឋអាមេរិចម្នាក់និយាយថា **ស្នេហាជាតិ គឺយើងឈរនៅខាងប្រទេសជាតិ មិនមែនឈរនៅខាងប្រធានាធិបតី រឺក៏មន្ត្រីរដ្ឋការសាធារណៈណាមួយនោះទេ** Patriotism means to stand by the country. It doesn't mean to stand by the president or any other public official (Theodore Roosevelt)។ បើសិនណាជាអ្នករស់នៅក្នុងផ្ទះមួយ ហើយអ្នកគ្រាន់តែជាសមាជិកម្នាក់ដែលចាំតែចំណាយ បំផ្លាញធនធាននៅក្នុងផ្ទះ មិនជួយថែរក្សាទ្រព្យសម្បត្តិ និងស្វែងរកចំណូលចូលផ្ទះនោះទេ តើគេចាត់ទុកអ្នកជាមនុស្សបែបណាទៅ? គ្រាន់តែបំពេញកាតព្វកិច្ចជាសមាជិកដ៏ល្អម្នាក់ក្នុងគ្រួសារ លំបាកឬ? ដូចជាមិនលំបាកទេ គឺត្រូវតែមានមោទន

ភាពដែលបានកើតមកក្នុងគ្រួសារបែបនេះ ហើយប្រាប់ពិភពលោកទៅថា អ្នកសុខព្រមទទួលស្គាល់ការពិត ហើយសប្បាយចិត្តនឹងរស់នៅជាមួយវា។



<u>**ទាញប្រយោជន៍ពីរបស់ជុំវិញខ្លួន:**</u> អ្វីដែលអ្នកគិតថាជាប្រយោជន៍គឺត្រូវតែប្រមូល ត្រូវតែច្នៃ ព្រោះភ្នែកអ្នកភ្លឺជាងអ្នកដ៏ទៃ។ សូមអ្នកមើលទៅអ្នកដែលមានភ្នែកភ្លឺទាំងឡាយទៅមើល ថាតើពួកគេរស់នៅដោយរបៀបណា? សុខស្រួលប៉ុនណាពីសភាវៈដែលនៅជុំវិញខ្លួនពួកគេ ជាពិសេសគឺថាមពល។ អាចយកល្បឿនទឹកហូរមកមើលទូរទស្សន៍បាន អាចយកល្បឿនខ្យល់មកបំភ្លឺអំពូលនៅក្នុងផ្ទះបាន តែពួកយើងវិញខុសពីពួកគេបន្តិច ត្រង់ថាទឹកដីយើងគ្មានល្បឿនខ្យល់មហិមាបោកបក់ទេ ហើយក៏គ្មានប្រភពទឹកហូរដ៏សម្បូរសំបើមអីនោះដែរ ប៉ុន្តែយើងមានព្រះអាទិត្យរបស់យើងមួយ ដែលវាមកបំភ្លឺជារៀងរាល់ថ្ងៃ។ សួរថាធ្លាប់លឺពាក្យ **ព្រះអាទិត្យគឺជាលុយទេ** sun is money នេះហើយជាធនធានដែលមិនចេះរីងស្ងួត ប្រើតកូនតចៅរបស់ពួកយើង។



***ពាក់នាឡិកា:*** ដូនតាយើងប្រើពាក្យ ***យើងត្រូវគ្រប់គ្រងពេលវេលា មិនមែនអនុញ្ញាតអោយពេលវេលាគ្រប់គ្រងពួកយើងទេ*** I must govern the clock, not to be governed by it ជំនួសពាក្យ ***ពេលវេលាគឺជាមាសប្រាក់*** Time is money ដែលវាហាក់ដូចជាដាក់កំហិតបន្តិច អោយពួកយើងមានការទទួលខុសត្រូវជាជាងការធ្វេសប្រហែសបណ្តែតបណ្តោយដែល ជាចរិតគួរអោយសរសើររបស់មនុស្សល្ងង់។ ដូច្នេះហើយទើបនៅនឹងដៃពួកយើងម្នាក់ៗ មាននាឡិកាគ្រប់ៗគ្នាពាក់តាំងពីក្មេងរហូតចាស់ស្លាប់ក៏មានការគោរពពេលវេលា ម៉ត់ណាម៉ត់ហ្នឹង ជាគុណសម្បត្តិដែលឪពុកម្តាយក្នុងគ្រួសារនីមួយៗបានបង្រៀន។





***ពិនិត្យរាល់អ្វីដែលអ្នកដឹទៃអោយ:*** តើអ្នកពេញចិត្តនឹងការបោកប្រាស់ទេ? បើមិនពេញចិត្តទេ ត្រូវប្រើការសង្កេតត្រួតពិនិត្យអោយមែនទែន ទើបអាចគ្រប់គ្រងស្ថានការណ៍ និងមិនងាយធ្លាក់ក្នុងអន្ទាក់នៃការកេងបន្លំដោយចេតនា ឬអចេតនាដោយប្រការណាមួយ។ អំណោយដែលបុគ្គលិកក្រុមហ៊ុនជូនទៅលោកប្រធានគេក្នុងថ្ងៃខួបកំណើត អាចកើតពីចេតនា២យ៉ាង: ១.អបអរសាទរ និងរិតបន្តឹងចំណងមិត្តភាពការងារអោយកាន់តែស្អិតរមួត ២. អោយលោកប្រធានស្រលាញ់ចូលចិត្ត និងជួយការពារខ្លួនពេលប្រព្រឹត្តកំហុស។ ក្រោយពេលទិញរបស់របរ សូមកុំភ្លេចអោយសោះនូវវិក័យប័ត្រ ទឹកប្រាក់ដែលចំណាយនោះ ខ្វះរឺលើសឬយ៉ាងណាយើងត្រូវតែដឹងអោយខានតែបាន វាជាការប្រកាន់ចរិតប្រាកដនិយម និងភ្លឺស្វាងមួយ។







**<u>មិនចង់លឺពាក្យសុំទោស:</u>** សូមវិនិច្ឆ័យទៅលើពាក្យ "កំហុស" និង"សុំទោស" ថាតើពួកវាមានទំនាក់ទំនងគ្នាយ៉ាងណា? អ្នកនឹងមិនប្រើពាក្យសុំទោសទេ បើសិនណាអ្នកបញ្ចៀសរាល់កំហុសទាំងឡាយបាន។ ប៉ាមិនចង់បានពាក្យសុំទោសរបស់កូនទេ កូនដឹងថាហេតុអ្វីទេ? ព្រោះប៉ាចង់អោយកូនគិតសារឡើងវិញ ពីមូលហេតុដែលនាំអោយកូនប្រព្រឹត្តកំហុសនោះ ប្រុងប្រៀបអោយរួចជាស្រេចមុននឹងធ្វើកិច្ចការអ្វីមួយ ហើយប្រើពាក្យសុំទោសអោយបានអប្បបរិមា នៅពេលកូនបំពេញការងារ ព្រោះវាជាគន្លឹះនាំទៅរកការរីកចំរើន។







**<u>សង្ស័យរាល់ការសន្យាទាំងអស់:</u>** ពាក្យសន្យាគឺគ្រាន់តែជាសម្តី ដែលអាចចេញពីមាត់មនុស្សគ្រប់ៗរូប ណាម្យ៉ាងវាមិនអាចកំណត់នូវទំហំនៃភាពជាក់លាក់ និងប្រាកដប្រជាបាននោះទេ មិនដឹងថារវាងការសន្យាជាមួយពាក្យសម្បថ និងការសន្យាជាមួយសាក្សីជាច្រើននាក់ មួយណាគួរទុកចិត្តជាងឡើយ។ អ្នកអាចសន្យា ខ្ញុំក៏អាច

សន្យា ព្រោះថាវាជាលទ្ធភាពចុងក្រោយក្នុងការទាញយកទំនុកចិត្តពីនរណាម្នាក់ អោយគេដឹងលឺថា អ្វីដែលបានរ៉ាយរ៉ាប់នៅក្នុងសន្យានោះគឺសុទ្ធតែជាការពិត។ ធ្វើដូចនេះហើយ ទើបសមត្ថភាពពិចារណាថ្លឹងថ្លែងចេះតែកើនឡើងជាលំដាប់ ដែលវាញ៉ាំងអោយប្រសិទ្ធិភាពក្នុងការសំរេចចិត្តលើរឿងហេតុអ្វីមួយកាន់តែច្បាស់លាស់។






<u>***ហាមាត់លើកដៃ:***</u> ការប្រាស្រ័យទាក់ទងគ្នាគឺសំខាន់ណាស់នៅក្នុងការរស់នៅរបស់យើងម្នាក់ៗ អ្នកនិយាយប្រាប់ពីរឿងនេះមកខ្ញុំ រខ្ញុំនិយាយពីរឿងនោះប្រាប់អ្នកវិញ។ សួរថាមធ្យោបាយផ្លាស់ប្តូរ រឺផ្ទេរចំណេះដឹង និងពត៌មានអោយគ្នានោះវាប្រព្រឹត្តទៅដោយរបៀបណាទើបជាការល្អ? តាមការសរសេរផ្ញើរសារអោយគ្នា ការនិយាយគ្នាតាមទូរស័ព្ទ ការនិយាយគ្នាតាមបណ្តាញអ៊ីនធឺណេត រឺមួយក៏ជាការជួបផ្ទាល់និយាយទល់មុខគ្នា។ គ្មានអ្វីប្រសើរជាការជួបផ្ទាល់នោះទេ ដោយសារថាវាអាចបញ្ជាក់បន្ថែមទៅលើអត្ថន័យរបស់គូភាគីសន្ទនារបស់យើង តាមរយ:ភាសាកាយវិការរបស់គេដែលវាឆ្លុះបញ្ចាំងចូលជ្រៅទៅក្នុងបេះដូងរបស់គេថាពិត រឺមួយជាការប្រឌិត។ ដូច្នេះហើយទើបពួកយើងផ្តោតខ្លាំងទៅលើភាសាកាយវិការ កូនទាំងប្រុសស្រីរបស់យើងមួយណាក៏ដោយក៏ត្រូវតែចេះវាដែរ។






***មិនជាអ្នកគិត១ម៉ែត្រ រឺ២ម៉ែត្រទៅមុខ:*** *បើអ្នកសួរទៅកាន់ជាងកាត់សក់ណាម្នាក់នៅក្នុងតំបន់ដែលអ្នកកំពុងរស់នៅថា តើហេតុអ្វីបានជាជនជាតិថ្វីបសព្វថ្ងៃគេនាំគ្នាបង្កើតកូនច្រើនម្ល៉េះក្នុងគ្រួសារនីមួយៗ? ជាងម្នាក់នោះនឹងឆ្លើយមកកាន់អ្នកវិញជាមួយនឹងកាយវិការ ដោយយកដៃចង្អុលក្បាលខ្លួនឯង រួចនិយាយថាជនជាតិថ្វីបពួកគេមិនគិតត្រឹមតែ១ម៉ែត្រ រឺ២ម៉ែត្រទៅមុខនោះទេ។*






***មិនអនុញ្ញាតអោយភាពទន់ភ្លន់បំផ្លាញ:*** *អ្វីទៅជាភាពទន់ភ្លន់? ឥទ្ធិពលរបស់វាយ៉ាងណាដែរទៅ? គ្រោះថ្នាក់ដែររឺអត់? សត្វតោ និងខ្លា ដែលជាពូជអ្នកប្រមាញ់យ៉ាងសាហាវ តែមានបានមើលឃើញភាពទន់ភ្លន់របស់ពួកវា ពេលប្រលែងលេងជាមួយកូនៗដែររឺទេ? ស្និទ្ធស្នាល ស្លូតបូត ពោរពេញដោយក្តីស្រលាញ់។ ថាៗទៅគ្រប់តែប្រភេទសត្វទាំងអស់ហ្នឹង សុទ្ធតែមានភាពទន់ភ្លន់រៀងៗខ្លួន ដែលវាសម្តែងឡើងទៅតាមបែបបទ ពូជអំបូររបស់វា ណាតួយ៉ាងសត្វមនុស្សក៏អញ្ចឹងដែរ ស្បែកសស្បែកខ្មៅ ធូរធារ ក្រលំបាក ឆ្លាត រឺក៏ល្ងង់ សុទ្ធតែមានភាពទន់ភ្លន់របស់ខ្លួនទាំងអស់។ សូមសំគាល់ ជាពិសេសមនុស្សស្រីទាក់ទាញខ្លាំងណាស់ ហើយសូមប្រាប់ទៅសុភាពនារីទាំងអស់ផងថា ភាពទន់ភ្លន់អ្នក អាចរំលើងភ្នំមួយអោយរលំបានណា តែសូមអោយភាពទន់ភ្លន់នោះមិនមែនជាការងរង៉ក់ម៉ិកម៉ក់នោះទេ។ សំរាប់មនុស្ស ភាពទន់ភ្លន់អាចជាការសំដែង រឺលក្ខណ:ពីធម្មជាតិមកតែម្តង។*

១. ***បើជាការសំដែង:*** *វាអាចបង្កគ្រោះថ្នាក់ ផ្តល់ផលជាអវិជ្ជមានបាន ព្រោះវាបង្កប់នូវចេតនាមួយរួចជាស្រេច។* ២. ***បើជាលក្ខណៈធម្មជាតិ:*** *គឺគួរអោយស្រលាញ់ចូលចិត្តណាស់ តែសូមលើកចំណុចអាក្រក់បន្តិចទៅចុះ គឺថាជួនកាលវាទន់ភ្លន់រហូតក្លាយទៅជាទន់ជ្រាយងាយនឹងធ្វើបាបឥតកើតការទៅវិញ។*





***<u>ប្រាក់គ្រាអាសន្ន:</u>*** *អ្នកដឹងទេថា**អ្វីៗអាចផ្លាស់ប្តូរសូម្បីតែ១នាទី** ដូច្នេះហើយអ្នកត្រូវប្រុងប្រៀបខ្លួនអោយរួចជាស្រេច សម្រាប់ប្រឈមមុខនឹងព្យុះភ្លៀង ដែលនឹងបក់បោកមកដល់អ្នកនៅថ្ងៃណាមួយនោះ។ នេះវាគ្រាន់តែជាតម្រា តកូនតចៅអោយចេះប្រយ័ត្នប្រយែងនៅក្នុងការរស់នៅ ជាពិសេសការប្រកបរបរចិញ្ចឹមជីវិត ដែលមានពាក្យ២ឃ្លាសម្រាប់ទុកអោយគិត **ធ្វើ រឺក៏ស្លាប់*** **Do it or you die និងធ្វើ រឺក៏ចាញ់ Do it or you lose**។ ***ស្លាប់*** *ហើយនឹង**ចាញ់** មានន័យខុសគ្នា បើអ្នកចាញ់អ្នកនៅមានជីវិតបន្តធ្វើសារជាថ្មីម្តងទៀតនៅថ្ងៃក្រោយ ប៉ុន្តែបើអ្នកស្លាប់ ឱកាសលែងមានទៀតហើយ។ ប្រទេសជាតិ ក្រសួងមន្ទីរ សាលារៀន ក្រុមហ៊ុនសហគ្រាស រោងចក្រ គ្រួសារ បុគ្គលផ្ទាល់ខ្លួនចំបាច់ត្រូវមាន**គណនីគ្រាអាសន្ន១** ព្រោះវិបត្តិជាយថាហេតុនឹងដើរមករកពួកគេនៅថ្ងៃណាមួយជាមិនខាន។* ***ចូរកុំពឹងអ្នកដទៃទេនូវអ្វីដែលយើងអាចធ្វើដោយខ្លួនឯងបាន។***



***ប្រើពាក្យក្បាល និងអត់ខួរ:*** តើគ្រួសាររបស់កូនមានសមាជិកប៉ុន្មានក្បាល? ជំនួសអោយ តើគ្រួសារកូនមានសមាជិកប៉ុន្មាននាក់? ជាសំណួរដែលអ្នកគ្រូៗ បង្រៀននៅមត្តេយ្យសិក្សា សួរទៅកាន់កូនសិស្សនៅថ្ងៃ ពួកគេចូលថ្នាក់រៀននៅថ្ងៃដំបូង។ មនុស្ស គឺក្បាល ដូច្នេះមុននឹងកូនធ្វើសកម្មភាពអ្វីក៏ដោយ ចូរកុំភ្លេចយកក្បាលកូនទៅប្រើអោយសោះ។ មានជាការអនុវត្តន៍ជាក់ស្តែង ដោយកាត់សក់ខ្លីៗ អោយពួកគេដឹងថា គ្មានអ្វីនៅខាងលើនោះក្រៅពីក្បាលនោះទេ។ មួយវិញទៀត យើងយល់ស្រប ទាំងអស់គ្នាថា អាចប្រើពាក្យ**អត់ខួរ**បានជាទូទៅដូចជាពាក្យសួស្តីអញ្ចឹងដែរ នៅក្នុងសង្គមរស់នៅ ចាស់និយាយទៅក្មេង រឺក៏ក្មេងនិយាយទៅចាស់។ ជាឧទាហរណ៍ ពេលដែលកូនធ្វើកិច្ចការអ្វីមួយមិនល្អ ក្រោយពីការពន្យល់ណែនាំយ៉ាងលំអិតហើយនោះ ឪពុកម្តាយតែងនិយាយ កូនអត់មានខួរទេអី បានជារឿងប៉ុនហ្នឹងធ្វើមិនបានដែរ បកមកវិញ នៅពេលដែលកូនរត់ទៅសួរឪពុកម្តាយវា ពីមេរៀនដែលខ្លួនរៀនពីសាលាទាក់ទងនឹងអាជីពរបស់ឪពុកម្តាយខ្លួន រួចពួកគាត់មិនអាចឆ្លើយបាន កូនក៏ប្រើពាក្យថា ម៉ាក់ប៉ាអត់ខួរទេអី គ្រាន់តែសំណួរប៉ុនហ្នឹងឆ្លើយមិនបាន។ ដុតរោលខ្លាំងណាស់ ពាក្យ**អត់ខួរ**នេះ ជាការរំលឹកដាស់តឿនមួយ អោយត្រិះរិះពិចារណាអោយ

បានម៉ត់ចត់ជាមុនសិន មុននឹងចាប់ធ្វើកិច្ចការអ្វីមួយ រួចបើខ្លួនមិនចេះត្រូវតែប្រឹងរៀន ស្វែងយល់ ព្រោះខ្លួនក៏មានខួរដែរ។





**__យើងចេះអី កូនយើងចេះដែរ:__** អ្នកទំលាប់ដែររឺទេ នាំកូនទៅកន្លែងដែលអ្នកធ្វើការ នៅថ្ងៃឈប់សម្រាក ប្រាប់ពីនេះពីនោះ ធ្វើបទបង្ហាញពីកិច្ចការដែលអ្នកធ្វើប្រចាំថ្ងៃ រឺមួយក៏បង្រៀនពីអ្វី ដែលពួកគេចង់ចេះចង់ដឹងរឺយ៉ាងណា។ មួយទៀត ញឹកញាប់ទេ នាំគេទៅជាមួយពេលដែលអ្នកទៅធនាគារ ភោជនីយដ្ឋាន ផ្សារ.......ជាកន្លែងដែលអ្នកនិយមទៅ ពន្យល់ប្រាប់ពួកគេពីលក្ខណ:កន្លែងនីមួយៗ និងលើកទឹកចិត្តអោយពួកគេសួរ។ ការធ្វើបែបនេះ វាបង្កអោយពួកគេស៊ាំ និងមិនខ្លាចគេខ្លាចឯងពេលពួកគេចេញក្រៅផ្ទះ ព្រោះអ្វីៗគេបានដឹងស្គាល់រួចអស់ទៅហើយ។ បើម៉ែទៅផ្សារទិញម្ហូប កូនស្រីត្រូវទៅជាមួយម៉ែ បើពុកជាកសិករ កូនត្រូវតែចេះបើកត្រាក់ទ័រ បើពុកជាគ្រូពេទ្យ ហោចណាស់កូនត្រូវតែចេះចាក់ថ្នាំ។




***<u>យើងគណនាគ្រប់ពេល:</u>*** ខុសដែរវឺទេបើយើងសូត្រមេលេខនៅពេលយើងហាត់កីឡា ដូតទឹក ធ្វើម្ហូប? គណនាទើបដឹងចំនួនពិត ដូច្នេះមិនត្រូវរស់នៅខ្វះទំលាប់គណនាឡើយ។ គណនាអ្វីទៅ? អាចនិយាយបាន ដូចជាចំណូល ចំណាយប្រចាំថ្ងៃរបស់ខ្លួនជាដើម។ គ្មានក្មេងណាម្នាក់ដែលមិនត្រូវបានប្រាប់អោយសូត្រមេលេខនៅពេលគេដើរទៅរៀន និងត្រឡប់មកពីរៀនវិញនោះទេ។








នៅមានច្រើនទៀត មិនអាចរៀបរាប់អស់ទេ ទុកចាំសរសេរលំអិតនៅថ្ងៃក្រោយចុះ តែសូមសរសេរសង្ខេបអោយយកទៅពិចារណាបន្តិចចុះ ៖៖៖

១. មិនបោះអ្វីមួយចោល ដោយវាគ្រាន់តែជាការសំរេចចិត្តផ្ទាល់ខ្លួនទេ

២. សូម្បីតែកំហុសតូចតាចក៏ដោយ ក៏ត្រូវអោយពិភពលោកដឹងដែរ

៣. ខ្ញុំមានកាលវិភាគថ្ងៃស្អែកសម្រាប់អ្នក ចុះអ្នកវិញមានសម្រាប់ខ្លួនឯងហើយឬនៅ?

៤. ប្រាប់ខ្ញុំមកថាអ្នកមិនអាច វឺមួយអ្នកមិនយកចិត្តទុកដាក់

៥. ពេលប៉ាឃើញកូនធ្វើការយឺត ប៉ាយំ

៦. ប្រយ័ត្នពេលលឺពាក្យថា "**កុំភ្លេច**"

៧. ស្ទើរតែល្អឥតខ្ចោះ ប្រសើរជាងល្អឥតខ្ចោះ

៨. កុំធ្វើ២ដងនៅកន្លែងដដែលអោយសោះ
៩. មិនបារម្មណ៍ពីកំហុស ប៉ុន្តែបរិមាណ និងគុណភាព
១០. ត្រូវតែស្អាត់ជំនាញលើការងារដែលកំពុងធ្វើ
១១. ខ្លាចចូលធ្វើការយឺត និងចេញពីធ្វើការមុនម៉ោង
១២. អោយបាយស៊ីព្រោះចង់ប្រើ
១៣. បើថ្ងៃស្អែកអ្នករវល់ ខ្ញុំនឹងរង់ចាំរហូតដល់ថ្ងៃអ្នកទំនេរ
១៤. មកធ្វើការ គឺត្រូវធ្វើរហូតការងារត្រូវបានបញ្ចប់ មិនមែនបញ្ចប់មុនការងារនោះទេ
១៥. ភ្លេចមិនមែនជាបញ្ហាទេ
១៦. បើសិនគ្មានលំហាត់ទេអោយកូនយើងដោះស្រាយអី
១៧. ខ្ញុំស្រែក អ្នកស្រែក ខ្ញុំនិយាយ
១៨. ស្អប់អ្នកចេះនិយាយដើម តែចូលចិត្តអ្នកចេះរិះគន់
១៩. សួរខ្លួនអ្នកថា តើអ្នកមានការទទួលខុសត្រូវពេញលេញ ចំពោះឯកសណ្ឋានដែលអ្នកកំពុងពាក់ហើយឬនៅ?
២០. អ្នកជាល្អទេ? បើអញ្ចឹងធ្វើការងារនេះទៅ

# <u>ចុតហ្មាយ</u>



“ទោះបីជាខ្ញុំអាយុ៥៨ឆ្នាំហើយក៏ដោយ
ក៏ពេលដែលខ្ញុំកាន់ប៊ិចសរសេរដៃឆ្វេង អក្សរខ្ញុំ
ដូចក្មេងអាយុ៦ឆ្នាំ ទើបនឹងរៀនសរសេរអញ្ចឹង”









# ប្អូនខ្ញុំមានសំណួរហើយ



មិនដឹងថាឃ្លាប្រយោគនេះមិត្តទាំងអស់គ្នាធ្លាប់លឺ រឺក៏អត់ទេ គឺថាធ្លាប់បានមិត្តម្នាក់ប្រាប់ថា **រាល់ចំលើយ គឺសុទ្ធតែមានសំណួរ តែរាល់សំណួរមិនមែនសុទ្ធតែមានចំលើយនោះទេ។** គិតៗទៅម្យ៉ាងដែរសាកល្បងដោយខ្លួនឯងទៅទើបដឹងច្បាស់នូវសំណួរលំបាកៗឥតទំនងមួយចំនួនដូចយ៉ាង: តើផែនដីពីដំបូងឡើយកើតមកពីអ្វី? តើហេតុអ្វីបានជាមនុស្សមាន២ភេទ ប្រុស និងស្រី?

ត្រង់នេះហើយ ចង់ផ្តោតលើសភាវគតិរបស់ក្មេងៗដែលពួកវាពូកែសួរជាខ្លាំង សួរហើយសួរទៀត សួរដដែលៗ គួរអោយធុញណាស់។ ជាការពិតទេដែល **ទារកមួយដែលកើតមកជាមួយនឹងបញ្ញា និងចំណេះដឹង តែងស្តាយមកជាមួយសំណួររាប់រយពាន់នៅក្នុងក្បាលដែលមានខួររបស់គេ។** សូមកុំសួរនរណាគេផ្សេងអីថាតើហេតុអ្វីបានជាពួកយើងសួរ ច្បាស់ណាស់មកពីឆ្ងល់ ចុះកូនតូចៗទាំងនោះវិញក៏មិនខុសគ្នាប៉ុន្មានដែរ ដូច្នេះកុំខ្ជិលអីនឹងឆ្លើយនោះ បើខ្ជិលកុំបង្កើតពួកវាមកធុញណាស់សួរនេះសួរ។

មានធ្វើការសង្កេតទេថា សឹងគ្រប់ៗគ្រូទាំងអស់ តែងនិយាយយ៉ាងមត់គត់ក្រោយពេលពន្យល់មេរៀនអស់ពេលយ៉ាងយូរថា **បើពួកយើងមានសំណួរ សូមសួរមក គ្រូត្រៀមខ្លួនរួចជាស្រេចហើយដើម្បីឆ្លើយ** ស្តាប់មើលទៅគាត់ហាក់បីដូចជាដឹងច្បាស់ និងត្រៀមខ្លួនជាមុន សំរាប់តបនូវចំងល់របស់សិស្សៗរបស់គាត់អញ្ចឹងតើយើងគួរតែ ប្រាប់ទៅកាន់ឪពុកម្តាយទាំងឡាយដែររឺអត់ថា ជាភារកាតព្វកិច្ចរបស់ពួកគាត់ ដោយលឺគ្រប់គ្នាហើយថា ឪពុកម្តាយជាគ្រូទី១របស់កូនៗនោះអី។

បើគិតៗទៅ **អ្នកដែលពូកែ និងឧស្សាហ៍សួរ គឺវាឆ្លុះបញ្ចាំងពីនិស្ស័យនៃការស្អប់ភាពល្ងង់ខ្លៅអញ្ចឹងដែរ។** ជាការល្អដែររឺយ៉ាងណា បើពួកយើងនាំគ្នាបណ្តុះកូនៗប្អូនៗរបស់ពួកយើង អោយក្លាយជា**អ្នកសួរ**? ″សំណួរកើតឡើងកាន់តែច្រើន ចម្ងល់

ប៉ុណ្ណោះដែរត្រូវបានកំទេចចោល ហើយជំនួសមកវិញនូវ **ចំណេះដឹង**ដែលជាទំម្ងន់ដែលពួកយើងចង់បានអោយវាមាននៅក្នុងក្បាលរបស់កូនៗរបស់ពួកយើង”។ ប៉ុន្តែអ្វីដែលពួកយើងត្រូវប្រយ័ត្ន និងត្រូវចងចាំជានិច្ច គឺសូមកុំព្យាយាមឆ្លើយនូវរាល់សំណួរណា ដែលខ្លួនឯងមិនចេះ មិនយល់ មិនច្បាស់ មិនអាចឆ្លើយអោយសោះ ព្រោះអ្នកអាចនឹង ***យកទឹកខ្មៅ ដែលគ្មានប្រយោជន៍របស់អ្នក ទៅចាក់អោយប្រលាក់លើក្រដាសសរបស់ពួកគេបាន***។ ចំលើយរបស់អ្នកអាចជាលេស ហើយលេសនោះនឹងក្លាយជាបញ្ហាក្លែងក្លាយ ដែលជាទំងន់ដល់ក្បាលរបស់កូនអ្នក យូរទៅយូរមកពេញមួយជីវិតរបស់គេបាន។

មូលហេតុអីៗ!!! បានជាក្មេងៗពួកយើង ពុំមានទំលាប់ជាអ្នកចំណាប់ខាងសួរ? ដេញដោលចង់ដឹងពីនេះពីនោះ រហូតទាល់តែពួកគេទទួលបានចម្លើយដែលពួកគេយល់ថាតក្កអាចទទួលយកបាន។ សូមងាកមើលប្រភពទាំង៣ដែលជាកន្លែងគូសវាសអត្តចរិត និស្ស័យ ចំណេះដឹង របស់ពួកគេដែលរួមមាន ក្រុមគ្រួសារ សាលារៀន និងសង្គមដែលពួកគេរស់នៅ ដោយញែកម្តងមួយៗ ដូចខាងក្រោម៖

១. ក្រុមគ្រួសារ: ដំបូងមើលទៅលើ**ចំណេះដឹងរបស់ឪពុកម្តាយ**សិន ខ្ពង់ខ្ពស់រឺអត់ហ្នឹង? អាចប្រាប់កូនគាត់អោយយល់ដឹងពីបញ្ហាគ្រោះថ្នាក់ចរាចរណ៍បានរឺយ៉ាងណា បើសិនជាពួកគាត់ មិនស្គាល់ផ្លាកសញ្ញាចរាចរណ៍បានលើសពី១០ផងហ្នឹង។ ជាបន្ទាប់មកទៀតគឺ **ឥរិយាបថក្នុងការរស់នៅ**របស់ពួកគាត់ មិនសូវនាំកូនជជែកពីប្រធានបទ ដូចយ៉ាងនិទានរឿងអប់រំដូចបណ្តាប្រទេសអភិវឌ្ឍន៍គេធ្វើ រៀបរាប់ពីផលអាក្រក់នៃគ្រឿងញៀន រឺការមិនបានទទួលការអប់រំជាដើម ដែលនាំអោយកើតបញ្ហាដល់កូនៗទេ តែបែរជានិយាយដើមអ្នកដ៏ទៃ អោយកូនស្តាប់ទៅវិញហើយ បើកូនហ៊ានលូកមាត់សួរ តែងត្រូវបានគំហកមកវិញភ្លាម ឯងនៅតូចណាស់កុំចេះនិយាដើមគេអី គិតតែពីខំរៀនទៅ ខំយ៉ាងម៉េចទៅម៉ែ? ឈប់បន្តិចសិន រួចឆ្លើយ ខំរៀនដូច ខំមើលសៀវភៅអីនឹងណា។ ***អាងមិតអោយអាខ្វាក់ដឹកដៃ ច្បាស់ជានាំចូល***

**ព្រៃទាំងអស់គ្នា** មិនចេះមិនដឹងទេ តែបង្គាប់អោយគេធ្វើ អ្នកម្តាយអើយអ្នកម្តាយ ព្រោះតែអ្នកម្តាយទើបកូនពូកែដល់ថ្នាក់មិនចេះសួរបែបនេះ កូនសូមអរគុណហើយ តែកុំបន្តធ្វើបែបនេះដាក់ចៅទៀតអី ទុកអោយពួកគេរុងរឿងផង។

២. សាលារៀន: កន្លែងផ្តល់ចំនេះដឹងប្រចាំកាយនិងជំនាញសំរាប់ចិញ្ចឹមជីវិត របស់កូនៗពួកយើង។ តួអង្គសំខាន់នៅកន្លែងនេះគឺនរណាគេ? សូមឆ្លើយថាលោកគ្រូ អ្នកគ្រូនោះឯង ដែលជាឬស្សីដែលសំបូរដោយ បន្លាររញ៉េរញ៉ៃពាសជុំជិតទំពាំងតូចៗ អោយពួកវាលូតលាស់បានត្រង់ល្អ រឹងមាំ និងការពារកុំអោយគេអាចលូកកាត់យកទៅស្លបាន។ អាជីពនេះ វាសំបូរណាស់ទៅដោយទឹកចិត្តដ៏ពិតប្រាកដ ក្នុងការចែករំលែកចំណេះដឹង ដែលចាត់ទុកចំណូលបានពីអាជីពនេះគឺជារឿងទី២ប៉ុណ្ណោះ។ ចាំទុកថា **ការដាក់សម្ពាធគ្រប់រូបភាពគឺមិនត្រូវមានជាដាច់ខាត** ព្រោះវាជះឥទ្ធិពលអាក្រក់សម្បើមណាស់ដល់បរិយាកាសសិក្សា គ្មានការបញ្ចេញមតិ គ្មានកិច្ចសហប្រតិបត្តិការល្អឡើយ ជាឧទាហរណ៍ បើសិនជាគ្រូចាត់ទុកខ្លួនឯងជាតួឯកនៅក្នុងថ្នាក់ ហើយព្យាយាមផ្សាយពាណិជ្ជកម្មខ្លួនឯង ដោយប្រាប់ពីសញ្ញាប័ត្រដែលខ្លួនមាន សាលាល្បីៗនៅក្រៅប្រទេសដែលខ្លួនធ្លាប់រៀន ស្ថាប័នដែលខ្លួនកំពុងបំពេញការងារ ជាជាង **ការដាក់ខ្លួនមកជាមិត្តរបស់សិស្ស** ដើម្បីបង្កភាពស្និទ្ធស្នាលវាធ្វើអោយសិស្សានុសិស្សទទួលអារម្មណ៍សេរី ក្នុងការជជែក ចោទសួរ និយាយលេងសើច ដូចបងដូចប្អូនក្នុងក្របខ័ណ្ឌនៃការផ្លាស់ប្តូរចំណេះដឹងគ្នាអោយគ្នាទៅវិញទៅមក ដែលពួកគ្រូៗនៅបញ្ចឹមប្រទេសតែងនិយាយថា **យើងរៀនពីរបៀបនៃការបង្រៀន ឯពួកអ្នកវិញរៀនពីរបៀបដែលត្រូវបានគេបង្រៀន ពួកយើងគឺកំពុងរៀនទាំងអស់គ្នា** ដូច្នេះសូមកុំខ្លាចក្នុងការបញ្ចេញរាល់មតិយោបល់របស់អ្នកអោយសោះ ពួកយើងក៏កំពុងតែរៀនពីអ្នកដែរ និងរាល់កំហុសគ្រប់យ៉ាងត្រូវបានលើកលែង។ សិស្សចេះសួរច្រើនត្រូវបានចាត់ទុកថាជាសិស្ស តាមផ្ចាញ់ផ្ចាលគ្រូ ចង់បំបាក់មុខគ្រូ ដែលជាគំនិតអគតិបំបាក់គំនិតសិស្ស ដែលវាវៀងវៃក្នុងការសួរដើម្បីបង្កើនចំណេះដឹងរបស់វា ទៅជាស្ងៀម

ស្ងាត់អត់មាត់អត់ក ស្តាប់ចេះតែស្តាប់ទៅ សួរក៏សួរតិចមិនហ៊ានសួរលះអស់ពីចិត្ត ខ្លាចគ្រូចាំមុខ ប្រវត្តិសិក្សានឹងអភ័ព្វជាក់ជាមិនខាន។

៣. សង្គម: វាជាកន្លែងដែលសិស្សជួបផ្ទាល់ ញឹកញប់ជាងកន្លែងណាៗទាំងអស់ ក្រុមមិត្តភ័ក្រ្តផ្ទាល់ខ្លួន និងរួមជំនាន់របស់គេ ក្រុមមនុស្សនៅក្នុងសង្គមដូចជា ចាស់ៗព្រឹទ្ធាចារ្យ ក្នុងភូមិស្រុកដែលពួកគេរស់នៅ និងប្រាស្រ័យទាក់ទងជាមួយ ដែលជាពិសេស ពពួកមនុស្សដែលជះឥទ្ធិពលនៅក្នុងសង្គម ហើយឥទ្ធិពលនោះ វាគ្របដណ្តប់ការគិត ការពិចារណារបស់មនុស្សជាទូទៅនៅក្នុងសង្គម ដែលមាន និស្ស័យជាអ្នករងសម្ពាធ។ បើសិនណាជាមិត្ត គឺអាចសួរគ្នាបានយ៉ាងងាយ ប៉ុន្តែមិន ដឹងថានិយមនាំគ្នាជជែកពីរឿងអ្វីនោះទេ ដែល**ការជជែកដែលមានប្រសិទ្ធិភាពត្រូវ គោរពលក្ខខ័ណ្ឌពាយ៉ាង: ទី១.មានគោលបំណងក្នុងការជជែក ទី២. មានសីលធម៌ និង ទី៣. កើតចេញជាប្រយោជន៍**។ ហើយបើគេលឺការជជែករបស់មនុស្សម្នាផ្សេងៗ នៅតាមទីសាធារណៈផ្សេងៗវិញ គឺជាប្រធានបទដែលទាក់ទងនឹងការសិក្សា ការងារ បញ្ហាគ្រួសារ បញ្ហាសង្គម ដែលភាគច្រើនបង្ហួមអោយខ្លីគឺវាជៀសមិនផុតពីរឿង ផ្ទាល់របស់គូសន្ទនាទាំងនោះ រឺទាំងរ៉ូងនោះទេ ជាហេតុនាំអោយយើងនិយាយបានថា **គេងាយនឹងរកណាស់អ្នកដែលនិយាយបាន២ ទៅ៣ម៉ោង ពីខ្លួនឯងដោយមិនចេះហត់ តែគេពិបាកស្វែងរកអ្នកស្តាប់អោយបានច្រើន ដែលមិនចេះធុញ នឹងអ្នកនិយាយ ប្រភេទនេះណាស់**។ សូមសួរទៅមើល៎!! ថាគួរចាប់សួរពីកន្លែងណាទៅ ហើយចំលើយ ដែលរំពឹងទុកនោះអាចកើតជាផ្លែ ជាផ្កាវឺយ៉ាងណា? ទាំងនេះហើយសុទ្ធតែជាមូល ហេតុនាំអោយពួកគេខ្ជិល និងមិនចេះសួរ ដោយគ្មានទេការបង្រៀនអោយក្មេងមាន ទំលាប់សួរ ដែលប្រទេសលោកខាងលិចតែងបង្ហាត់ក្មេងៗគេអោយចេះប្រើ **ឧបលឃូ អ៊ែចក្វែសស៊ិន** Wh question យ៉ាងប៉ិនប្រសប់តាំងពីកុមារភាពមក ហើយវិធីសាស្ត្រ នេះជោគជ័យទៅបានក៏អាស្រ័យ នឹងទំហំនៃកិច្ចសហប្រតិបត្តិការរបស់ឪពុកម្តាយពួក គេដែរ។ ខាងក្រោមនេះ ជាបទពិសោធន៍ពិតមួយរបស់បងប្អូនជីដូនមួយរបស់មិត្ត

ម្នាក់ ដែលបានរៀបរាប់ពីគំរោងការណ៍ និងយុទ្ធសាស្ត្រ ដែលគាត់បានចាត់ចែងព្រៀងទុកសំរាប់បង្វឹកប្អូនប្រុសគាត់ អោយក្លាយជាក្មេងសកម្មវៀងវៃក្នុងការសិក្សារៀនសូត្រម្នាក់ជាពិសេស ជាអ្នកពូកែក្នុងការជជីកសួររកឬសរកគល់រាល់ចម្ងល់ទាំងឡាយដែលគេមាន។ ដើម្បីអោយក្មេងសួរទាល់តែមានអ្វីថ្មី ប្លែកទើបធ្វើអោយពួកគេឆ្ងល់ យ៉ាងនេះហើយ ញ៉ាំងអោយគាត់ជ្រើសយកការផ្តល់ចំនេះថ្មីៗ ប្លែកៗដូចយ៉ាងបានរៀបចំសៀវភៅអានជាច្រើន លំហាត់ភាសាផ្សេងៗជាច្រើនក្បាល ដាក់ពេញបន្ទប់របស់ប្អូនប្រុស លើសពីនេះ គាត់ព្រមទាំងពន្យល់ណែនាំពីវិធីសាស្ត្រនៅក្នុងការអាន និងដោះស្រាយលំហាត់យ៉ាងក្បោះក្បាយម្តងហើយម្តងទៀត យ៉ាងក្បោះក្បាយរាល់ន័យសេចក្តី ហើយជានិច្ចកាលតែងសួរជានិច្ចថា មានសំណួរអីអោយបងជួយទេនៅរាល់ចប់ការពន្យល់របស់គាត់ ហើយចំលើយដែលទទួលបានតែងតែគ្មានជាដរាប។ វាគ្មានអ្វីគួរអោយឆ្ងល់នោះទេថា ***ដើម្បីអាចសំរេចកិច្ចការអ្វីមួយដ៏ត្រចះត្រចង់បាន វាទាមទារអោយមានការចំណាយខ្ពស់ណាស់ មិនថាពេលវេលា ថវិកា ចិត្តគំនិត និងពេលខ្លះដល់អាយុជីវិតក៏មាន បើកិច្ចការនោះវាធំធេងសម្បើមនោះ*** ដូច្នេះហើយទើបគាត់គិតថា វាមិនថ្វីទេព្រោះនេះវាគ្រាន់ជាការចាប់ផ្តើមដំបូងតែប៉ុណ្ណោះ។

អស់កាលរាប់ខែទើបអព្ភូតហេតុមួយកើតឡើង គឺនៅថ្ងៃមួយដែលគាត់សួរទៅប្អូនប្រុសពីការសិក្សា ថាតើវាយ៉ាងម៉េចដែរ? ហើយសៀវភៅអានទាំងនោះវាល្អមើលទេ? ចុះលំហាត់ទាំងនោះវិញពិបាក ឬយ៉ាងណា? អាចធ្វើបានរឺក៏អត់ហ្នឹង? រួចក៏បកចូលដល់ទំលាប់ចាស់ គឺមានសំណួរ រឺអត់? រំពេចនោះ ប្អូនប្រុសគាត់ក៏ឆ្លើយថាមាន ប៉ុន្តែភ្លេចបាត់ទៅហើយ ព្រោះមិនបានកត់ទុកចាំលើកក្រោយចាំកត់ទុកសំរាប់សួរ បងប្រាប់ថាមិនអីទេ ប៉ុន្តែគាត់ប្រាប់ថាគាត់សប្បាយចិត្តណាស់ ព្រោះគាត់គិតថា***ប្អូនកំពុងដើរលើផ្លូវឆ្ងល់ហើយ ដែលវាជាផ្លូវនាំគេទៅចំណេះដឹងពិតៗ។***

មិនដឹងថាគំនិតបែបនេះសមហេតុ ហុចប្រយោជន៍បានយ៉ាងណានោះទេ ព្រោះវាគ្រាន់តែជាគំនិត ទស្សនៈមួយតែប៉ុណ្ណោះ សូមជួយគិតទាំងអស់គ្នា?

ចុតហ្មាយ 

"ខ្ញុំនឹងដើរឆ្ពោះទៅមុខអោយត្រង់
ដើម្បីឡើងទៅដល់កំពូលភ្នំនោះ
ចុះអ្នកវិញ?"



# *ខ្ញុំគ្រាន់តែធ្វើអំពើល្អសោះ*



## *វគ្គទី១*

*ជាចៅប្រុសរបស់ជីតាយោធាម្នាក់ និងជាជីដូនគ្រូពេទ្យម្នាក់ ហើយជាកូនប្រុសរបស់ឪពុកគ្រូបង្រៀនទស្សនៈវិជ្ជាម្នាក់ និងម្តាយអ្នកលក់ដូរនៅផ្សារម្នាក់ **វុត្ថា**ជានិស្សិតឆ្នាំទី៤ ផ្នែកទស្សនៈវិជ្ជាស្នងដំណែងពីឪពុករបស់ខ្លួន។ មុខមាត់ រូបរាង កំពស់ កំព ដូចគ្នាខ្លាំងណាស់ឪកូនទាំង២នេះ រួមទាំងអត្តចរិតផងដែរ ស្លូតបូត ចេះជួយយកអាសារអ្នកដទៃ សប្បុរស និងមិនងាយចុះចាញ់នឹងរឿងអ្វីមួយដោយងាយៗនោះទេ។*

*សព្វថ្ងៃនេះ **វុត្ថា**ជាកូនកំព្រា ពីព្រោះឪពុកគេបានចែកឋានទៅហើយកាលពី២ឆ្នាំមុន។ **វុត្ថា**បានរៀបរាប់ពីប្រវត្តិនៃការជួបគ្នារបស់ឪពុកម្តាយរបស់វា និងមូលហេតុ ដែលបណ្តាលអោយឪពុកគេត្រូវចាកលោកនេះយ៉ាងឆាប់រហ័សយ៉ាងដូចនេះថា៖*

*ឪពុកខ្ញុំឈ្មោះ**វ៉ាវិន** គាត់ជាមនុស្សគំរូម្នាក់របស់ខ្ញុំ គាត់បានបង្រៀនខ្ញុំអោយចេះជួយគេជួយឯង បើកចិត្តអោយទូលាយ ដោយឧស្សាហ៍លើកយកសម្តីមួយប្រយោគដែលខ្ញុំមិនអាចបំភ្លេចរហូតមកដល់សព្វថ្ងៃថា "**បើសិនជាពួកយើងជាសត្វឆ្កែទាំងអស់គ្នា ហេតុអ្វីបានជាឆ្កែមួយក្បាលមិនអាចងាប់បានដើម្បីសុភមង្គលឆ្កែរាប់ពាន់ក្បាលឯទៀត?**"។*

*គាត់ជំនះច្រើនណាស់មុននឹង ឈោងចាប់យកអាជីពជាគ្រូបង្រៀនទស្សនៈវិជ្ជានេះ គឺថាតាយាយរបស់ខ្ញុំចង់អោយគាត់ក្លាយជាវេជ្ជបណ្ឌិតម្នាក់ មិនមែនមកធ្វើជាគ្រូបង្រៀននោះទេ តែទោះជាមានការបង្ខំ ស្តីបន្ទោស ដាក់សម្ពាធយ៉ាងណាក៏គាត់នៅតែមិនយល់ព្រមដែរ ដោយអោយហេតុផលដដែលៗថា៖ "**ខ្ញុំចង់ជួយគេ ហើយ***

***ការជួយគេពិតប្រាកដ គឺការជួយផ្តល់ចំនេះដឹងមិនមែនការជួយផ្តល់ជាលុយកាក់សំភារៈប្រើប្រាស់ផ្សេងៗអីនោះទេ***”។ ពិតដូចការប៉ងរបស់គាត់មែន អស់លទ្ធភាពប្រឆាំងតាយាយរបស់ខ្ញុំបានយល់ព្រមអោយគាត់រៀនខាងផ្នែកទស្សនៈវិជ្ជា និងលើកទឹកចិត្តគាត់រហូតគាត់បានបញ្ចប់ការសិក្សាដោយជោគជ័យ។ គ្រានោះគ្មានទេថ្នាក់អនុបណ្ឌិតផ្នែកទស្សនៈ ដូច្នេះគាត់បានត្រឹមតែបន្តគរុកោសល្យ១ឆ្នាំទៀតប៉ុណ្ណោះ រួចក៏ប្រឡងចូលក្របខ័ណ្ឌរដ្ឋដើម្បីក្លាយជាគ្រូទស្សនៈវិជ្ជានៅតាមវិទ្យាល័យ។ ឧបសគ្គទី២របស់គាត់ក៏ចាប់កើតឡើង គឺឈ្មោះរបស់គាត់ត្រូវជាប់នៅវិទ្យាល័យមួយក្នុងទីរួមខេត្តមួយ ដែលធ្វើអោយតាយាយខ្ញុំមិនសប្បាយចិត្ត និងមិនចង់អោយគាត់ទៅរស់នៅឆ្ងាយតែម្នាក់ឯងនោះទេ ណាជីវភាពនឹងមិនអាចធូរធារឡើយក្នុងអាជីពគ្រូបង្រៀននេះ។ ដូចតែរាល់ៗលើកអញ្ចឹង គ្មានអ្វីអាចមករារាំងការសំរេចចិត្តរបស់ឪពុករបស់ខ្ញុំបានឡើយ ដែលទីបំផុតគាត់បានផ្លាស់ទៅរស់នៅទីនោះតែម្នាក់ឯងដោយជួលផ្ទះអ្នកភូមិស្រុកនៅ។ គាត់បង្រៀនពីថ្នាក់ទី១០ ដល់ថ្នាក់ទី១២ ហើយរៀងរាល់ល្ងាចគាត់បានឆ្លៀតបង្រៀនភាសាអង់គ្លេស ដើម្បីរកកំរៃបន្ថែម ដែលជាប្រាក់សន្សំទុកសំរាប់យកទៅទិញសៀវភៅអានល្អៗជាច្រើនដូចជា សៀវភៅរឿងនិទានសៀវភៅភាសាអង់គ្លេស និងសៀវភៅបណ្តុះគំនិតតាមបែបទស្សនៈវិជ្ជាជាដើម ដើម្បីទុកអោយក្មេងៗក្នុងភូមិអានពង្រីកចំនេះដឹង នៅពេលពួកគេទំនេរពីសាលា ដូច្នេះទើបគាត់ត្រូវជួលបន្ទប់១បន្ថែមទៀតរួចដាក់ឈ្មោះថា***ផ្ទះអាន***។

ពុកខ្ញុំស្នាក់នៅតាំងពីបង់ថ្លៃផ្ទះរហូតដល់មិនគិតថ្លៃផ្ទះ ដោយយាយតាម្ចាស់ផ្ទះស្រលាញ់ចូលចិត្តការឧស្សាហ៍ព្យាយាម និងសន្តានចិត្តដ៏ល្អរបស់ពុក ទើបពួកគាត់ទាំងពីរចាត់ទុកគាត់ដូចជាកូនម្នាក់អញ្ចឹងហើយមិនយកលុយកាក់អីទេ ហើយថែមទាំងជួយទំនុកបំរុងពេលខ្វះខាតថែមទៀតផង។ នៅទីនោះហើយដែលពុកបានជួបនឹងម៉ែ គឺនៅថ្ងៃឈប់សំរាកពីការបង្រៀន គាត់បានដើរផ្សាររកមើលទិញសំភារៈប្រើប្រាស់ដែលមានទាំងសំលៀកបំពាក់ផងដែរ ម្តាយជាអ្នកលក់ឪពុកជាអ្នកទិញ ទាំង២នាក់

គ្នាបានតថ្លៃគ្នាទៅវិញទៅមករាប់ម៉ោងទើបត្រូវថ្លៃ ការពិតទៅពុកគ្រាន់តែយកលេស ចង់នៅចែចង់ម៉ែតែប៉ុណ្ណោះ។ រាប់អានគ្នា និង ទាក់ទងគ្នាអស់រយៈពេលជិត ៣ឆ្នាំទើបពួកគាត់យល់ចិត្តគ្នា ហើយបានរៀបការជាមួយគ្នា និងបានបង្កើតខ្ញុំ២ឆ្នាំក្រោយពីនោះ។

ឥឡូវ ខ្ញុំសូមនិយាយពីមូលហេតុដែលបណ្តាលអោយគាត់ទៅចោលពួកយើងយ៉ាងឆាប់រហ័សយ៉ាងនេះ ៖៖៖

ដូចដែលបានប្រាប់ហើយអំពីរាល់សកម្មភាពមនុស្សធម៌របស់គាត់ ប៉ុន្តែ**រាល់អំពើល្អមិនមែនសុទ្ធតែមានការគាំទ្រនោះទេ** នៅតែមានអ្នកភូមិខ្លះមិនពេញចិត្តសកម្មភាពរបស់គាត់ ដោយតែងតែតាមចំអកមាក់ងាយ ហើយចោទថាពុកធ្វើពុតជាចិត្តល្អដើម្បីទាក់ទាញចិត្តអ្នកភូមិអោយស្រលាញ់ប៉ុណ្ណោះ និងតាមបន្តុចបង្អាក់គាត់ជាញឹកញយ តាមរយៈការដើរបញ្ចុះបញ្ចូលឪពុកម្តាយរបស់កូនសិស្សទាំងនោះកុំអោយអនុញ្ញាតអោយកូនៗពួកគេមកមើលសៀវភៅ និងរៀនភាសាអង់គ្លេសជាមួយពុកឡើយ។ ម៉ែក៏បានដឹងពីរឿងនេះដែរ នឹងតែងទទូចជាញយៗអោយគាត់ឈប់ធ្វើកិច្ចការអស់ទាំងនោះទៀតទៅ យាយតាម្ចាស់ផ្ទះក៏មានគំនិតដូចម៉ែអញ្ចឹងដែរ នាំតែអោយគេស្អប់នោះទេ តែលទ្ធផលគឺ មិនបានការរាល់តែលើកដោយពុកនៅតែជនះធ្វើវាដដែល លើសពីនេះគាត់បានថាអោយក្រុមមនុស្សទាំងនោះធ្ងន់ៗថា **មិនក្រទេចូលញ្ចសម្បត្តិតែក្រណាស់សេចក្តីល្អ។**

មិនត្រឹមតែនៅតែជនះធ្វើនោះទេ បានថែមទាំងពង្រីកសកម្មភាពថែមទៀតដូចយ៉ាង បង្កើតវគ្គសិក្សាខ្លីៗសំរាប់ពង្រឹងការគិតរបស់សិស្សៗ មួយចំនួនដែលខ្ញុំនៅចាំបានមានដូចជា ***ការអភិវឌ្ឍន៍ខ្លួនឯង អំណាចនៃការគិត ការអប់រំខួរក្បាល បុញ្ញហេតុនៃការរស់***................................។ ទង្វើនេះ ហាក់ដូចជាការបញ្ឈឺរដល់ក្រុមមនុស្សដែលស្អប់គាត់បន្ថែមទៀត កាន់តែយាត់កាន់តែមានៈធ្វើនៅពេលដែលយល់ថាវាជារឿងដែលត្រឹមត្រូវ នេះជាអត្តចរិតរបស់ពុក។ តាយាយម្ចាស់ផ្ទះ និងម៉ែបានប្រាប់ការ

*ពិតពីមូលហេតុ ដែលពួកទាំងនោះស្អប់ពុកថា មកពីពួកគេខ្លាចថាប្រជាប្រិយភាពរបស់ពុកចេះតែកើនឡើង និងប្រជាពលរដ្ឋក្នុងភូមិស្រុកចេះតែស្រលាញ់ចូលចិត្ត ដែលអាចថ្ងៃណាមួយគេអាចជ្រើសគាត់ជាមេភូមិ រឺមេឃុំជាដើម ដោយសារតែ* ***ទឹកចិត្តស្មោះត្រង់ និងគំនិតឆ្នៃប្រឌិតដ៏ភ្លឺថ្លា*** *ដែលនាំទៅរកការអភិវឌ្ឍន៍រីកចំរើនទាំងជីវភាព និងចិត្តគំនិតរបស់ប្រជាពលរដ្ឋក្នុងភូមិដែលផ្តោតទៅលើការអប់រំជាចំបងរបស់គាត់។*

*ខ្ញុំនៅចាំបាន គឺនៅយប់ថ្ងៃមួយ ជាពេលដែលពុកត្រឡប់មកពីចូលរួមក្នុងពិធីអាពាហ៍ពិពាហ៍របស់អ្នកជិតខាងក្នុងភូមិ គាត់ត្រូវបានក្មេងស្ទាវមួយក្រុមស្ទាក់វាយធ្វើបាប ឈាមមុខឈាមមាត់ និងរបួសយ៉ាងទំងន់ដែលត្រូវដេកសំរាកព្យាបាលអស់រាប់ខែ ដោយមិនដឹងថា មូលហេតុអីបានជាពួកគេមករករឿងគាត់ឡើយ។ គាត់បានពឹងអោយមិត្តភ័ក្រ្តជាគ្រូដូចគ្នា ជាអ្នកនៅចាត់ចែងមើលការខុសត្រូវ ប៉ុន្តែមិត្តគាត់នោះមិនបានយកចិត្តទុកដាក់ប៉ុន្មានទេ ដែលនាំអោយភាពគ្មានរបៀប និងគ្មានវិន័យក៏កើតមានឡើង ដូច្នេះពុកត្រូវបង្ខំចិត្តបិទ****ផ្ទះអាន**** ឯការបង្រៀនផ្សេងៗទាំងភាសាអង់គ្លេស និងវគ្គខ្លីក៏គ្មានទៀតឡើយ។ ទឹកមុខស្រងូតស្រងាត់ប្រកបដោយភាពអស់សង្ឃឹម ការបាក់ទឹកចិត្តបានធ្វើអោយពុកស្រកទម្ងន់ជាខ្លាំង ឯមុខរបួសរបស់គាត់ចេះតែក្លាយ ពីមួយថ្ងៃទៅមួយថ្ងៃ មិនព្រមជាសះស្បើយសោះ។ គាត់មិនសូវឃ្លានបាយឃ្លានទឹក ហើយតែងនិយាយតែម្នាក់ឯងជារឿយៗ ហើយតែងសួរអ្នកនៅក្នុងផ្ទះ និងអ្នករាល់គ្នាដែលមកសួរសុខទុក្ខគាត់ថា៖* ***តើខ្ញុំខុសអី? តើខ្ញុំខុសអី?***

*អាការៈកាន់តែធ្ងន់ធ្ងរឡើងៗ ហើយគាត់ចេះតែប្រកែកមិនទៅព្យាបាលនៅមន្ទីរពេទ្យឡើយ ដែលបណ្តាលអោយរូបរាងគាត់ស្គមស្គាំង គ្មានកំលាំងគ្មានកំហែង និងគ្មានសង្ឃឹមថានឹងអាចរស់រានមានជីវិតបានយូរទៀតឡើយ ក៏ព្រោះតែគាត់មានជម្ងឺតេតាណូស និងជម្ងឺផ្លូវចិត្តជាទម្ងន់។ នៅពេលដែលពុកហៀបនឹងដាច់ខ្យល់ចែកឋានទៅ គាត់បានហាមាត់ហបៗអោយខ្ញុំទៅជិត ហើយហុចក្រដាសមួយសន្លឹកមក*

អោយខ្ញុំដោយលើក្រដាស់នោះមានសរសេរថា៖ **យើងធ្វើសេចក្តីល្អមិនចាំបាច់អោយនរណាដឹងនោះទេ គឺយើងដឹងតែម្នាក់ឯងគឺវាគ្រប់គ្រាន់ហើយកូនប្រុស។** ទាំងនេះជាសម្តីរបស់**វុត្ថា**នៅពេលដែលគេមិនទាន់ក្លាយជាមនុស្សបាត់បង់ការចងចាំ រឺមនុស្សវិកលចរិត ហើយខាងក្រោមនេះគឺជាការរៀបរាប់ ពីមូលហេតុដែលបណ្តាលអោយគេក្លាយជាមនុស្សបែបនេះ ៖៖៖

## <u>**វគ្គទី២**</u>

ឆ្នាំដែលឪពុក**វុត្ថា** បានចាកលោកនោះ វាគឺជាឆ្នាំចុងបញ្ចប់នៃការសិក្សានៅសកលវិទ្យាល័យរបស់គេ ដែលជាចំនោទស្មុគស្មាញមួយរបស់**វុត្ថា** ថាតើគេគួរតែបន្តថ្នាក់អនុបណ្ឌិតតទៅមុខទៀត រឺមួយរៀនបន្ថែមគរុកោសល្យមួយឆ្នាំទៀត រួចត្រឡប់ទៅបង្រៀន និងរស់នៅជាមួយម្តាយនៅឯស្រុកវិញ ឬយ៉ាងណា? ចិត្តចង់បន្តថ្នាក់អនុបណ្ឌិត មិនសូវមានប៉ុន្មានទេព្រោះមិនចង់ចំណាយពេលច្រើនតទៅមុខទៀតណាត្រូវដោះស្រាយបញ្ហាជីវភាពផង ចំនែកការត្រឡប់ទៅស្នងបន្តការងាររបស់ឪពុកបានទាក់ទាញចិត្តគេជាខ្លាំង។ កាន់តែនឹកដល់ពាក្យសម្តី និងសកម្មភាពរបស់ឪពុកខ្លួនកាលណាកាន់តែធ្វើអោយគេពេញចិត្តឡើង ហើយនៅសោកស្តាយជាខ្លាំង មិនគួរណាវាត្រូវបានបញ្ចប់ទៅក្នុងសភាពបែបនេះសោះឡើយ និងមានចិត្តចង់បន្តធ្វើកិច្ចការទាំងនោះអោយបាន យូរអង្វែងតទៅមុខទៀត ដើម្បីបំពេញបំណងឪពុក។

ក្តីស្រមៃនេះ មិនទទួលបានការគាំទ្រពីម្តាយខ្លួនឡើយ ព្រោះគាត់មិនចង់អោយ**វុត្ថា**មានវាសនាដូចឪពុកខ្លួន ដោយគាត់បានបង្ខំអោយ**វុត្ថា**នៅបន្តរៀនថ្នាក់អនុបណ្ឌិតតទៅទៀត ហើយគាត់នឹងលក់ស្រែលក់ភ្លឺ ជាកេរ្តិ៍ដូនតាខ្លះអោយរៀន មិនអោយត្រឡប់មកធ្វើការនៅឯស្រុកវិញទេ ក្រោយពេលរៀនចប់ស្វែងរកការងារធ្វើនៅទីនោះទៅ។ មិនអាចប្រកែកបាន **វុត្ថា**ក៏យល់ព្រមតាមម្តាយ តែការយល់ព្រមនេះគឺធ្វើឡើង

នៅតែនឹងមុខតែប៉ុណ្ណោះ គឺគេបានយកលុយ ដែលម្ដាយផ្ញើរមកយកទៅរៀនថ្នាក់គរុកោសល្យ ដែលចំណាយពេលអស់តែ១ឆ្នាំប៉ុណ្ណោះ ហើយសល់ពេញ១ឆ្នាំទៀត គេបានធ្វើការស្ម័គ្រចិត្តនៅតាមអង្គការនានាដូចជា អង្គការសង្គ្រោះកុមារកំព្រា អង្គការសង្គ្រោះក្មេងតាមចិញ្ចើមថ្នល់ អង្គការយុវជនជាដើម ដើម្បីទុកជាមេរៀនសំរាប់អនុវត្តន៍ពេលត្រឡប់ទៅស្រុកវិញ។

២ឆ្នាំបានកន្លងផុតទៅយ៉ាងឆាប់រហ័ស ជាពេលដែល**វុត្ថា**ត្រូវប្រឈមនឹងការពិត ជាមួយនឹងអ្វីដែលហៅថាបុព្វហេតុនៃជីវិតរបស់ខ្លួន។ បុណ្យចូលឆ្នាំប្រពៃណីជាតិខ្មែរបានចូលមកដល់ និស្សិតដែលផ្លាស់មកបន្តការសិក្សានៅទីក្រុងទាំងអស់ បានត្រឡប់ទៅភូមិស្រុកកំណើតគេ តែរៀងៗខ្លួន ជួបជុំក្រុមគ្រួសារអបអរសាទរពិធីបុណ្យជាតិនេះ។ មិនខុសពីនិស្សិតផ្សេងៗទៀតដែរ **វុត្ថា**ក៏ត្រឡប់ទៅផ្ទះជាមួយនឹងអំណោយសំរាប់ជូនម្ដាយជាទីគោរព និងជាទីស្រលាញ់របស់ខ្លួន ក្នុងឱកាសចូលឆ្នាំថ្មីនេះ។ ក្រោយពីបានសប្បាយរីករាយ ដោយយកចង្ហាន់ទៅវត្ត លេងល្បែងប្រជាប្រិយ រាំលេងកំសាន្តនៅតាមវត្ត និងដើរកំសាន្តតាមរមណីយដ្ឋាននានា ក្នុងខេត្តជាមួយមិត្តភ័ក្ត្រចាស់ៗ ដែលរៀននៅវិទ្យាល័យជាមួយគ្នា និងមិត្តភ័ក្ត្រជិតខាងផ្ទះអស់រយៈពេលពេញ៣ថ្ងៃរួចមក **វុត្ថា**បានសំរេចចិត្តថា នឹងប្រាប់ការពិតគ្រប់យ៉ាងដល់ម្ដាយ ទាំងការរៀនសូត្រ និងគោលបំណងដែលខ្លួនចង់ធ្វើបន្តពីឪពុករបស់ខ្លួន។

ក្រោយបាយល្ងាចរួចមក **វុត្ថា**បានចាប់ផ្ដើមជាមួយនឹងសំនួរ៣ ទៅកាន់ម្ដាយ:

សំនួរទី១ តើម៉ែអនុញ្ញាតអោយកូនទៅធ្វើជាទាហាន រឺទេ បើសិនណាប្រទេសយើងកើតសង្គ្រាម ហើយរដ្ឋត្រូវការយោធាជាចាំបាច់ ដើម្បីទៅប្រយុទ្ធតតាំងនឹងសត្រូវនោះ?

សំនួរទី២ បើម៉ែមានប្ដីជាយោធា ហើយប្រទេសមានចលាចលកើតសង្គ្រាម ដែលគេត្រូវបញ្ជូនប្ដីរបស់ម៉ែ ទៅធ្វើជាទ័ពស្លួច ទាហានជួរមុខត្រៀមប្រយុទ្ធ

ប្រឈមនឹងការស្លាប់គ្រប់នាទី បើសិនជាមានការធ្វេសប្រហែស តើយល់ព្រមអោយប្តីម៉ែទៅរឺទេ?

សំនួរទី៣ បើសិនណាម៉ែគឺជានិស្សិតពេទ្យម្នាក់ ដែលនឹងបញ្ចប់ការសិក្សាថ្នាក់វេជ្ជបណ្ឌិតនៅឆ្នាំក្រោយ ចៃដន្យអី ប្រទេសយើងមានសង្គ្រាមកើតឡើង ហើយគេត្រូវការគ្រូពេទ្យស្ម័គ្រចិត្ត ដែលនឹងទៅសមរភូមិជួយព្យាបាលទាហានដែលរងរបួស និងជនភៀសសឹកដែលងាយរងគ្រោះជាដើម តើម៉ែយល់ព្រមទៅដែររឺទេ?

គិតទៅមើល៉!!! ថាតើម្តាយ**វុត្ថា**ឆ្លើយយ៉ាំងដូចម្តេច បើគាត់មានកូនប្រុសតែម្នាក់យ៉ាំងនេះ?

ចំលើយទី១ ម៉ែមានកូនប្រុសតែម្នាក់ប៉ុណ្ណោះ បើម៉ែព្រមអោយកូនទៅដូចជាបញ្ជូនកូនខ្លួនឯងទៅស្លាប់អញ្ចឹង ម៉ែគិតថាមានគ្រួសារអ្នកដ៏ទៃទៀតដែលគេមានកូនច្រើនជាងនេះ គួរតែបញ្ជូនទៅៗ ព្រោះបើបាត់បង់កូនមួយគឺនៅមានសល់កូនផ្សេងទៀត

ចំលើយទី២ ប្តីធ្លាប់តែអោបជាប់នឹងទ្រូង សាងអនុស្សាវរីយ៍ជាច្រើនជាមួយគ្នា ជាពិសេសមានកូនជាមួយគ្នាទៀត បើអោយប្តីទៅចុះបើស៊យត្រូវគ្រាប់បាត់បង់ជីវិតទៅ សួរថាតើអោយកូនវារំពឹងនរណា ហើយមានប៉ាឯណាហៅនឹងគេ?

ចំលើយទី៣ រៀនអស់ទាំងលុយៗ ហើយមិនទាន់រកបានមកវិញសងឪពុកម្តាយផងណាខ្វះតែ១ឆ្នាំទៀតប៉ុណ្ណោះ គឺបញ្ចប់ថ្នាក់សិក្សា ហើយអាចរកលុយចិញ្ចឹមជីវិតខ្លួនឯងផង និងសាងគ្រួសារដ៏មានសុភមង្គលបានដោយងាយបានទៀត។ បើចង់ទៅ ឪពុកម្តាយក៏មិនអនុញ្ញាតអោយទៅដែរព្រោះខ្លាចមានគ្រោះដល់ជីវិត ដោយសារតែនៅសមរភូមិគ្មានសុវត្ថិភាពនោះទេ ចុះចៃដន្យអី ខ្លាំងបាញ់ចំទៅ មិនអស់ជីវិតទាំងក្មេង ខាតទទេៗ ។

*មានហេតុមានផល ស្តាប់ទៅដឹងច្បាស់ថាគាត់ជាមនុស្សអាត្មានិយម ខ្លាចស្លាប់ គ្មានមនសិការជាតិអីសូម្បីតែបន្តិច តែប្រើលេសនេះលេសនោះ មកកំបាំងអំពើស្មោកគ្រោករបស់ខ្លួន ធ្វើដូចគេមិនដឹង។* ***សូមបើកវង់ក្រចកបន្តិចៈ*** *ថាពិតទៅ សំណួរទាំង៣នេះក៏សួរទៅកាន់ ម្តាយនិងមនុស្សស្រីដែលស្រលាញ់ដែរ ឯចំលើយគឺដូចគ្នាណាស់ នឹងចំលើយរបស់ម្តាយ****វុត្ថា*** *មិនដឹងថាការគិតរបស់ពួកគាត់ដែលជាស្ត្រីខ្មែរយ៉ាងណានោះទេបច្ចុប្បន្ននេះ សូមសាកល្បងមើល៉ តើម្តាយនិងមិត្តស្រីប្រពន្ធរបស់អ្នក មានការយល់បែបនេះដែរ ឬយ៉ាងណា? តែសូមប្រាប់ថានៅទីនេះអ៊ីស្រាអែល មិនថាស្រីមិនថាប្រុសនោះទេ អោយតែដល់អាយុ១៨ឆ្នាំ ត្រូវចូលសាលាយោធាទាំងអស់គ្នា កាន់កាំភ្លើងដូចគ្នា ការពារប្រទេសជាតិទាំងអស់គ្នា។* ***សូមបិទវង់ក្រចក***

*ក្រោយពីស្តាប់ចំលើយរបស់ម្តាយខ្លួន* ***វុត្ថា****បានដឹងច្បាស់ណាស់ពីចិត្តដ៏ចង្អៀតចង្អល់របស់ម្តាយខ្លួន ប៉ុន្តែមិនហ៊ានវាយតំលៃនៅចំពោះមុខគាត់ទេ មានតែបណ្តោយតាមនឹងទៅ។ ប្រាប់នៅតែប្រាប់* ***វុត្ថា****បានមើលចំមុខម្តាយ រួចនិយាយថា៖ ម៉ែខ្ញុំមានរឿងមួយចង់ប្រាប់ម៉ែ បន្ទាប់មកគេក៏រាយរ៉ាប់ប្រាប់ទាំងអស់ ទាំងការលួចទៅរៀនធ្វើជាគ្រូ និងគំរោងការដែលធ្វើនៅក្នុងភូមិស្រុកបន្តពីឪពុក។ លឺរឿងទាំងនេះហើយម្តាយ****វុត្ថា****ខឹងជាខ្លាំង តែខំសង្កត់ចិត្តទប់កំហឹង រួចសួរទៅកូនដោយសម្តីអួលដើមកថា ហេតុអីបានជាកូនធ្វើបែបនេះ?* ***វុត្ថា****ក៏ឆ្លើយមួយៗទៅម្តាយថា* ***បើសិនជាកូនមិនខិតខំប្រឹងប្រែងដើម្បីខ្លួនឯងទេ គ្មាននរណាគេនឹងមកខំជំនួសកូននោះទេ ប៉ុន្តែបើកូនខំប្រឹងសំរាប់តែខ្លួនឯងតែម្នាក់គត់នោះ តើកូនគឺជាស្អីទៅវិញទៅម៉ែ?*** *កូនមិនដឹងថានឹងនិយាយប្រាប់ម៉ែថាយ៉ាងម៉េចនោះទេ តែកូនពិតជាចង់ជួយពួកក្មេងៗទាំងនោះណាស់ កូនមិនចង់ឃើញពួកគេក្លាយជាកម្មករសំណង់ កម្មការិនីរោងចក្រ ពលករឆ្លងដែនទៅធ្វើការនៅក្រៅប្រទេសនោះទេ គឺកូនចង់អោយពួកគេ ក្លាយជាវេជ្ជបណ្ឌិត វិស្វករ បុគ្គលិកក្រុមហ៊ុនធំៗប្រើភាសាអង់គ្លេស បុគ្គលិកធនាគារ ម្ចាស់កសិដ្ឋាន ម្ចាស់ចំការជាដើម តើវាមិនអាចឬម៉ែ? តែវាមិនអាចទៅរួចទេ ព្រោះឯងគ្រាន់តែជា*

គ្រូកំប៉ិកកំប៉ុកប៉ុណ្ណោះ ហើយឯងមានឃើញបទពិសោធន៍របស់ឪពុកឯងទេ តើគាត់ត្រូវបាត់បង់ជីវិតដោយរបៀបណា? ម៉ែនៅសល់តែឯងម្នាក់គត់ ដូច្នេះម៉ែដាច់ខាតមិនអោយឯងទៅធ្វើរឿងជួយគេអីទៀតនោះទេ។ និយាយអស់ពេលយ៉ាងយូរ**វុត្ថា**មិនដឹងជាលើកហេតុផលអ្វីមកពន្យល់បន្ថែម ក៏ឈប់ជជែករួចសុំម្ដាយទៅដេកមុនបាត់ទៅ។

មួយសប្ដាហ៍ក្រោយមក **វុត្ថា**បានប្រាប់ម្ដាយថា បើសិនម៉ែមិនអនុញ្ញាតអោយកូនមកធ្វើជាគ្រូបង្រៀននៅទីនេះ និងធ្វើកិច្ចការជួយបង្ហាត់ក្មេងៗដូចដែលពុកធ្លាប់ធ្វើនោះទេ កូនសុំម៉ែចូលបំរើកងទ័ពហើយ ព្រោះកូនមិនចេះទៅរកស៊ីអីក្រៅពីការងារបង្រៀនគេនោះទេ។ លឺហើយ ម្ដាយភ្ញាក់ ហើយសួរថាហេតុអី? ឯងដឹងថាការងារយោធាលំបាកទេ ប្រថុយជីវិតណាស់ ហើយមិនដឹងថាអនាគតនឹងទៅជាយ៉ាងណានោះទេ ម៉ែមិនអោយឯងទៅទេ។ ការពិតទៅ វាគ្រាន់តែជាល្បិចរបស់**វុត្ថា**តែប៉ុណ្ណោះ ដើម្បីកម្លាម្ដាយគេ អោយភ័យរួចព្រមអោយគេនៅបង្រៀនជិតខ្លួន មិនចង់អោយទៅលំបាកឆ្ងាយ ណាកូនប្រុសតែមួយផង ដូច្នេះគេនៅធ្វើជាប្រកែកមិនព្រមឈប់ ហើយថែមទាំងរៀបចំឥវ៉ាន់ទៀត មើលទៅហាក់ដូចជាមែនទែនអញ្ចឹង។

មិនដាច់ចិត្តអោយកូនព្រាត់ឆ្ងាយពីខ្លួន ម្ដាយក៏យល់ព្រម ដែលធ្វើអោយក្ដីរំពឹងទុកទាំងប៉ុន្មានរបស់**វុត្ថា**បានសំរេចទាំងស្រុង។ ចាប់ពីពេលនោះមក**វុត្ថា** ក៏ដាក់ពាក្យធ្វើជាគ្រូបង្រៀនទស្សនៈវិជ្ជានៅវិទ្យាល័យ ដែលឪពុកធ្លាប់បង្រៀនកាលពីមុន ហើយបានបើក**ផ្ទះអាន** អោយមានដំណើរការឡើងវិញ ព្រមទាំងប្រមូលឯកសារបង្រៀនវគ្គខ្លីៗរបស់ឪពុក ដែលធ្លាប់បង្រៀនកាលពីមុនមករៀបរៀងសារឡើងវិញ។ សកម្មរបស់**វុត្ថា**ហាក់ដូចជាសកម្មជាងឪពុកទៅទៀត ព្រោះគេមានបញ្ញាវាងវៃជាងឪពុកខ្លួន និងបានសាកល្បងធ្វើការប្រឡូកក្នុងសង្គមច្រើន។ គេមិនត្រឹមតែបង្រៀនពួកក្រុមក្មេងៗ និងពួកក្រុមយុវជនអោយមានចំណេះដឹង ក្នុងការគិតពិចារណាថ្លឹងថ្លែងអោយបានស៊ីជម្រៅប៉ុណ្ណោះទេ គេថែមទាំងបានបង្ហាត់ក្មេងៗ និងយុវជនអោយធ្វើ

*សកម្មភាពជាក់ស្តែងជួយសង្គមមួយចំនួនទៀតដូចជា ការប្រមូលលុយសិស្សមកទិញកូនឈើដាំក្នុងធ្លាសាលាដើម្បីធ្វើអោយបរិស្ថានសាលាបរិសុទ្ធ កម្មវិធីសិស្សច្បងបង្រៀនសិស្សប្អូនអោយយល់ដឹងពីគ្រោះថ្នាក់ចរាចរណ៍ គ្រោះថ្នាក់នៃការសេពគ្រឿងញៀន..........................។ កិច្ចការរបស់**វុត្ថា** មានប្រសិទ្ធិភាពខ្ពស់ និងមានការគាំទ្រពីសិស្សានុសិស្ស និងអាណាព្យាបាលពួកគេណាស់ ព្រោះកូនចៅរបស់គេហាក់ដូចជាមានអត្តចរិតផ្សេង ដឹងខុសដឹងត្រូវ ស្គាល់អាក្រក់ស្គាល់ល្អ រួសរាយរាក់ទាក់ និងមានសមានចិត្តល្អ ស្មោះត្រង់ គួរអោយចង់រាប់អាន ក្រោយពីបានទទួលការបណ្តុះបណ្តាលពីលោកគ្រូ**វុត្ថា**មក នេះក៏ព្រោះតែវាកើតចេញពីទឹកចិត្ត ដ៏ពិតប្រាកដរបស់គ្រូម្នាក់ដែលចង់ជួយគេពិតប្រាកដមែន។*

*ដំណើររបស់**វុត្ថា** វាហាក់ដូចគ្នាខ្លាំងណាស់នឹងឪពុក ដែលធ្វើអោយម្តាយចេះតែមានការព្រួយបារម្ភពីមួយថ្ងៃទៅមួយថ្ងៃ។ ចំណែកឯយាយតាម្ចាស់ផ្ទះ ក៏មានការព្រួយចិត្តដូចគ្នា ខ្លាចចៅមានវាសនាដូចឪពុកខ្លួន បានដាស់តឿនម្តាយ**វុត្ថា** ជារឿយៗអោយជួយឃាត់កូនផង កុំបណ្តោយអោយកូនចេញមុខចេញមាត់ពេក ប្រយ័ត្នគេធ្វើបាបដូចឪខ្លួន។ យាយតា និងម្តាយរបស់**វុត្ថា** តែងពិគ្រោះគ្នា ពីវិធីធ្វើយ៉ាងម៉េចអោយគេខ្លាច រាងចាល លែងហ៊ានធ្វើកិច្ចការនោះតទៅទៀត ហើយនៅទីបំផុតពួកគាត់ក៏សំរេចយករបៀប ដែលឪពុកគេរងគ្រោះមកអនុវត្តន៍។*

*ម្តាយ**វុត្ថា** បានជួលក្មេងស្ទាវប្អូនប្រាំនាក់ អោយចាំស្ទាក់វាយធ្វើបាប**វុត្ថា** ប៉ុន្តែកុំអោយធ្ងន់ធ្ងរ គ្រាន់តែរបួសសើស្បែកទៅបានហើយ និងគំរាមគេអោយឈប់ធ្វើកិច្ចការអស់ទាំងនោះតទៅទៀត បើមិនដូច្នោះទេ គេនឹងទទួលបានមេរៀនធ្ងន់ជាងនេះទៀត។ ដូចការគ្រោងទុកមែន **វុត្ថា**បានមកផ្ទះវិញជាមួយនឹងរបួស រលាត់ដាច់ស្បែកឈាមច្រមុះ ដោយត្រូវក្មេងស្ទាវវាយធ្វើបាប ឯម្តាយគេវិញធ្វើជាមកជួយលាងរបួសអោយ ហើយនិយាយហាក់ដូចជាព្រួយបារម្ភ ថា ឃើញទេៗ ប្រាប់ហើយប្រាប់ទៀតថាអោយឈប់ធ្វើទៅ នាំតែឈឺខ្លួនឥតអំពើទេ នេះសំណាងហើយមិនធ្ងន់ធ្ងរ*

ដូចពុកកូន ម៉ែសូមអង្វរឈប់ទៅកូនណា ម៉ែមិនចង់បាត់បង់កូនទេ។ ខុសពីចិត្តប៉ង ណាស់ **វុត្ថា**នៅតែមានមុខមាំ ហើយហានិយាយមកប្រាប់ម្តាយវិញថា មិនអីទេម៉ែ របួសប៉ុនៗហ្នឹងនោះ ខ្ញុំអាចទ្រាំបាន **បើសិនណាជាពួកគេចង់បញ្ឈប់ខ្ញុំមិនអោយទៅមុខ ដោយកាត់ផ្តាច់ជើងទាំង២របស់ខ្ញុំ ពេលនោះខ្ញុំនឹងប្រើដៃទាំង២សំរាប់វារតទៅមុខទៀត ហើយបើកាត់ផ្តាច់ដៃទាំង២ខ្ញុំទៀត នៅមានមាត់ដែលត្រូវប្រើស្រែកហៅអ្នកដែលមានគោលដៅនៅខាងមុខដូចយើងអោយជួយគ្រាទៅ រហូតដល់តែស្ងួតបំពង់ក អស់ជាតិទឹកដាច់ខ្យល់ស្លាប់តែម្តង។** ផែនការនេះហាក់ដូចជាមិនអាចបំបាក់ទឹកចិត្តរបស់**វុត្ថា**បានឡើយ គេនៅតែបន្តធ្វើកិច្ចការ ដែលខ្លួនពេញចិត្តជាងដែលដែលធ្វើអោយម្តាយ**វុត្ថា**មិនអស់ចិត្ត និងចង់សាកល្បងទៀត ក្រែងលោលើកមុនវាស្រាលពេក មិនសូវធ្ងន់ល្មមអោយគេរៀងចាលទើបលើកនេះ គាត់ផ្តាំទៅពួកក្មេងស្ទាវអោយធ្វើបាបអោយធ្ងន់ជាងមុនបន្តិច ឯពួកក្មេងស្ទាវពេលលឺដូច្នេះបានដៃ នឹងលេងបានអស់ដៃហើយម្តងនេះ វាយតប់គេហើយបានលុយចាយទៀត។

លើកនេះ ធ្ងន់ៗទាល់តែមែនទែន **វុត្ថា**មិនអាចត្រឡប់មកវិញដោយខ្លួនឯងបានទេ គឺត្រូវពួកអ្នកភូមិនាំគ្នាគ្រាមក ឈាមជោគក្បាល បែកមុខបែកមាត់អស់ និងសន្លប់បាត់ស្មារតីមិនដឹងខ្លួនឡើយ។ ពេលដែលចេញមុខផ្ទះ ឃើញគេគ្រាកូនខ្លួនមកឈាមដាបខ្លួនបែបនេះ ម្តាយ**វុត្ថា**ស្លុតចិត្ត ទឹកភ្នែកហូរជោគថ្ពាល់ យំបណ្តើរនិយាយបណ្តើរ **វុត្ថា**!!!ថាថា!!!! យ៉ាំងម៉េចទៅហើយកូន!!! ម៉ែសុំទោសកូន!!!! ដឹងខ្លួនឡើងកូន!!! រួចអ្នកភូមិក៏ជួយនាំ**វុត្ថា**ទៅមន្ទីរពេទ្យសង្គ្រោះបន្ទាន់ទៅ។

២ថ្ងៃបន្ទាប់ទើបដឹងខ្លួន បើកភ្នែកឡើងឃើញម្តាយនៅជិតខ្លួន ញញឹមដាក់រួចក៏សួរថា អ្នកជានរណាគេ? ម្តាយឆ្លើយថា គឺម៉ែណាកូន កូនចាំម៉ែមិនបានទេអី **វុត្ថា**ក៏សួរបន្ត ម៉ែណាទៅ? ម្តាយក៏ស្ទុះទៅសួរវេជ្ជបណ្ឌិតថាកូនគាត់កើតអីបានជាចាំគាត់មិនបាន លោកវេជ្ជបណ្ឌិតឆ្លើយទាំងក្រៀមក្រំថា សូមសោកស្តាយផង កូនអ្នកបានប៉ះទង្គិចត្រូវក្បាល ធ្វើអោយគេបាត់បង់ការចងចាំ មានចរិតដូចជាកូនក្មេង

*អញ្ចឹងមិនដឹងខុសត្រូវអីទេ ហើយជម្ងឺប្រភេទនេះ មិនអាចព្យាបាលអោយជាសះស្បើយបានឡើយ សុំទោសផង។ លឺដូចនេះម្តាយ**វុត្ថា** ធ្លាក់ថ្លើមក្តុក អង្គុយចុះនៅកៅអីរង់ចាំនៅក្រៅបន្ទប់ទូហោយំ នឹកស្តាយកំហុសខ្លួនឯងមិនគួរធ្វើបែបនេះដាក់កូនជាទីស្រលាញ់តែម្នាក់គត់របស់ខ្លួនសោះ។ ២សប្តាហ៍ក្រោយមក **វុត្ថា**ត្រូវបានអនុញ្ញាតអោយចេញពីមន្ទីរពេទ្យបានហើយ ព្រោះអាការៈជម្ងឺហាក់ បានធូរស្បើយច្រើនហើយ អាចសំរាកបន្តនៅឯផ្ទះបាន។*

*លុះពេលមកដល់ផ្ទះ **វុត្ថា**ចាំមិនបានអ្វីទាំងអស់ សូម្បីតែឈ្មោះខ្លួនឯង បន្ទប់ខ្លួនឯង ការងារខ្លួនជាស្អីក៏មិនដឹង គេដើរស្ទាបនេះស្ទាបនោះជុំវិញផ្ទះ ម្តាយឃើញដូចនេះហួសចិត្ត ក៏អង្គុយនៅមួយកន្លែងយំ រួចមើលទៅកូនខ្លួន រួចនិយាយប្រាប់ខ្លួនឯងថា **មិនគួរណាសោះកូនម៉ែក្លាយទៅជាបែបនេះសោះ នេះក៏ព្រោះតែការស្រលាញ់ជាមួយនឹងភាពល្ងង់ខ្លៅរបស់ម៉ែទើបធ្វើអោយកូនអន្តរាយបែបនេះ។***

## ចុតហ្មាយ



"ខ្ញុំមិនសន្យាថានឹងមិនអោយបាត់បង់ទឹកដី
អ៊ីស្រាអែលសូម្បីតែមួយចង្អាមនោះទេ
បើសិនជាអ្នកទាំងអស់គ្នា ឈរអោបដៃមើល
ពួកយើងប្រយុទ្ធនោះ"







# ស៊ីឌីផលិតសៀវភៅ



មិនចេះសរសេរជាភាសាបាលីអីទេ តែចេះសរសេរជាសំរាយថា **ធម្មទានឈ្នះអស់ទានទាំងឡាយ** មានន័យថាគ្មានការអោយទានណាប្រសើរជាងការអោយទានជាចំណេះដឹងនោះទេ។ សំណួរសួរថា តើអ្វីទៅគឺជា**ទាន**? **ការអោយប្រកបដោយដួងចិត្តសង្រ្គោះ ដែលផុសចេញពីក្រអៅបេះដូងពិតៗ គ្មានប្រាថ្នាអីតបមកវិញគឺជាទាន**។ តើគេអាចធ្វើទានទៅអ្នកដ៏ទៃនៅទេសៈកាលៈបែបណាដែរ? ចំលើយគឺ គួរតែបាននៅគ្រប់ពេលវេលា និងទីកន្លែងហ្នឹងអោយតែមានចិត្ត។ ចុះពាក្យ**អំណោយ**វិញមានន័យយ៉ាងណាដែរ? ហើយបើបូកបញ្ចូលពាក្យទាំងពីរនេះបញ្ចូលគ្នា គឺ**អំណោយទាន** អាចបកស្រាយថាយ៉ាងម៉េចដែរទៅ?

ដោយសារតែកំរិតជីវភាពរបស់ប្រជាជននៅបច្ចឹមប្រទេស ក៏ដូចជាអ៊ីស្រាអែលនេះធូរធារ ទើបធ្វើអោយវប្បធម៌នៃការចែករំលែកមានការរីកចំរើនណាមួយដោយសារការស្តាប់ទៅតាមសម្តីរបស់ដូនតារបស់ពួកគេថា **គ្រប់របស់ទាំងឡាយនៅលើលោកនេះសុទ្ធតែត្រូវបានបង្កើតឡើងសម្រាប់ប្រើប្រាស់ ប៉ុន្តែមនុស្សវិញគឺត្រូវបានបង្កើតឡើងសម្រាប់ផ្តល់ក្តីស្រលាញ់** ដូច្នេះហើយទើបវាបានបង្រៀនចិត្តពួកគេអោយរស់នៅចេះចែករំលែកគ្នា ទាំងទ្រព្យសម្បត្តិ សំភារៈប្រើប្រាស់ និងជាពិសេសក្តីស្រលាញ់។ វាជាការល្អណាស់ដែលពួកគេបាននាំគ្នាបង្កើតកន្លែងសំរាប់ធ្វើសេចក្តីល្អជាច្រើន ដូចយ៉ាងធុងសម្រាប់ដាក់ខោអាវចាស់ៗនៅតាមទីសាធារណៈ ទុកជូនជនក្រីក្រដែលខ្វះខាតនិងកុមារកំព្រាជាដើម សមាគមន៍សម្រាប់ទទួលសំភារៈចាស់ពីអ្នកធូរធារ ទុកសម្រាប់លក់អោយអ្នកមានជីវភាពខ្វះខាតក្នុងតំលៃថោកៗ ដូចជាសំលៀកបំពាក់ គ្រឿងប្រដាប់ប្រើប្រាស់ក្នុងផ្ទះ សៀវភៅជាដើម ហើយលុយដែលបានមកពីការលក់របស់របរទាំងអស់នោះ គេទុកសម្រាប់ជាថវិកាជួយដល់ក្មេងកំព្រា។ តើពួកយើងអាចធ្វើបានដូចគេអត់ហ្នឹង?






ឥឡូវនិយាយពីអំណោយវិញ តើពួកគេចូលចិត្តធ្វើអំណោយអោយគ្នាទៅវិញទៅមកដល់កំរិតណា? មានឱកាសជាច្រើនក្នុង១ឆ្នាំៗ សម្រាប់ការអោយអំណោយគ្នា ដូចយ៉ាងនៅថ្ងៃទិវាឯករាជ្យជាតិ ទិវាដឹងគុណម្តាយ រឺឪពុក ទិវានៃក្តីស្រលាញ់ ពិធីខួបអាពាហ៍ពិពាហ៍ ពិធីខួបកំណើត ទិវាសាសនា និងពិធីផ្សេងៗទៀត ហើយអំណោយជាច្រើនត្រូវបានប្រគល់ជូនគ្នា ដូចជាគ្រឿងអលង្ការ គ្រឿងអេឡិចត្រូនិច សំភារៈបរិក្ខារក្នុងផ្ទះ សំលៀកបំពាក់ សៀវភៅ និងជាពិសេសគឺផ្កាដែលសបញ្ជាក់ពីក្តីស្រលាញ់ដ៏ស្មោះសបរិសុទ្ធ ហើយមិនមែនជាក្រដាសប្រាក់នោះទេ។

និយាយពីស្រុកខ្មែរយើងវិញក៏មិនខុសគ្នាដែរ គឺវាមានឱកាសច្រើនដូចគ្នាដែលយើងអាចជូនអំណោយទៅញាតិសន្តាន មិត្តភ័ក្រ្ត រឺអ្នកស្គាល់គ្នាបាន ដូចនៅថ្ងៃឡើងផ្ទះ ថ្ងៃដែលគេបញ្ចប់ការសិក្សា ថ្ងៃរៀបអាពាហ៍ពិពាហ៍ ថ្ងៃខួបកំណើត......... និងពិធីបុណ្យទានផ្សេងទៀត។ មានសំគាល់ឃើញទេថាលុយហាក់ដូចជារបស់តែម្យ៉ាងដែលពួកយើងប្រើជាអំណោយជូនគ្នា មិនដឹងពួកយើងគិតយ៉ាងម៉េចបានជាថ្ងៃអាពាហ៍ពិពាហ៍ក៏លុយ ឡើងផ្ទះក៏លុយ ខួបកំណើតក៏លុយ លើកលែងពិធីខ្លះប៉ុណ្ណោះ ហើយកំរមានទំលាប់ជូនគ្នាជា**សៀវភៅ រឺឌីសឯកសារដែលនាំអោយកើតចំណេះដឹង**ណាស់ ជាការជូនធម្មទាន ជាប្រធានបទសំខាន់ដែលចង់និយាយនៅក្នុងអត្ថបទមួយនេះ។ ស្តាប់ទៅហាក់ដូចជាប្លែកបន្តិច អោយសៀវភៅក្នុងថ្ងៃរៀបការរបស់មិត្តភ័ក្រ្ត អោយឌីសឯកសារនៅថ្ងៃឡើងផ្ទះមិត្តភ័ក្រ្ត ឆ្កួតទេអី!!! បើគិតថាវាមិនសក្តិសមក្នុងពិធីទាំងនេះទេ សាកល្បងអោយនៅពិធីផ្សេងទៀតទៅមើល៉ ដូចជាពិធីខួបកំណើត

ទិវានៃក្តីស្រលាញ់ រឺឱកាសដែលមិត្តទទួលបានការងារថ្មីជាដើម ប្រាកដណាស់ថា វានឹងប្លែក ហើយកើតជាប្រយោជន៍ដល់អ្នកទទួលពិតៗជាក់ជាមិនខាន។

និយាយអោយចំចំណុចតែម្តងទៅ ពីសៀវភៅ និងឌីសឯកសារ ដែលយើងគិតថាជាធម្មទានដ៏គាប់ប្រសើរសំរាប់ជូនអ្នកដ៏ទៃ។ ចំពោះសៀវភៅគឺងាយរកណាស់នៅតាមបណ្ណាគារ និងតាមទីផ្សារស្តីពីមេរៀនជីវិត ចំនេះដឹងសាកល ជាពិសេសប្រធានបទដែលទាក់ទងនឹងអ្នកទទួលតែម្តង ចុះឌីសឯកសារវិញ យ៉ាំងម៉េចដែរ? ត្រង់

នេះយ៉ាប់បន្តិច ព្រោះវាមិនសូវសំបូរបែបទេបច្ចុប្បន្ននេះ មានខ្លះដែរដូចជាឌីសឯកសារនិយាយពីប្រាសាទបុរាណខ្មែរ របបប្រល័យពូជសាសន៍ខ្មែរក្រហម……តែហាក់ជាគ្មានប្រធានបទលំអិតទាក់ទងនឹងអ្នកទទួលប៉ុន្មានទេ។ ត្រង់នេះហើយ មាន**គំនិតថ្មីមួយ**មិនដឹងថាអ្នកទាំងអស់គ្នាចាប់អារម្មណ៍ ឬមួយក៏យ៉ាំងណានោះទេ? **វាគឺការផលិតឌីសឯកសារដោយខ្លួនឯង** ប្រមូលឯកសារ និងផលិតដោយរបៀបម៉េចមានរៀបរាប់ដូចខាងក្រោមនេះ ៖៖៖

អ្នកទាំងអស់គ្នាជាអ្នកស្តាប់ និងតាមដានពត៌មានជាប្រចាំដែររឺទេ? បើសិនណាជាអ្នកស្តាប់ និងតាមដាន នោះប្រហែលជាស្គាល់វិទ្យុទាំងអំបាលម៉ាននេះហើយ **វិទ្យុបារាំងអន្តរជាតិ** (RFI) **វិទ្យុសំលេងសហរដ្ឋអាមេរិច** (VOA) **វិទ្យុអាស៊ីសេរី** (RFA) **វិទ្យុអូស្ត្រាលី** (Radio Australia)។ អ្នកមានដឹងថានៅក្នុងកម្មវិធីវិទ្យុនីមួយៗខាងលើនេះមានអ្វីខ្លះទេ ពួកវាមិនគ្រាន់តែផ្សព្វផ្សាយពីពត៌មានដែលបានកើតឡើងជាប្រចាំថ្ងៃនោះទេ ពួកវានៅមានកម្មវិធីពិសេសៗរៀងខ្លួនបន្ថែមទៀត ដែលអាចអោយយើងអាចទាញយកមកស្តាប់ កើតជាចំនេះបាន។ តើពួកវាមានកម្មវិធីពិសេសៗអ្វីខ្លះ?

**១. វិទ្យុបារាំងអន្តរជាតិ (RFI)**

! ទស្សនៈព្រឹត្តិការណ៍នយោបាយខ្មែរ ! ទស្សនៈព្រឹត្តការណ៍អាស៊ី

! ទស្សនៈព្រឹត្តិការណ៍សេដ្ឋកិច្ចខ្មែរ
! ទស្សនៈសារពត៌មានខ្មែរ
! ទស្សនៈព្រឹត្តិការណ៍សេដ្ឋកិច្ចពិភពលោក
! នាទីជីវិតជោគជ័យ
! នាទីសុខភាពនិងអនាម័យ
! នាទីយល់ដឹងអំពីច្បាប់និងជំនួញ
! នាទីប្រវត្តិសាស្ត្រខ្មែរ
! នាទីភូមិសាស្ត្រនយោបាយ
! នាទីភ្ញៀវប្រចាំសប្តាហ៍
! នាទីបទយកការណ៍
! នាទីខ្មែរក្រហម
! នាទីព្រឹត្តិការណ៍អន្តរជាតិប្រចាំថ្ងៃ

## ២. វិទ្យុសំលេងសហរដ្ឋអាមេរិច (VOA)

! ពត៌មានអន្តរជាតិ
! ពត៌មានអំពីកម្ពុជា
! ពត៌មាននយោបាយ
! ពត៌មានអំពីបញ្ហាខ្មែរក្រហម
! ពត៌មានសិទ្ធមនុស្សនិងច្បាប់
! ពត៌មានសេដ្ឋកិច្ចនិងពាណិជ្ជកម្ម
! ពត៌មានបរិស្ថាន
! ពត៌មានអំពីបញ្ហាសង្គម
! ពត៌មានសេដ្ឋកិច្ច
! ពត៌មានអំពីបញ្ហាជម្លោះ
! ពត៌មានអប់រំ
! ពត៌មានអំពីសិល្បះនិងកម្សាន្ត
! សេចក្តីរាយការណ៍ពិសេស

## ៣. វិទ្យុអាស៊ីសេរី (RFA)

! នាទីស្ត្រីខ្មែរ
! នាទីកសិកម្ម
! នាទីសុខមាលភាពសង្គម
! នាទីខ្មែរកម្ពុជាក្រោម
! នាទីបទយកការណ៍
! នាទីពលរដ្ឋវិជ្ជា
! អត្ថបទទាក់ទងនឹងនយោបាយ និងសេដ្ឋកិច្ច

## ៤. វិទ្យុអូស្ត្រាលី (Radio Australia)

! នាទីព្រឹត្តិការណ៍បច្ចុប្បន្ន ! នាទីអភិវឌ្ឍន៍ជនបទ និងបរិស្ថាន
! នាទីកម្រងសង្គម ! នាទីសុខភាព ! នាទីវិទ្យាសាស្ត្រ
! នាទីព្រឹត្តិការណ៍ជុំវិញតំបន់ ! នាទីស្ថានយុវវ័យ
! នាទីយល់ដឹងអំពីអូស្ត្រាលី ! នាទីសេដ្ឋកិច្ច និងពាណិជ្ជកម្ម
! នាទីវិចារណសន្ទនា ! បទសម្ភាសន៍សំខាន់ៗ

គ្រប់គ្រាន់ឬទេប្រភពឯកសារប៉ុណ្ណឹង សំរាប់យកមកដាក់បញ្ចូលក្នុងឌីសរបស់យើង។ មិនមែនយើងដាក់បញ្ចូលគ្រប់កម្មវិធីក្នុងឌីសតែមួយនោះទេ គឺយើងបែងចែកវាជាក្រុមពតិមាន វឺអាចចំរុះជា២ទៅ៣ប្រភេទនាទីបានក្នុងឌីសតែមួយ វាអាស្រ័យទៅលើប្រភេទអ្នកទទួលទៅវិញទេ។ ជាឧទាហរណ៍ បើគេជាអ្នករកស៊ី អ្នកគួរបញ្ចូលកម្មវិធីដែលទាក់ទងនឹងសេដ្ឋកិច្ច ជំនួញ និងជីវិតជោគជ័យរបស់អ្នករកស៊ីមួយចំនួន វឺបើអ្នកទទួលជាអ្នកស្រែចំការ គឺវិតតែស្រួល នាទីកសិកម្មល្អណាស់សំរាប់គេ។ យល់បានឬនៅប៉ុណ្ណឹង?

ឥឡូវនិយាយទីកន្លែងដែលយើងអាចទាញយកពួកវាបាន និងរបៀបនៃការចងក្រងពួកវាអោយទៅជាផលិតផលសំរេច (ឌីសឯកសារ) ។ វាមិននៅឯណាក្រៅពីលើប្រព័ន្ធអ៊ីនធឺណេតនោះទេ នេះជារបៀបងាយមួយក្នុងការស្វែងរក **ជាដំបូង**អ្នកត្រូវវាយអាស័យដ្ឋាននេះ WWW.CAM111.COM រួចយកពាក្យ Radio បន្ទាប់មកអ្នកនឹងឃើញឈ្មោះវិទ្យុទាំងនោះ ហើយចូលមើលពួកវាម្តងមួយៗទៅនឹងដឹងលំអិតពីអ្វីដែលមាននៅក្នុងនោះ ហើយរាល់កម្មវិធីទាំងនោះយើងសុទ្ធតែអាចទាញយកមកទុកជាសំលេង MP3 បានទាំងអស់។ អ្នកអាចមើលលំនាំតាមរូបភាពខាងក្រោមនេះ

ក្រោយពីប្រមូល បានសំលេងទាំងអស់នេះហើយ **ដំណាក់កាលទី២** តើយើងត្រូវធ្វើយ៉ាងណាទៀត ទើបអាចរៀបចំសំលេងទាំងនោះអោយមកនៅជាក្រុម? អ្នកអាចប្រើកម្មវិធីមួយជាបន្ថមកទៀត គឺកម្មវិធី **Adobe Audition** ដែលយើងប្រើវាសម្រាប់កាត់តសំឡេង បន្ថែមបន្ថយនូវសំលេងណាដែលយើងមិនចង់បាន និងកំណត់រយៈពេលដែលឌីសយើងអាចផ្ទុកបាន។







**ដំណាក់កាលចុងក្រោយ** គឺការធ្វើផលិតផលសំរេច (ឌីស) ។ កាលវេលានេះយើងត្រូវប្រើប្រាស់កម្មវិធីមួយទៀតហើយ វាមានឈ្មោះថា **Nero** ត្រូវបានប្រើសម្រាប់ចំលងចេញជាឌីស ដែលអាចយកឌីសសំលេងនោះទៅចាក់បាននៅគ្រប់**ម៉ាស៊ីនចាក់ស៊ីឌី**ធម្មតាបានទាំងអស់។









ប្រធានបទប៉ុណ្ណឹងគ្រប់គ្រាន់ហើយរឺនៅ សម្រាប់ធ្វើជាអំណោយដល់អ្នកដ៏ទៃនោះ។ សូមបញ្ជាក់ថា យើងក៏អាចយកឱសឯកសាររបស់យើងដាក់លក់នៅតាមគ្រឹះស្ថានអប់រំនានា ទីសាធារណៈក្នុងឱកាសបុណ្យទាននានា ដើម្បីយកថវិកាដែលចំនេញនោះ ទុកបំរើក្នុងគោលដៅមនុស្សធម៌បាន ដូចជាទិញសៀវភៅដាក់ក្នុងបណ្ណាល័យតាមសាលា ដែលស្ថិតនៅទីជនបទដាច់ស្រយាលព្រោះសិស្សនៅទីនោះខ្វះសៀវភៅអានណាស់។ សួរខ្លួនអ្នកទៅមើលថា អ្នកចង់ឃើញពួកគេក្លាយជាវេជ្ជបណ្ឌិត សាស្ត្រាចារ្យ វិស្វករ អ្នកបើកនាវាចំបាំងជាតិដែររឺទេ? ទុកពួកគេជាកូន ជាក្មួយ ជាប្អូនប្រុសស្រីរបស់អ្នកបានដែររឺទេ? ជួយពួកគេប៉ុណ្ណឹងលំបាកណាស់ណាទៅឬ? ជួយពួកគេអោយហើយទៅព្រោះ១០០ឆ្នាំទៀត **អ្នកនឹងលែងឃើញក្មេងៗដែលស្លៀកពាក់អាវមិនដឹងអាវ ខោមិនដឹងខោ មិនមែនសំបុរខ្មៅៗអត់សាច់អត់ឈាមល្ងង់ៗ ហើយធំឡើងគ្មាន ការងារអីធ្វើក្រៅពី ស្រែចំការ កម្មករលីសែង....ទាំងនេះទៀតទេ។** អ្នកគិតដូចនេះដែររឺអត់ថា **ការអានគឺជាអាយុជីវិតរបស់ពួកគេ** គេនឹងក្លាយជាមនុស្សបែបណាមួយ អាស្រ័យនឹងសៀវភៅដែលគេបានអាន ដូច្នេះចំណុចចាប់ផ្តើម គឺការផ្តល់សៀវភៅអាននេះឯង។ **រាល់តែអ្នកអានមិនសុទ្ធតែក្លាយជាអ្នកដឹកនាំនោះទេ ប៉ុន្តែគ្រប់អ្នកដឹកនាំសុទ្ធតែជាអ្នកអាន** It doesn't mean all the reader become the leader, but all the leader must be the reader។

ចុតហ្មាយ 

# “វាមិនមែនជាជើងហោះហើរទេ តែវាជាអ៊ីស្រាអែល”







# ជីវប្រវត្តិមេដឹកនាំអ៊ីស្រាអែលស្ត្រីដំបូងគេ



## ហ្គោលដា ម៉ែរ Meir, Golda *(orig. Goldie Mabovitch)*



*កើត: ០៣ មិនា ១៨៩៨*, Kiev, *អ៊ុយក្រែន* (Ukraine)

*អនិច្ចកម្ម:* *វិច្ឆិកា ១៩៧៨ ក្នុងអាយុ៨០ឆ្នាំ*

*សញ្ជាតិ:* *អ៊ីស្រាអែល*

*វិជ្ជាជីវ:* *អ្នកនយោបាយ នាយករដ្ឋមន្ត្រី អ្នកដឹកនាំចលនាស្យូនីស* (Zionism)

*១៨៩៨ នាងបានកើតនៅថ្ងៃទី៣នៃខែឧសភាក្នុង* ***KIEV*** *អាណាចក្ររូស្ស៊ី*

១៩០២ ឪពុករបស់នាងបានផ្លាស់ទៅរស់នៅសហរដ្ឋអាមេរិច ហើយអ្នកដទៃទៀតក្នុងគ្រួសាររស់នៅក្នុង ***PINSK***

១៩០៦ គ្រួសាររបស់នាងតាម Moshe ទៅរស់នៅសហរដ្ឋអាមេរិច។ រួចមកនាងចូលរៀននៅសកលវិទ្យាល័យហើយទទួលបានបរិញ្ញាប័ត្រផ្នែកអប់រំ។ នាងបានបង្រៀននៅសាលា Fourth Street បច្ចុប្បន្ន Golda Meir School រហូតដល់ឆ្នាំ១៩១២។

១៩១២ នាងបានបង្រៀននៅវិទ្យាល័យ North Division និង ធ្វើការក្រៅបន្ថែមសំរាប់ការចាយវាយ

១៩១៥ នាងបានចូលរួមជាសមាជិកផ្លូវការនៃអង្គការ Labour Zionist Organization

១៩១៧ នាងបានរៀបការជាមួយនឹង Morris ហើយបានចាប់ផ្តើមគំរោងការមួយហៅថា Alivah ( ការភៀសខ្លួនទៅទឹកដីអ៊ីស្រាអែល និងបន្ទាប់មកផ្នែកមួយនៃអាណាចក្រ Ottoman )។ ទាំងពីរនាក់ប្តីប្រពន្ធរួមជាមួយបងស្រីធំរបស់ Golda ឈ្មោះ Sheyna បានភៀសខ្លួនទៅកាន់តំបន់គ្រប់គ្រងរបស់ចក្រភពអង់គ្លេសនៃទឹកដីប៉ាលេស្ទីនក្នុងឆ្នាំ១៩២១។

១៩២១ នាង និងប្តី បានភៀសខ្លួនទៅកាន់ប៉ាលេស្ទីនដើម្បីជួយស្វែងរករដ្ឋថ្មីប

១៩២៩ នាង ត្រូវបានបោះឆ្នោតជ្រើសតាំងជា ជំនួយការនៃ ក្រុមប្រឹក្សាកម្មករស្ត្រី

១៩៤៨ នាងគឺជាស្ត្រីម្នាក់ក្នុងចំនោមមនុស្ស២៤នាក់ និង ម្នាក់ក្នុងចំណោមស្ត្រី២នាក់ដែលបានចុះហត្ថលេខាប្រកាសបង្កើតរដ្ឋអ៊ីស្រាអែល នៅថ្ងៃទី១៤ ខែឧសភាឆ្នាំនេះ។

១៩៤៩ នាង ត្រូវបានតែងតាំងជា ឯកអគ្គរដ្ឋទូតទី១ទៅកាន់សហភាពសូវៀត។ នាងធ្វើការនៅទីនោះរយៈពេលខ្លីប៉ុណ្ណោះក៏ចាកចេញនៅឆ្នាំដដែល។

១៩៥១ ប្តីរបស់នាង Morris ទទួលអនិច្ចកម្ម

១៩៥៦ នាងបានក្លាយជារដ្ឋមន្ត្រីការបរទេសដែលស្ថិតនៅក្រោមការដឹកនាំរបស់លោកនាយករដ្ឋមន្ត្រី David Ben-Gurion ។

១៩៦០ នាងបានធ្វើរោគវិនិច្ឆ័យ ដែលនាងបានលាក់ វាពាក់ព័ន្ធនឹងការដែលថាសាធារណជនគិតថានាងមិនសក្តិសមនឹងមុខនាទីទេ។

១៩៦៥ នាងបានចុះចេញពីតំណែងគណៈរដ្ឋមន្ត្រី ពិគ្រោះជម្ងឺនិងសំរាកកាយពីមុខនាទីដែលនាងបានធ្វើអស់ជាច្រើនឆ្នាំមក។

១៩៦៨ នាងបានបំរើការជាលេខាធិការទូទៅអស់ពេល៨ខែ ហើយបានចូលនិវត្តន៍ម្តងទៀតនៅថ្ងៃទី១ខែសីហាឆ្នាំនេះ។

១៩៦៩ នាងបានងើបចេញពីការចូលនិវត្តន៍ រួចចូលបំរើការរដ្ឋការវិញនៅថ្ងៃទី១៧ ខែមិនា និងទទួលភារកិច្ចជានាយករដ្ឋមន្ត្រីរហូតដល់ឆ្នាំ១៩៧៤។

១៩៧២ នាងបានអំពាវនាវទៅកាន់ពិភពលោកថា (ថែរក្សាប្រជាពលរដ្ឋរបស់ពួកយើងនិងផ្តន្ទាទោសរាល់អំពើឧក្រិដ្ឋដែលហួសពិពណ៌នាទាំងឡាយ)។

១៩៧៣ រដ្ឋាភិបាលរបស់នាង ត្រូវបានឈ្លោះបែកខ្ញែកគ្នា ដោយសារវិវាទផ្ទៃក្នុងចំណោមរដ្ឋាភិបាលសហព័ន្ធ។ លើសពីនេះទៅទៀត វាគឺការប្រឈមមុខនឹងសំណួរដ៏ចំរូងចំរាស់មួយចំនួនស្តីអំពីការវិនិច្ឆ័យយុទ្ធសាស្ត្រខុស

ក៏ដូចជាកម្សោយក្នុងការដឹកនាំជាទូទៅ ដែលបានលទ្ធផលជាការប្រុងប្រៀបខ្លួនមិនសមស្របនៅដំណាក់ការដំបូងនៃសង្គ្រាម Yom Kippur។

១៩៧៤ នាងបានលាលែងពីតំណែង ហើយត្រូវបានទទួលទទួលតំណែងបន្តដោយ Yitzhak Rabin នៅថ្ងៃទី៣ ខែមិថុនាឆ្នាំដដែល។

១៩៧៨ នាងទទួលអនិច្ចកម្មនៅថ្ងៃទី៨ ខែធ្នូដោយសារជំងឺមហារីកនៅក្នុងទីក្រុង Jerusalem ក្នុងអាយុ៨០ឆ្នាំ និងត្រូវគេបញ្ចុះសពនៅ Mount Herzl ក្នុងទីក្រុង Jerusalem នៅថ្ងៃទី១២ ខែធ្នូឆ្នាំនេះ។

***ហ្គោលដា មៃរ*** បានធ្វើការបំរើក្នុងតួនាទីជារដ្ឋមន្ត្រីការបរទេសរបស់អ៊ីស្រាអែល ចាប់ពីឆ្នាំ១៩៥៦ ដល់១៩៦៦ និងបានក្លាយជានាយករដ្ឋមន្ត្រីទី៤ក្នុងឆ្នាំ១៩៦៩។ នៅទីបំផុតនៃជីវិត គឺគាត់បានក្លាយជាវីរជនម្នាក់ ដែលមានងារថាជានារីអ្នកដឹកនាំជាតិទី១ ក្នុងយុគសម័យទំនើប។ ***មៃរ*** ជាតួអង្គដឹកនាំសំខាន់ម្នាក់ក្នុងចលនាមួយដែលហៅថា ***ស្យូនីសស៊ីម*** (Zionism) ដែលជាចលនាតស៊ូដើម្បីបង្កើតរដ្ឋជ្វីបមួយក្នុងទឹកដីប៉ាលេស្ទីន (Palestine) ជាតំបន់ដែលពួកជ្វីបចាត់ទុកថាជាដែនដីកំណើតរបស់ពួកគេ។ ការពិតណាស់ ចលនា***ស្យូនីស***នេះឯងដែលជាកត្តានាំទៅរកការបង្កើតរដ្ឋអ៊ីស្រាអែលបានដោយជោគជ័យ ជាក្តីស្រម័យរបស់ជនជាតិជ្វីបនៅពេលនោះ។

## កុមារភាព និងចំណង់ចំណូលចិត្ត

***ហ្គោលដា មៃរ*** បានកើតនៅក្នុងប្រទេសអ៊ុយក្រែន នៅថ្ងៃទី០៣ ខែមិនា ឆ្នាំ១៨៩៨។ ពេលគាត់មានអាយុ៨ឆ្នាំ គាត់បានភៀសខ្លួនជាមួយក្រុមគ្រួសារទៅរស់នៅសហរដ្ឋអាមេរិចក្នុងឆ្នាំ១៩០៦ ដោយរត់គេចពី **ចលនាបំបាត់ជាតិជ្វីប** ដែលធ្វើឡើងក្នុងគោលបំណងប្រឆាំងនឹងជនជាតិជ្វីបក្នុងប្រទេសរុស្សីនៅពេលនោះ។ ក្រោយមក

***ម៉ែរ*** *បានហៅចលនានោះថាជាអំពើហិង្សាប្រឆាំងជនជាតិជ្វីប ដែលវាបានបំផុសអោយគាត់មានការប្តេជ្ញាចិត្តយ៉ាងមុះមុត ក្នុងការបង្កើតរដ្ឋអ៊ីស្រាអែលមួយ ដែលពោរពេញដោយសន្តិសុខ និងសុវត្ថិភាពមួយ។*

*បន្ទាប់ពីបញ្ចប់វិទ្យាល័យ* ***ម៉ែរ****បានសិក្សាវិជ្ជាជីវៈគ្រូបង្រៀនក្នុងឆ្នាំ១៩១៧។ ស្ថិតនៅក្រោមសម្ពាធរបស់ឪពុកម្តាយ ដែលពួកគាត់យល់ថា មនុស្សស្រីគួរតែរៀបការជាជាងស្វះស្វែងរកការងារធ្វើ ដូច្នេះ****ម៉ែរ****ត្រូវបង្ខំចិត្តរៀបការជាមួយ* ***ម៉ូរីស មីយឺរសុន*** (Morris Myerson) *ឯការសិក្សានៅតែបន្តជាដដែល។ ក្នុងឆ្នាំ១៩២១* ***ម៉ែរ****បានភៀសខ្លួនជាមួយ* ***ម៉ូរីស*** *ទៅកាន់ដែនដីប៉ាលេស្ទីន ដែលពេលនោះស្ថិតនៅក្រោមការគ្រប់គ្រងរបស់ចក្រភពអង់គ្លេស ហើយរស់នៅភាគច្រើនដោយជនជាតិអារ៉ាប់ជាកន្លែងដែលគាត់****ម៉ែរ*** *បានចូលរួមចលនាយុវជន****ស្យូនីស****។*

*ក្រោយពេលមកដល់ប៉ាលេស្ទីន ទាំង២នាក់បានចូលរស់នៅក្នុង* ***គីប៊ូត*** **kibbutz** *(លំនៅដ្ឋានជាសហគមន៍) តែដោយមិនអាចបន្សុាំនឹងការរស់នៅទីនោះបាន ពួកគេក៏ផ្លាស់ទៅ* ***តែល អាវីប*** **Tel Aviv** *និងក្រោយមក* ***ហ្ស៊ឺរ៉ូសាឡែម*** **Jerusalem** *ដែលនៅទីនេះហើយដែល****ម៉ែរ*** *បានការងារជាហិរញ្ញិក នៅការិយាល័យកិច្ចការសាធារណៈនៃ* ***សហព័ន្ធកម្មករ*** *ជាអង្គការដែលចូលរួមដោយកម្មករនៅក្នុងគីប៊ូត ដែលទីបំផុតបានក្លាយជាស្ថាប័នសេដ្ឋកិច្ចសំខាន់បំផុតមួយក្នុងរដ្ឋអ៊ីស្រាអែល មានតួនាទីជាកន្លែងរៀបចំកម្មវិធីសុខមាលភាព ស្វែងរកជំនួយបរទេស និងតួនាទីនយោបាយជាដើម។*

## *ដើមកំណើតនៃអ៊ីស្រាអែល*

*ពីឆ្នាំ១៩២៨* ***ម៉ែរ****បានក្លាយជាលេខាធិការនៃ* ***ក្រុមប្រឹក្សាកិច្ចការស្ត្រី*** *នៅប៉ាលេស្ទីន និងជាមេដឹកនាំតំណាងសហព័ន្ធកម្មករ។ បន្ទាប់មក ក្នុងឆ្នាំ១៩២៩* ***ម៉ែរ****ត្រូវបានបោះឆ្នោតជ្រើសតាំងជាប្រតិភូសំខាន់ម្នាក់ក្នុងកិច្ចប្រជុំ* ***អង្គការស្យូនីសពិភពលោក****។*

ភស្តុតាងនេះហើយ ជាចំណុចចាប់ផ្តើមនៃសកម្មភាពនយោបាយស្យូនីស។ ក្នុងឆ្នាំ ១៩៤០ ***ម៉ែរ***ត្រូវបានតែងតាំងជាប្រមុខដឹកនាំខាងនយោបាយនៃសហព័ន្ធកម្មករ ហើយ ***ម៉ែរ***បានប្រឆាំងនឹង ***លិខិតពណ៌សអង់គ្លេស*** **(British White Paper)** នៅឆ្នាំ១៩៣៩ ដែលកំណត់ចំនួនជនភៀសខ្លួនជាតិជ្វីបមកកាន់ប៉ាលេស្ទីន។ គ្រានោះដែរ ***ម៉ែរ***បានរៀបចំការភៀសខ្លួនយ៉ាងសម្ងាត់ខុសច្បាប់របស់ពួកជ្វីបមកកាន់ប៉ាលេស្ទីន ក្នុងខណៈដែលជនជាតិជ្វីបស្ថិតក្នុងស្ថានភាពគ្រោះថ្នាក់នៅអឺរ៉ុប ក៏ព្រោះតែសង្គ្រាមលោកលើកទី២ និងការធ្វើទុក្ខបុកម្នេញដោយ***របបណាស៊ីអាល្លឺម៉ង់***។

ពេលដែល ***រដ្ឋបាលប៉ាលេស្ទីន (មូលដ្ឋានគ្រប់គ្រងសំខាន់របស់អង់គ្លេស)*** បានចាប់ពួកមេដឹកនាំ នៃ ***ទីភ្នាក់ងារជ្វីប*** ដែលជាផ្នែកមួយនៃស្ថាប័នស្យូនីស ដាក់ពន្ធនាគារក្នុងឆ្នាំ១៩៤៦នោះ ***ម៉ែរ***ត្រូវបានតែងតាំងជាសកម្មប្រមុខដឹកនាំនៃ ទីភ្នាក់ងារជ្វីបខាងផ្នែកនយោបាយ។ ***ម៉ែរ*** ស្ថិតក្នុងមុខនាទីនេះរហូតដល់ ការប្រកាសបង្កើតរដ្ឋឯករាជ្យអ៊ីស្រាអែលនៅថ្ងៃទី ១៤ ឧសភា ១៩៤៨។ នៅដើមឆ្នាំ១៩៤៨ ***ម៉ែរ*** បានធ្វើទស្សនៈកិច្ចនៅសហរដ្ឋអាមេរិច ដើម្បីរៀបចំការឃោសនាស្វែងរកជំនួយបន្ទាន់សំរាប់ប៉ាលេស្ទីន ដែលវាប្រកបជាមួយនឹងជោគជ័យដ៏ត្រចះត្រចង់។ នៅថ្ងៃទី១៤ ខែឧសភា ***ម៉ែរ*** បានក្លាយជាសមាជិក ***ក្រុមប្រឹក្សារដ្ឋបណ្តោះអាសន្ន*** របស់អ៊ីស្រាអែល ក្នុងចំណោមអ្នកចុះហត្ថលេខា នៃការប្រកាសឯករាជ្យមួយនេះ។

## *ប្រមុខដឹកនាំអ៊ីស្រាអែល*

***ម៉ែរ*** បានចាប់ផ្តើមអាជីពនយោបាយខ្លួន ជាអ្នកតំណាងអ៊ីស្រាអែល នៅសហភាពសូវៀត។ ជាមួយនឹងការបោះឆ្នោតលើកដំបូងនៃ ***សភាអ៊ីស្រាអែល (ស្ថាប័នកំពូលរបស់រដ្ឋ) ម៉ែរ*** បានត្រឡប់មកអ៊ីស្រាអែលវិញ និងត្រូវបានតែងតាំងជារដ្ឋមន្ត្រីរ៉ាប់រងខាង ***ពលករ និងសុវត្ថិភាពសង្គម***។ ក្នុងភារកិច្ចនេះ ***ម៉ែរ*** បានដោះស្រាយបញ្ហាផ្ទៃក្នុងសំខាន់បំផុតរបស់អ៊ីស្រាអែលដែលមានដូចជា: ការសាងសង់លំនៅដ្ឋាន និង

ការស្វែងរកការងារ សំរាប់ពួកភៀសខ្លួនជាតិថ្មីបចំណូលថ្មី ដ៏ច្រើនសន្ធឹកសន្ធាប់។

**ម៉ែរ** បានរៀបផែនការមួយ ត្រូវគេស្គាល់ថាជា "**ផែនការ មីយឺរសុន**" ដែលអនុញ្ញាត អោយមានការសាងសង់របូតច្រើនជាង៣០ពាន់កន្លែង នៃលំនៅដ្ឋានដែលមានមួយបន្ទប់។ **ម៉ែរ** ក៏បានពង្រីកការសាងសង់អាគារបន្ថែមទៀត ប្រមាណ២០០ខ្នង សំរាប់ក្រុមគ្រួសារទើបភៀសខ្លួនមកថ្មី ដែលនៅមានចំណូលទាបនៅឡើយ។



*Golda Meir.*

ក្នុងឆ្នាំ១៩៥៦ នាយករដ្ឋមន្ត្រីអ៊ីស្រាអែល **ដាវីត ប៉ែនហ្គូរ៉ន** (David Ben-Gurion) បានហៅ **ម៉ែរ**ថា " **បុរសដ៏ប្រពៃបំផុត**" នៅក្នុងការិយាល័យរបស់គាត់ ហើយចាត់តាំងអោយ**ម៉ែរ**ជំនួសកន្លែងលោក **ស៊ឺតូត ស៊ារ៉េត** (Shertok–Sharett) ជារដ្ឋមន្ត្រីការបរទេស ក្នុងចំណោមមុខនាទីរដ្ឋាភិបាលសំខាន់ៗរបស់ជាតិ។ ជាក្តីស្រម៉ៃរបស់ ប៉ែនហ្គូរ៉ន ចង់អោយពលរដ្ឋអ៊ីស្រាអែលទាំងអស់មាន **ឈ្មោះជាភាសាហ៊ីបប្រ៊ូរ** (Hebrew Name) ដែលវាធ្វើអោយ**ម៉ែរ** មានការស្ទាក់ស្ទើរក្នុងការផ្លាស់ប្តូរឈ្មោះខ្លួនទៅជា Meir ខណៈចង់ហៅកាត់ពី Meyerson ទៅMyerson។

ឆ្នាំ១៩៦៦ ដោយសារតែភាពហត់នឿយ និងជម្ងឺ ***ម៉ែរ***បានលាលែងពីតំណែង។ តែមិនបានយូរប៉ុន្មាននោះទេ ដោយទទួលសម្ពាធពីគណបក្សនយោបាយរបស់ខ្លួន ***ម៉ែរ***បានយល់ព្រមទទួលភារៈ ជាអ្នកដឹកនាំ ***គណបក្សពលករ*** របស់អ៊ីស្រាអែល។ វាគិតទៅជាង២ឆ្នាំបន្ទាប់នោះ ***ម៉ែរ***បានទទួលជោគជ័យក្នុងការបង្រួបបង្រួមក្រុមពលករពាសំខាន់ៗ ដែលបានបែកបាក់គ្នារួមមាន Mapai, the Achdut Ha'Avodah និង the Rafi អោយចូលគ្នាជាគណបក្សនយោបាយតែមួយវិញ ហើយការរួបរួមនេះ បានធ្វើឡើងនៅថ្ងៃទី០២ ខែមករា១៩៦៨។ មកដល់ខែកក្កដា ***ម៉ែរ***បានចូលនិវត្តន៍ពីសកម្មភាពនយោបាយ ប៉ុន្តែក្រោយពេលអនិច្ចកម្មរបស់លោកនាយករដ្ឋមន្ត្រី ***លីវីស អែស្កូល*** **(Levi Eshkol)** ដែលវាទំនងជានឹងបង្កអោយមានជម្លោះកើតឡើងក្នុងគណបក្សពលករ ក្នុងការស្វែងរកអ្នកមកជំនួសកន្លែងគាត់។ ដូច្នេះហើយបានជា ***ម៉ែរ*** ងើបចាកពីការចូលនិវត្តន៍ ហើយឈរជាបេក្ខជន និងជាប់ឈ្មោះជា នាយករដ្ឋមន្ត្រីអ៊ីស្រាអែលនៅថ្ងៃទី១៧ ខែមិនា១៩៦៩។

## នាយករដ្ឋមន្ត្រី

ទោះជាវ័យជំនាស់ និងសុខភាពទ្រុឌទ្រោមក៏ដោយ ***ម៉ែរ***នៅតែពង្រឹងសមត្ថភាពដើម្បីប្រទេសជាតិ ក្នុងកំឡុងអាណត្តិរយៈ៩ខែរបស់ខ្លួនដែរ។ ជាលទ្ធផល គណបក្សពលកររបស់***ម៉ែរ*** បានឈ្នះឆ្នោតនៅឆ្នាំ១៩៦៩ ដូច្នេះ***ម៉ែរ***បានទទួលនាទីជានាយករដ្ឋមន្ត្រីសំរាប់អាណត្តិ៤ឆ្នាំ។ កំឡុងពេលនោះ កិច្ចខិតខំប្រឹងប្រែងរបស់***ម៉ែរ*** ដើម្បីទទួលបានជំនួយពីសហរដ្ឋអាមេរិច ក្នុងកិច្ចសង្គ្រោះខាងយោធា និងសេដ្ឋកិច្ច ត្រូវបានទទួលស្គាល់ និងគាំទ្រជាខ្លាំងពីបណ្តាសាធារណៈជន។ ការធានារ៉ាប់រងមួយទៀត ដែលខ្លួនបានទទួលពី ប្រធានាធិបតីសហរដ្ឋអាមេរិច ***រីឆាត និចសុន*** **(Richard Nixon)** គឺការជួយអោយមានការចរចាសន្តិភាពជាមួយ ***សាធារណៈរដ្ឋអារ៉ាប់រួម*** **(United Arab Republic)** ក្នុងឆ្នាំ១៩៦៧ នៅខណៈពេលដែលជម្លោះមួយក្នុងចំណោមជម្លោះដ៏សន្ធឹក

រវាងអ៊ីស្រាអែល និងប្រទេសអារ៉ាប់ជិតខាងជាច្រើន (ស្គាល់ថា **សង្គ្រាមអារ៉ាប់និងអ៊ីស្រាអែល** Arab–Israeli Wars) បានកើតឡើង។

យ៉ាងណាក៏ដោយ ក្នុងឆ្នាំ១៩៧៣ និង១៩៧៤ ភាពខ្វះការប្រុងប្រយ័ត្នរបស់អ៊ីស្រាអែល សំរាប់សង្គ្រាមអារ៉ាប់និងអ៊ីស្រាអែលមួយទៀតឈ្មោះថា **សង្គ្រាមយ៉ុមគីបផួរ** (Yom Kippur War) ដែលនាំអោយមានការផ្លាស់ប្តូរអ្នកដឹកនាំថ្មី។ យ៉ាងនេះក្តី **ម៉ែរ**នៅតែអាចបង្កើតរដ្ឋាភិបាលថ្មីដដែល ក៏ប៉ុន្តែការបាក់បែកទាស់ទែងគ្នានៅតែកើតឡើង និងក្រោយមក នៅថ្ងៃទី១០ ខែមេសា១៩៧៤ **ម៉ែរ**បានលាលែងចេញពីមុខនាទីជានាយករដ្ឋមន្ត្រី។

សូម្បីតែស្ថិតក្នុងសភាពចូលនិវត្តន៍ក៏ដោយ វត្តមានរបស់**ម៉ែរ**នៅក្នុងនយោបាយគឺនៅតែសំខាន់ដដែល។ អត្តបទស្វ័យជីវប្រវត្តិរបស់**ម៉ែរ** ឈ្មោះថា My Life បានស្ថិត នៅក្នុងមនោគតិសាធារណៈជនទូទៅថា **ម៉ែរគឺជាជីដូនចិត្តល្អម្នាក់ដែលបានក្រោកឈរឡើងដើម្បីជាតិ ក្នុងគ្រាដែលប្រទេសខ្លួនកំពុងតែត្រូវការជំនួយ។** **ម៉ែរ** ទទួលអនិច្ចកម្មនៅថ្ងៃទី៨ ខែធ្នូ១៩៧៨។

## វាចារមាសរបស់ ហ្គោលដា ម៉ែរ

"អ្នកដឹកនាំដែលមិនស្ទាក់ស្ទើមុនពេលបញ្ជូលជាតិទៅច្បាំងបង្ហូរឈាមនោះមិនសក្តិសមជាអ្នកដឹកនាំនោះទេ"

"សរុបមកប្រទេសនេះជារបស់ពួកយើង មិនមាននរណាម្នាក់ចាំបាច់ក្រោកពីព្រឹក

ហើយព្រួយបារម្ភពីអ្វីដែលអ្នកជិតខាងរបស់គាត់គិតអំពីគាត់នោះទេ ឈាមជ័រជាជនជាតិជ្វីបគឺគ្មានបញ្ហាទេនៅទីនេះ"

"ដូចដែលប្រធានាធិបតីនិចសុននិយាយថា៖ ប្រធានាធិបតីជាបុគ្គលដែលអាចធ្វើកិច្ចការស្ទើរតែគ្រប់បែបយ៉ាង ហើយលោកបានធ្វើរឿងជាច្រើនដែលគ្មាននរណាម្នាក់នឹកឃើញថានឹងចង់ធ្វើ"

"អំណាចបំពុលរាល់មនុស្សគ្រប់រូបដែលយកអំណាចដាក់ខ្លួន"

"វ័យ៧០ឆ្នាំមិនមែនជាបាបកម្មនោះទេ"

"កុំដាក់ខ្លួនអី,........អ្នកមិនល្អអស្ចារ្យដូចនោះទេ"

"ការទះដៃសាទរដោយស្មោះគឺជាគ្រឿងលំអកាយដែលអ្នកសិល្បៈគ្រប់រូបត្រូវការជាធម្មជាតិ"

"ខ្ញុំជាអ្នកត្រួតត្រាពេលវេលា ដែលមិនមែនត្រូវបានពេលវេលាគ្រប់គ្រងនោះទេ"

"ខ្ញុំមិនធ្លាប់ធ្វើរឿងអ្វីមួយតែម្នាក់ឯងទេ គឺអ្វីដែលបានសម្រេចជោគជ័យក្នុងប្រទេសនេះគឺកើតឡើងដោយសារកិច្ចសហប្រតិបត្តិការទាំងអស់"

*"វាជាការពិតថាពួកយើងឈ្នះរាល់សង្គ្រាមរបស់យើង
ប៉ុន្តែយើងបានចំណាយសំរាប់វា
ដូច្នេះយើងមិនត្រូវការជោគជ័យតទៅទៀតទេ"*

*"វាមិនមានគ្រោះថ្នាក់ចោទឡើងច្រើនទេចំពោះខ្ញុំទេក្នុងការធ្វើកិច្ចការសាធារណៈ
ជាមួយបេះដូងរបស់ខ្ញុំជំនួសអោយក្បាល ហើយនរណាដែលមិនចេះយំស្រែកជាមួយ
បេះដូងរបស់គេទេនោះក៏មិនចេះសើចផងដែរ"*

*"វ័យចំនាស់គឺដូចជាយន្តហោះមួយដែលកំពុងហោះហើរឆ្លងកាត់ព្យុះមួយអញ្ចឹង
ហើយពេលដែលអ្នកនៅក្នុងនោះ អ្នកមិនអាចធ្វើអ្វីបានទាំងអស់"*

*"អ្នកមិនអាចនិងមិនចាំបាច់ ព្យាយាមលុបបំបាត់អតីតកាលនោះទេ
គឺដោយហេតុថាវាមិនសក្តិសមនឹងពេលបច្ចុប្បន្ន"*

*"ទុទិដ្ឋិនិយមគឺជាភាពឆើតឆាយដែលជនជាតិថ្មីបមិនអនុញ្ញាតអោយទាក់ទាញ
ពួកគេជាដាច់ខាត"*

*"ជនជាតិអេស៊ីបអាចរត់ទៅកាន់ប្រទេសអេស៊ីប ជនជាតិស៊ីរីអាចរត់ទៅកាន់ប្រទេស
ស៊ីរី ឯកន្លែងតែមួយគត់ដែលពួកយើងអាចរត់ទៅកាន់គឺក្នុងសមុទ្រ ដូច្នេះមុនពេល
យើងរត់ហោចណាស់ក៏ត្រូវតែប្រយុទ្ធសិនដែរ"*

"រដ្ឋាភិបាលសូវៀតគឺជារបបដែលប្រាកដនិយមបំផុតក្នុងពិភពលោកដែលគ្មានឧត្តមគតិ"

"ប្រវត្តិជាទូទៅនៃសិល្បៈទំនើបគឺជាដំណើររឿងរបស់ជនសាមញ្ញៗដែលពួកគេមិនបានចាប់អារម្មណ៍តាមដាន ពីអ្វីដែលពួកគេកំពុង ដោះស្រាយវីប្រឈម ជាមួយ"

"វាមិនមានអ្វីខុសគ្នាទេរវាងអ្នកដែលបានសម្រេចចិត្តថានឹងបញ្ជូនអ្នកដ៏ទៃទៅសម្លាប់គេ គឺដូចតែគ្នា ហើយជួនកាលវាអាក្រក់ជាងអ្នកទៅសម្លាប់ផង"

"ឆ្កែដែលដើរញាប់ជើងនោះ គឺប្រហែលជាវារកឃើញឆ្អឹងហើយមើលទៅ"

"ដើម្បីទទួលបានជោគជ័យ ស្ត្រីត្រូវតែបំពេញការងាររបស់ខ្លួនអោយបានល្អបំផុតជាងបុរស"

"មិនស្រស់ស្អាតគឺជាពរមួយដ៏ពិតប្រាកដ វាជំរុញអោយខ្ញុំអភិវឌ្ឍន៍ធនធានខាងក្នុងរបស់ខ្ញុំ ស្រីស្អាតមានពិការភាពមួយដែលត្រូវជំនះ"

"វាគ្មានអ្វីសង្ស័យទេដែលពួកបុរសៗតែស្តីបន្ទោសច្រើនជាងសរសើរ សភាវគតិរបស់គេគឺការស្តីបន្ទោស បើសិនជាគេពេញចិត្តវិញគឺមិននិយាយស្តីអ្វីទាំងអស់ តែបើមិនពេញចិត្តវិញច្បាស់ជារករឿងឈ្លោះទាំងមិនសមហេតុសមផលមិនខាន"

"យើងមិនត្រេកអរនឹងជ័យជំនះទេ យើងត្រេកអរពេលដែលកប្បាសប្រភេទថ្មីត្រូវបានដាំ និងពេលដែលស្ករប៉ូវីចេញផ្កាក្នុងទឹកដីអ៊ីស្រាអែល"

"យើងមិនធ្វើអោយចលនាយោធាលូតលាស់ទេ យើងធ្វើវាព្រោះតែយើងចាំបាច់ ហើយអរគុណព្រះជាម្ចាស់ដែលធ្វើអោយពួកយើងមានសមត្ថភាព"

"ជនជាតិជ្វីបពួកយើងមានសស្ត្រាវុធអាថ៌កំបាំងម្យ៉ាងក្នុងការប្រយុទ្ធរបស់ពួកយើងជាមួយក្រុមប្រទេសអារ៉ាប់ គឺពួកយើងគ្មានកន្លែងផ្សេងដែលត្រូវទៅនោះទេ"

"មិនដឹងដែរថាតើស្ត្រីល្អជាងបុរសនោះខ្ញុំមិនហ៊ានសន្និដ្ឋានទេ ប៉ុន្តែច្បាស់ណាស់ពួកគេមិនអាក្រក់ជាងនោះទេ"

"ការដោះលែងស្ត្រីគឺជារឿងល្ងីល្ងើខ្លាំងណាស់ ដែលវាជាការរើសអើងប្រឆាំងរបស់ពួកបុរសៗ ពួកគេមិនអាចផ្តល់កំណើតអោយកូន
ហើយវាទំនងជាគ្មាននរណាម្នាក់ធ្វើរឿងអស់ទាំងនោះទេ"

"អ្នកនឹងមិនអាចស្វែងរកដៃគូដ៏ល្អម្នាក់បានទេ បើមានតែការមិនអនុគ្រោះនោះ"

## ចុតហ្មាយ



កូនតូចរបស់ប៉ា កូនកើតក្នុងត្រកូលស្តុកស្តម្ភ
កូនមានរថយន្តជិះ មានអាហារសំបូរជីវជាតិ
ទទួលបានការអប់រំដិតដល់ រស់នៅក្នុងលំនៅដ្ឋាន
ដែលមានផាសុកភាពតាំងពីកូននៅតូច
តែបើកូនកើតក្នុងត្រកូលក្រីក្រវិញ កូនមាន
កាតព្វកិច្ចគ្រាន់តែជាអ្នកដាំបណ្តុះវាតែប៉ុណ្ណោះ







# វិធីសាស្ត្របណ្តុះក្មេង



*យើងមិនបន្ទោសដូនតារបស់ពួកយើងទេ ដែលគាត់បានយកពួកយើងមកទំលាក់ អោយរស់នៅលើទឹកដីដ៏ក្រខ្សត់មួយនេះ សឹងតែគ្មានសោះធនធានធម្មជាតិដូចជារ៉ែ ដីសំបូរជីវជាតិ ព្រៃឈើ ទឹក............... តែបែរជាអរគុណពួកគាត់ទៅវិញដែលបានដាក់លំហាត់ដ៏លំបាកមួយនេះអោយពួកយើងដោះស្រាយ។ និយាយទៅ បើសិនណាជាគ្មានលំហាត់ដ៏ស្មុគស្មាញបែបនេះទេ ម៉្លេះមិនសមភាពឆ្លាតវៀងវៃលំដាប់ខ្ពស់ជាងគេលើលោក មិនអាចធ្លាក់មកលើជនជាតិជ្វីបពួកយើងនោះទេ។*

*អ្នកអាចជ្រើសរើសបានថា **អ្នកនឹងក្លាយជាអ្នកមានបើសិនណាអ្នកជ្រើសយកជាអ្នកផលិត រឺមួយវិញទៀត អ្នកនឹងក្លាយជាអ្នកក្របើសិនណាអ្នកជ្រើសយកជាអ្នកទិញ**។ ដោយសារទស្សនះនេះហើយទើបពួកយើងជ្រើសយកជាអ្នកផលិត តើពួកយើងផលិតអ្វី? គ្មានអីក្រៅពីផលិតផលកសិកម្មទេ ផ្គត់ផ្គង់ការហូបរបស់ខ្លួនអោយបានគ្រប់គ្រាន់សិន ខណះដែលសត្រូវនៅជុំទិស ចាំវាយសន្ធាប់គ្រប់ពេលវេលាបែបនេះ សួរបកមកវិញថា ធ្វើកសិកម្មដោយរបៀបណាទៅ បើដីយើងតូច ឯជីវជាតិក៏គ្មាន ទឹកវិញរឹតតែខ្សត់នោះ។* Openyourmind ***បើកបេះដូងរបស់អ្នក*** *ជាពាក្យទី១ ដែលពួកយើងនឹកដល់ដំបូងគេ មុននឹងចាប់ផ្តើមដោះស្រាយបញ្ហាអ្វីមួយ។*

*ដោយសារតែជួបប្រទះភាពតោកយ៉ាកបែបនេះហើយ ទើបការយកចិត្តទុកដាក់ ប្រិតប្រៀង សន្សំសំចៃ ពិនិត្យតាមដាន ថែទាំត្រូវបានធ្វើអោយចំរើនឡើង។ អ្នកដឹងទេថា យើងចាត់ទុករាល់រុក្ខជាតិដែលពួកយើងបានដាំថា **វាមានវិញ្ញាណ*** Sensitive *បើវាខឹងវាអាចនឹងមិនស៊ីចំណី បើវាឈឺមិនយកវាទៅមន្ទីរពេទ្យទាន់ពេលទេវាអាចនឹងងាប់បាន។ ដូច្នេះទុកពួកវាដូចជាជីវិតមួយអញ្ចឹងដែរ គាំពារ បណ្តុះបណ្តាលពួកគេដោយរបៀបណាទើប ទាញបានអត្ថប្រយោជន៍ជាអតិបរិមាក្រោយពេលគេចំរើនវ័យឡើង។*

ចប់ត្រឹមហ្នឹងចុះពីរុក្ខជាតិ ឥឡូវងាកមកនិយាយពីមនុស្សវិញម្តង គឺការបណ្តុះកូនចៅវិញ យើងដូចជាធ្លាប់បានលឺថា ប្រទេសកម្ពុជាអ្នកមានសុភាសិតមួយនិយាយថា **"ទំពាំងស្នងឬស្សី"** តើមែនឬទេ? ពួកយើងបានពិចារណារួចហើយវាមានន័យល្អណាស់។ សម្រាប់ពួកយើងមានខ្លះដែរ តែដូចជាមិនសូវជាល្អអញ្ចឹងសោះឡើយ មិនដឹងថាដូនតាអ្នកជាមនុស្សមានចំណេះដឹងជ្រៅជ្រះយ៉ាងណាទៅណ៎ា បានជាបន្សល់នូវគតិល្អៗបែបនេះ។ សុំទោសយើងដូចជានិយាយច្រើនបន្តិចហើយ អញ្ចឹងសូមបញ្ចប់ត្រឹមហ្នឹងចុះ រួចសូមផ្តល់ឱកាសអោយអ្នកសរសេរវិញម្តង ថាតើគាត់មានមតិយ៉ាងណាដែរ? សូមអញ្ជើញ!!!!!!

អរគុណ! សូមឆ្លើយតបនឹងសម្តីខាងលើបន្តិចត្រង់ពាក្យថា **"ទំពាំងស្នងឬស្សី"** ជាការពិតណាស់ វាមាន មែន ហើយនិយាយពេញៗមាត់ពីម្នាក់ទៅម្នាក់សឹងតែថាកូនក្មេងក៏ចាំដែរ អត្ថន័យរបស់វាស្មើនឹង **"រលកក្រោយប្រានរលកមុខ"** គឺថាអ្នកដែលនឹងមកជំនួសមនុស្សចាស់ត្រូវតែក្មេងជំនាន់ក្រោយ។ តែបញ្ហាក់ថា នៅស្រុកខ្មែរយើងប្រជាពលរដ្ឋនិយមបរិភោគទំពាំងណាស់ កត្តានេះហើយជាហានិភ័យសម្រាប់ឬស្សី តើត្រូវធ្វើខ្លួនយ៉ាងណា ដើម្បីកុំអោយក្រុមមនុស្សទាំងនោះអាចចូលកាត់យកទំពាំងរបស់ខ្លួនយកទៅឆីបាន? ត្រូវដុះចេញនូវបន្លាខ្វាត់ខ្វែង ច្រវែងច្រវាងជាឧបសគ្គដល់អ្នកដែលប៉ងមកកាត់ឬមួយក៏......(គិតបន្តិច) ចុះបើអញ្ចឹងៗ តើទំពាំងទាំងនោះនឹងដុះធាត់យ៉ាងម៉េចទៅទេ។ ដូច្នេះហើយវាទាមទារនូវដំណោះស្រាយ១ដែល **"ឆ្លាតហើយពេញដោយយុទ្ធសាស្រ្ត គ្មានប្រជាប្រិយតែមានប្រសិទ្ធិភាពខ្ពស់"** ក្នុងការដោះស្រាយវិបត្តិនេះ វាគឺ**ការសិក្សារៀនសូត្រ** ដែលជាជំរើសទី១ហើយចុងក្រោយគេបង្អស់ដែរ។ ធ្លាប់លឺគេនិយាយទេថា **"មនុស្សឆ្លាតរៀនពីបទពិសោធន៍អ្នកដទៃ ឯមនុស្សល្ងង់ចាំតែរៀនពីបទពិសោធន៍ខ្លួនឯងប៉ុណ្ណោះ ចំណែកមនុស្សមហាល្ងង់វិញសូម្បីតែបទពិសោធន៍ខ្លួនឯងក៏រៀនមិនបានផង"** ដូច្នេះបទពិសោធន៍ដែលនឹងត្រូវរៀនសូត្រត្រង់នេះជាបទពិសោធន៍នៃការបណ្តុះបណ្តាលកូនចៅ។ យកមកពីណា?ពីសាសនា

ធំៗលើលោក តែសូមលើកយកមកពីសាសនាតែ៣ទេ មូលហេតុដោយសារតែពេលវេលាស្រាវជ្រាវមានកំណត់ ប៉ុន្តែមិនថ្វីទេ បើអ្នកទាំងអស់គ្នាចង់ដឹងបន្ថែមអាចធ្វើការស្រាវជ្រាវបន្ថែមដោយខ្លួនឯងបានព្រោះ **"អ្នកដែលស្វែងរកគេនឹងជួបអ្នកដែលសួរគេនឹងទទួលចម្លើយ អ្នកដែលទៅគោះទ្វារនោះទ្វារនឹងបើក"** "someone seek found,ask received, knock the door it will open"។ ខាងក្រោមនេះ ជាមេរៀនសង្ខេបស្តីពីការទូន្មានរបស់សាសនានីមួយៗ អំពីវិធីសាស្ត្រក្នុងការបណ្តុះបណ្តាលកូនចៅដែលដកស្រង់ចេញពីសៀវភៅពាក្យលផ្សេងគ្នាវាមានដូចតទៅនេះ ៖៖៖៖៖










យេស៊ូគ្រីះ | សាមណគោត្តម | ជូដា

## ១.វិធីសាស្ត្ររបស់អ្នកកាន់គ្រីះសាសនា

វិធីសាស្ត្រនៃការចិញ្ចឹមបីបាច់កូនចៅ អោយពួកគេមានសុភមង្គល និងផាសុខភាពល្អ គឺជាមេរៀនដែលមិនត្រូវបានបង្រៀនទៅដល់ឪពុកម្តាយភាគច្រើននោះទេ។ អ្នកនឹងបានដឹង និង ស្វែងយល់បន្ថែម ពីរបៀបនៃការបណ្តុះបណ្តាលកូនចៅដែល

ប្រាសចាកការបំបាក់ទឹកចិត្តក្មេង អោយពួកគេមានក្តីស្រលាញ់ចំពោះគ្រួសារ សង្គម ជាតិ ជាពិសេសពីរបៀបនៃការជួយពួកគេដោះស្រាយភាពរកាំចិត្ត ទុក្ខព្រួយប្រចាំថ្ងៃ និងវិបត្តិផ្លូវចិត្តក្នុងជីវិតរស់នៅរបស់ពួកគេ។ ការចិញ្ចឹមកូនគួរតែជាការកំសាន្តមួយ ហើយគោលការណ៍នៃការចិញ្ចឹមកូន ត្រូវតែអាចធានាបានថា ពួកគេមានសុភមង្គល ក្តីស្រលាញ់ និងមានប្រយោជន៍ជាសមាជិកដ៏មានតំលៃម្នាក់នៅក្នុងសង្គមដែលគេកំពុងរស់នៅ។

## ១. រស់នៅជាមួយគ្នាដោយរបៀបណា

កូនមនុស្សមិនមែនជាកូនឆ្កែទេ ពួកគេមិនត្រូវបានបង្ហឹកដូចដែលយើងបង្ហឹកឆ្កែនោះទេ។ មនុស្សជាម្ចាស់ឆ្កែ ពីព្រោះមនុស្សមានការសម្រេចចិត្តផ្ទាល់ខ្លួន ប៉ុន្តែសត្វឆ្កែវិញគ្មានទេ។ បង្ក្រាត់គេ គ្រប់គ្រងគេនោះអ្នកនឹងបាត់បង់ក្តីស្រលាញ់ពីគេ ហើយអ្នកនឹងបាត់បង់កូនជារៀងរហូតបើសិនណាអ្នកព្យាយាមគ្រប់គ្រង និងធ្វើជាម្ចាស់លើគេ។ វាជាការពិតណាស់ថា អ្នកនឹងប្រទះការលំបាកពិតៗ បើសិនណាកូនរបស់អ្នកត្រូវបានបង្ហឹកហាត់ គ្រប់គ្រង បញ្ជា បដិសេធភាពជាម្ចាស់លើខ្លួនឯងរួចទៅហើយនោះ។ សូមកុំធ្វើជាម្ចាស់លើពួកគេ ពេលនោះគេនឹងក្លាយជាម្ចាស់លើខ្លួនឯងគ្រប់ពេលវេលា ជាឧទាហរណ៍នៅពេលដែលអោយអ្វីមួយទៅកូន នោះវាជារបស់កូនហើយ វាមិនមែនជារបស់អ្នកទៀតទេ សំលៀកបំពាក់ គ្រឿងក្មេងលេង........ត្រូវតែស្ថិតក្រោមការចាត់ចែងរបស់គេ ទោះបីជាគេចង់ហែកសំលៀកបំពាក់ចោល កាច់កាំភ្លើងបាញ់ទឹកចោល.......វាមិនមែនជារឿងរបស់អ្នកទៀតទេ ជាក់ស្តែងអ្នកបានអោយជីវិតមួយទៅពួកគេ ដូច្នេះវាជារបស់ពួកគេ អនុញ្ញាតអោយពួកគេមើលការខុសត្រូវ ចាត់ចែង សម្រេចចិត្ត គឺជារឿងដ៏ត្រឹមត្រូវមួយ។ ចាំទុកថា គេនឹងធ្វើការតស៊ូប្រឆាំង ដើម្បី "**ភាពជាម្ចាស់**" របស់គេ ព្រោះវាជាកាតព្វកិច្ចដែល

*គេត្រូវធ្វើ ក្នុងនាមជាមនុស្ស។ "**ផ្តល់សេរីភាពដល់កូន មានន័យថាផ្តល់សេរីភាពដល់ខ្លួនឯង បរិច្ចាគភាពជាម្ចាស់ទៅអោយកូន មានន័យថាផ្តល់ភាពសុខសាន្តដល់ភាពជាម្ចាស់របស់កូន**"។*

## ២. សិទ្ធក្នុងការចូលរួមលះបង់របស់កូន

*អ្នកគ្មានសិទ្ធប្រកែកចំពោះសិទ្ធក្នុងការចូលរួមបរិច្ចាគរបស់កូនអ្នកទេ។ ឪពុកម្តាយជាទូទៅច្រើនតែធ្វើការបរិច្ចាគច្រើន ជាជាងកូនបរិច្ចាគមកវិញ លក្ខខ័ណ្ឌបែបនេះហើយធ្វើអោយពួកគេមិនសូវសប្បាយចិត្តឡើយ។ ពួកគេព្យាយាមបង្កើនកំរិតនៃការបរិច្ចាគរបស់គេ ហើយបើវាមិនបានសម្រេចទេពួកគេនឹងមានកំហឹង ហើយចាប់ផ្តើមស្អប់ខ្ពើមឪពុកម្តាយរបស់គេ។ អ្នកចាំបាច់ **អនុញ្ញាត**អោយកូនចូលរួមបរិច្ចាគមកអោយអ្នក អ្នក**មិនអាចបញ្ឈា**គេអោយបរិច្ចាគនោះទេ អ្នក**មិនអាចបង្គាប់**អោយគេលាងចានរួចហើយគិតថានេះជាការបរិច្ចាគនោះទេ។ កូនម្នាក់ដែលធ្វើការបរិច្ចាគ តាមរយៈការព្យាយាមធ្វើអោយម្តាយសប្បាយចិត្ត ដោយគេនឹងបង្ហាញតាមសកម្មភាពមួយចំនួន ដូចជារាំអោយម្តាយមើល លើកទឹកតែជូនម្តាយ ហុចនេះហុចនោះពេលម្តាយកំពុងធ្វើម្ហូប ធ្វើត្រាប់តាមកិច្ចការផ្ទះដែលម្តាយធ្លាប់ធ្វើ ហើយបើសិនជាម្តាយព្រងើយកន្តើយនឹងទង្វើអស់ទាំងនោះ គាត់បានចាប់ផ្តើមបង្អាក់ការបរិច្ចាគរបស់កូនហើយ។ កូននឹងគិតថាខ្លួនមិនមែនជាចំណែកមួយនៃគ្រួសារទេ ព្រោះគេមិនអាចចូលរួមបរិច្ចាគសម្រាប់គ្រួសារ។ កូនមានភារកិច្ចផ្តល់អោយអ្នក គេអាចមើលថែទាំអ្នកបាន មិនមែនជាការសម្តែងទេ តែវាជាការពិត ដូច្នេះអ្នកត្រូវតែអត់ធ្មត់សង្កត់ចិត្ត អនុញ្ញាតអោយខ្លួនឯងត្រូវបានយកចិត្តទុកដាក់ពីគេដោយជៀសវាងការសម្តែងអារម្មណ៍ធុញទ្រាន់ជាដាច់ខាត។*

## ៣. ដោះស្រាយជាមួយនឹងក្តីប្រាថ្នារបស់កូន

**តើកូនអាចសម្រេចបានជោគជ័យដោយមិនមានការបង្ខិតបង្ខំបានដែររឺទេ?**

បើសិនណាអ្នកចង់អោយកូនចេះលេងឧបករណ៍តន្ត្រី ហើយអោយគេទៅរៀនលេង ដោយមិនបានពិគ្រោះយោបល់ជាមួយគេជាមុនសិនទេ នោះសមត្ថភាពក្នុងការលេងភ្លេងរបស់គេនឹងមិនមានការរីកចំរើនឡើយ។ ការសួរចិត្តគេ ថាតើគេពេញចិត្តសុខព្រមលេងភ្លេងដែររឺអត់នោះ គឺជារឿងដែលចាំបាច់ត្រូវតែធ្វើខានមិនបាន។

ជាឧទាហរណ៍បើកូនអ្នកជាក្មេងខូច ខ្ជិលរៀន ហើយអ្នកបញ្ជូនគេអោយទៅសាលាយោធា ដោយគិតថាការបង្ខំគេបែបនេះនឹងធ្វើអោយគេកែប្រែបាន វាគឺជាការយល់ខុសមួយទៅវិញទេ។ កូនគួរតែបានសួរពីចំណង់ចំណូលចិត្ត ហើយត្រូវបានបញ្ជូនអោយទៅសិក្សាស្វែងយល់ពីអ្វីដែលជាការចូលចិត្តរបស់គេ ដោយតែងតែចាប់ផ្តើមពីសំណួរមួយនេះជានិច្ចថា "**តើមិនមានការងារអ្វីមួយដែលកូនចូលចិត្តធ្វើទេរឺ?**" "Isn't there anything you would like to do?"។ ជាទូទៅអ្នកដឹងទេចំលើយរបស់ពួកគេគឺអ្វី គឺ**គ្មានទេ** ដូច្នេះកុំទាន់បង្ខំអោយគេគិតសម្រេចចិត្តភ្លាមៗអី ប្រាប់គេទៅវិញថា កូនអាចជជែកសួរនាំខ្លួនឯង មិត្តភ័ក្រ្ត រឺមួយនរណាដែលកូនទុកចិត្តបាន ដើម្បីដឹងថាខ្លួនកូនមានចំណូលចិត្តលើកិច្ចការអ្វីដែរ។ ជាចុងក្រោយ នៅពេលដែលកូនបានគិតឃើញហើយប្រាប់អ្នកថា គេចង់ក្លាយជាគីមីវិទូនោះ វាមិនចាំបាច់មានអ្នកបញ្ជូនគេអោយទៅរៀន អោយគេខិតខំអានសៀវភៅ និងគ្មានអ្នករអ៊ូរទាំច្រើននៅពេលដែលគេធ្វើអោយខូចខាតរបស់របរនៅក្នុងមន្ទីរពិសោធន៍ដែរ គ្មានទេអ្នកដែលមកបង្អាក់សេចក្តីប្រាថ្នារបស់គេ អ្នកគិតទៅមើល តើលទ្ធផលវានឹងទៅជាយ៉ាងណា?

មនុស្សនឹងអនុញ្ញាតអោយអ្នកយករបស់អ្វីមួយពីគេបាន លុះណាតែអ្នកយកតាមរបៀបសមរម្យ និងមិនធ្វើអោយគេអាក់អន់ រឺរកាំចិត្ត។ ហើយមធ្យោបាយដែលនាំអោយកូនក្លាយជាមនុស្សលោភលន់ និងអាត្មានិយម គឺបណ្តាលមកពីអ្នកប្រឆាំង

នឹងបំណងប្រាថ្នារបស់គេ និងបង្គាប់អោយគេធ្វើការលះបង់របស់របរខ្លួនអោយទៅអ្នកដទៃ។ ឪពុកម្តាយជាទូទៅកំរនឹងធ្វើការសាកសួរយោបល់ពីក្តីស្រមៃរបស់កូនៗណាស់ ពួកគាត់ច្រើនតែនិយាយច្រើនទៅលើអ្វីដែលកូនមានស្រាប់ ដូចយ៉ាងបំណិនប្រសប់ផ្ទាល់ខ្លួន និងគុណសម្បត្តិល្អៗ របស់កូន ទៅវិញ ដែលវាមិនបានធ្វើអោយកូនរីកចំរើនទេ តែបែរជាធ្វើអោយគេទំរើស អំនួតក្អេងក្អាងនឹងខ្លួនទៅវិញ។

កូនក្មេង មិនចូលចិត្តអោយនរណាចង្អុលអោយធ្វើនេះអោយធ្វើនោះ ដោយគ្មានការសុំយោបល់ទេ ប៉ុន្តែប្រសិនជាអ្នកអាចនិយាយជាមួយក្មេង ហើយកាលបើគេពេញចិត្ត មានការចុះសំរុង និងមានទំនាក់ទំនងល្អជាមួយគេនោះ អ្នកអាចប្រើអោយគេធ្វើអ្វីៗគ្រប់យ៉ាងបានទាំងអស់។ បណ្តោយអោយក្មេងៗធ្វើនូវអ្វី ដែលគេកំពុងធ្វើទៅ កុំជ្រៀតជ្រែក និងមិនត្រូវព្យាយាមគ្រប់គ្រងគេជាដាច់ខាត នេះគឺជាចិត្តសាស្ត្រ។ យល់ស្របទេថា ក្មេងគ្មានកាតព្វកិច្ចនឹងផ្លាស់ប្តូរការគិត ការងារដែលខ្លួនកំពុងធ្វើឡើយ ប៉ុន្តែពួកអាចបើសិនជាមាន**ទំនាក់ទំនងល្អ** មិនមែនដោយសារការបញ្ចុះបញ្ចូលទេតែទំនាក់ទំនងល្អ។

## ៤. អនុញ្ញាតអោយកូនកាន់ការងារផ្ទាល់ដៃ

គ្មានអ្វីសង្ស័យទេថា ពលកម្មលើកុមារត្រូវបានចាត់ទុកថាបំពានច្បាប់ ដូចយ៉ាងក្មេងធ្វើការហួសកលាំង ជាបុព្វហេតុធ្វើអោយ ការលូតលាស់រូបរាងកាយ ចិត្តគំនិត និងចំនេះដឹងរបស់ក្មេងត្រូវបានរាំងស្ទះ។ នៅទីកន្លែងណាដែលមានការបំពារបំពានច្បាប់លើករណីបែបនេះ វានឹងមានការប្រឆាំងទាមទារជាក់ជាមិនខាន ហើយច្បាប់នឹងត្រូវបានអនុម័តឡើងដើម្បីបង្ការក្មេងៗពីការបង្ខំអោយធ្វើការងារធ្ងន់ធ្ងរទាំងនោះ។

ការបង្ខាំងកូនមិនអោយធ្វើការងារ ហើយជាពិសេសការហាមឃាត់ក្មេងជំទង់ៗ មិនអោយស្វែងរកផ្លូវជីវិតដោយខ្លួនគេផ្ទាល់ រកប្រាក់ចំណូលដោយខ្លួនឯង បង្កើត

គ្រួសារផ្ទាល់ខ្លួន វានឹងធ្វើអោយពួកគេមានអារម្មណ៍ថាពិភពលោកនេះមិនត្រូវការគេទេ ម្យ៉ាងគេបានបាត់បង់ជោគជ័យមុនពេលគេចាប់ផ្តើមប្រកួតរួចទៅហើយ។ ក្មេងពិតជាចង់ធ្វើការណាស់ នៅពេលគេមានអាយុ២ រឺ៥ឆ្នាំ គេតែងទទូចឪពុកម្តាយរបស់គេ សុំជួយធ្វើការនេះធ្វើការនោះ យកសំរាមចាក់ចោល លាងចាន......... ហើយជាការល្អ ឪពុកម្តាយត្រូវតែអត់ធ្មត់ទទួលយកការជួយជ្រោមជ្រែងនោះ ដើម្បីលើកទឹកចិត្តកូន និងអោយគេសម្រេចបាននូវបំណងសង្គ្រោះរបស់គេផង។

បច្ចុប្បន្ន ក្មេងត្រូវបានអប់រំមិនអោយធ្វើការងារអ្វីទេ ដូច្នេះគេនឹងទទួលអារម្មណ៍ថាដូចជាមិនស្រណុកចិត្តសោះ មិនច្បាស់ការជឿជាក់លើខ្លួនឯង នៅពេលគេទទួលធ្វើកិច្ចការអ្វីមួយ។ ពេលគេឈានចូលដល់វ័យជំទង់ គេត្រូវបានបញ្ចៀសពីប្រភេទការងារដែលបើកដៃអោយគេទិញសំលៀកបំពាក់ជាច្រើន និងរាប់អានមិត្តភ័ក្ត្រដែលត្រូវដងត្រូវថ្លៃនឹងគេទេ វាធ្វើអោយគេគិតថាខ្លួនឯងដូចជាមនុស្សក្រៅសង្គមម្នាក់អញ្ចឹង មិននៅក្នុងសង្គម គេក៏ចាប់ផ្តើមបំផ្លាញសង្គម។

## ៥. ដោះស្រាយនឹងការអាក់អន់ចិត្ត និងគ្រោះថ្នាក់ជាអកុសល

នៅទីនេះ វិធីសាស្ត្រជាច្រើននឹងត្រូវបានផ្តល់អោយឪពុកម្តាយសម្រាប់ប្រើក្នុងការជួយកូន អោយឆាប់សះស្បើយឡើងវិញពី របួសស្នាម ជម្ងឺដំង្កាត់ ការភ័យតក់ស្លុត និងវិបត្តិផ្លូវចិត្ត ដូចកូនៗតែងតែជួបប្រទះជាញឹកញាប់ក្នុងកំឡុងពេល លូតលាស់ចំរើនវ័យរបស់គេ។ បច្ចេកទេសសំខាន់បំផុតដែលត្រូវបានចាត់ទុកជា ភ្នាក់ងារព្យាបាលរោគពួកគេនោះ គឺ**ការប្រស្រ័យទាក់ទងផ្ទាល់រវាងឪពុកម្តាយជាមួយនឹងកូន**។

សកម្មភាពមួយចំនួនរ៉ាយរ៉ាប់ខាងក្រោមនេះ ចាត់ទុកជា**ឧបករណ៍សង្គ្រោះ** ជាសកម្មភាពដែលទទួលរ៉ាប់រងក្នុងការជួយបុគ្គលណាម្នាក់ អោយបានធូរស្រាលពីបញ្ហា

សៅហ្មងថ្មីៗ។ **ឧបករណ៍សង្គ្រោះ**នេះ គួរតែប្រើបាញ់ឆ្ពោះទៅលើការសង្គ្រោះខាងជម្ងឺដំង្កាត់ និងរបួសផ្សេងៗ ហើយវាមានដូចតទៅនេះ ៖៖៖៖

## របួសកុមារភាព

មានវិធីជាច្រើនជួយកូននៅពេលគេធ្វើអោយបែកកញ្ចាក់នៅក្នុងផ្ទះ វិមួយក៏មុតដៃនឹងកញ្ចាក់នោះ គឺថាបើគេនៅក្មេងខ្ចីនោះ អនុញ្ញាតអោយគេយំអោយអស់ចិត្តទៅវាជាការស្រេចហើយ។ នៅពេលកូនស្រែកឈឺ ឪពុកម្តាយតែងតែប្រើពាក្យពេចន៍លួងលោម ដែលកូនតែងលឺ តែងស្តាប់រាប់រយដងរួចមកហើយនៅពេលពួកគេត្រូវរបួសរបៀបៗនេះ ហាក់ដូចរំលឹកគេពីការត្រូវរបួសមុនៗអញ្ចឹងដែរ បើជាការល្អព្យាយាម**កុំនិយាយ**អីល្អជាង។ វាជាការលំបាកបន្តិចក្នុងការទំលាប់ខ្លួនមិននិយាយស្តីនៅពេលកូនត្រូវរបួស ប៉ុន្តែមិនជាការលំបាកទេសម្រាប់ការបន្ទុំខ្លួនអោយនៅស្ងៀមស្ងាត់នោះ។ ជាទូទៅ បើមិនមានការនិយាយអីទេនោះ ក្មេងនឹងយំច្រើនណាស់២ទៅ៣នាទីប៉ុណ្ណឹងឈប់ហើយ ក្រោយមកគេនឹងឈប់យំ ញញឹម រួចហើយនឹងត្រឡប់ទៅសភាពដើមមុនពេលគេត្រូវរបួសវិញជាមិនខាន។ ទុកអោយគេយំ ប្រៀបបាននឹងការជួយរំសាយភាពតានតឹងពីការឈឺចាប់អញ្ចឹង ដោយមិនចាប់ចាំប្រើវិធីជំនួយអីផ្សេងទេ។



បើសិនណាជាក្មេងមិនឈប់ឈឺចាប់ដោយឯកឯងនោះទេ គឺនៅតែបន្តរង់ចាំគេដដែល ហើយបើគេនៅតែយំទៀត ប្រហែលវាបណ្តាលមកពីវាជារបួសស្នាមចាស់រើឡើងក៏មិនដឹង (ឈឺមធ្យមទេ សុំកុំអោយលាប់) ករណីនេះការផ្តល់ជំនួយពិតជាមានតំលៃណាស់។ សួរគេថា "តើមានអ្វីកើតឡើងកូន? តើកូនត្រូវរបួសដោយរបៀបម៉េចទៅ? ប្រាប់ប៉ា រឺម៉ាក់មកមើល៎"។



!!! ក្មេងដែលបង្កការឈឺចាប់ដោយខ្លួនឯងគឺត្រូវតែបានទទួលការសង្គ្រោះដោយការប្រសិយទាក់ទងយ៉ាងស្និតរមួត



!!! បង្កលក្ខណៈអោយគេពន្យល់ពីដំណើរដើមទងនូវអ្វីដែលបានកើតឡើង ចាត់ទុកថាជាវិធីព្យាបាលចិត្តសាស្រ្តមួយ៉ាង



!!! និយាយទៅកាន់នរណាម្នាក់ដែលបានចាប់អារម្មណ៍ស្តាប់នោះ នឹងធ្វើអោយក្មេងបានរសាយការឈឺចាប់ផ្លូវចិត្ត និងធ្វើអោយគេមានអារម្មណ៍ល្អឡើងវិញ

## ចង្អុលបង្ហាញការប្រុងប្រយ័ត្នទៅកូន

ឪពុកម្តាយជាច្រើនទម្លាប់ប្រាប់ទៅកូនថា "កុំធ្វើនេះកុំធ្វើនោះ រឺមួយកូននឹងត្រូវគ្រោះ" "កូននឹងគ្រោះថ្នាក់ បើសិនណាកូននៅតែបន្តធ្វើវា" និងការទូន្មានដ៏ទុទិដ្ឋិនិយមដ៏ច្រើនឥតគណនា។ ពួកគាត់ក៏ប្រើប្រយោគរាប់ពាន់ផងដែរ ដែលចាប់ផ្តើមពីពាក្យ **"កុំ" "មិនអាច" និង"ប្រយ័ត្នខ្លួន"** កន្លែងនេះដែលឪពុកម្តាយគ្រប់រូបត្រូវប្រយ័ត្នលើការប្រើឃ្លាអស់ទាំងនេះ ហើយជៀសវាងការប្រើវាអោយបានតិចបំផុតតាមដែលអាចធ្វើទៅបាន។ វាមិនមែនជាការលំបាកទេក្នុងការស្វែងរកវិធីធ្វើអោយកូនមានសុវត្ថិភាពដែលអាចជៀសផុតពីការប្រើការបង្ខាំងដោយសម្តីម៉ាត់ៗ ក្នុងករណីនេះការពន្យល់ណែនាំពីហេតុផលគឺជារឿងវិជ្ជមានគួរប្រកាន់យក ដូចយ៉ាងការបង្ហាញថានឹងមានអ្វីកើតឡើងនៅពេលកែវធ្លាក់មកដី វានឹងផ្តល់ជាគំនិត ជាងការស្រែកអោយ "កុំទៅប៉ះកែវ!!!! រឺដាក់វាចុះ!!!!"។

អាកប្បកិរិយាទន់ភ្លន់ ស្លូតបូត រាបសា និងសម្លេងតិចៗមួយៗ ជាកាយវិការដ៏មានប្រសិទ្ធភាពក្នុងការបង្វែរចិត្តកូនអោយស្តាប់បង្គាប់ ហើយបើនរណាចង់ទទួលបានការដោះស្រាយយ៉ាងជោគជ័យលើកូន គេត្រូវតែពង្រឹងសមត្ថភាពបន្ថែមលើកត្តាអស់ទាំងនេះ។

## កំហឹង

កូននឹងរៀបរាប់ពីព្រឹត្តការណ៍នៃការស្តីបន្ទោសដែលពួកគេបានទទួល បើសិនណាយើងបានសម្តែងជាអ្នកស្តាប់យ៉ាងយកចិត្តទុកដាក់ ហើយលើកទឹកចិត្តគេអោយបង្កើតព្រឹត្តិការណ៍នោះឡើង។ សួរទៅកូនថា "មូលហេតុអ្វីបានជាកូនមានអារម្មណ៍មិនល្អបែបនេះ?" រឺមួយក៏ "តើប៉ា រឺម៉ាក់បាននិយាយអ្វីខុស បានជាធ្វើអោយកូនទទួល

*អារម្មណ៍បែបនេះ?" ការសួរដូច្នេះ វានឹងជួយសម្រាលដល់អារម្មណ៍មួម៉ៅ និងធ្វើអោយចេញមកក្រៅនូវអារម្មណ៍តប់ប្រមល់ អន្ទះអន្ទែងរបស់កូននាពេលថ្មីៗ ដែលជាវិធីមួយជួយកាត់បន្ថយភាពតានតឹងផ្លូវចិត្តរបស់កូនមួយកំរិតដែរ។*

*បើសិនកូនកំពុងតែមានកំហឹង ទុកអោយគេខឹងចុះមិនអីទេ ទោះបីក្នុងករណីអ្នកគឺជាជនរងគ្រោះក្នុងរឿងនោះក៏ដោយ អោយគេបញ្ចេញកំហឹងនោះចេញមកព្រោះជាទូទៅវានឹងបាត់រលត់ទៅវិញយ៉ាងឆាប់រហ័ស។ ផ្ទុយទៅវិញ បើអ្នកព្យាយាមប្រតិកម្មតប ហើយធ្វើការសង្កត់សង្កិនទៅគេវិញ វានឹងធ្វើអោយស្ថានការណ៍នឹងទៅជាអាក្រក់ជាងនេះ និងនៅតែកើតជាបន្តទៅមុខទៀតមិនងាយចប់ឡើយ។ ជាការធ្វើកើតមានថាមពលនៃការរំសាយចិត្ត និងស្ថានភាពប្រសើរដូចដើមឡើងវិញ ខណៈយើងសុខព្រមអោយកូនបញ្ចេញកំហឹងរបស់ខ្លួនអោយអស់ ហើយមិនខ្វីប្រតិកម្មតបឡើយនោះដូចដែលថា* ***"កែវកំពុងក្តៅកុំទាន់ចាក់ទឹកត្រជាក់ចូលអោយសោះ"*** *។*

## *<u>ការភ័យខ្លាច</u>*

*បើសិនណាកូនស្ថិតក្នុងសភាពភ័យខ្លាច អនុញ្ញាតអោយគេនិយាយវាចេញមកហើយផ្តល់អោយគេនូវការលើកទឹកចិត្ត ព្រោះវាជាវិធីសាស្ត្រមានប្រសិទ្ធភាពម្យ៉ាងក្នុងស្ថានភាពបែបនេះ។ កំដរកូន អោបក្រសោប ផ្តល់ភាពកក់ក្តៅអោយគេជាមួយនឹងក្តីស្រលាញ់ រហូតគេបានគ្រាន់បើ រួចទើបសួរគេពីដំណើរដើមទងដែលធ្វើអោយគេភ័យខ្លាច ហើយនិយាយជាមួយគេពីរឿងនោះចុះឡើងៗរហូតទាល់តែគេលែងមានអារម្មណ៍ថានៅភ័យខ្លាចទៀត រួចបង្វែរគេអោយទៅនិយាយពីអនុស្សាវរីយ៍គួរអោយរីករាយវិញ ដើម្បីបន្លប់គេកុំអោយនឹកឃើញដល់រឿងដែលគួរអោយភ័យខ្លាចនោះទៀត។*

*បើកូនខ្លាចមិនហ៊ានដេកម្នាក់ឯង កុំនៅបន្តអោយការភ័យខ្លាចនេះនៅញាំញីគេអោយសោះ ដេកកំដរជាមួយគេ ហើយនាំគេជជែកពីវារហូតទាល់តែក្នុងចិត្តគេបានរសាយ ទោះបីជាវិធីនេះត្រូវការប្រើពេលយូរក៏ដោយ។ ខណៈពេលសួរអំពីការភ័យខ្លាចរបស់កូន យើងអាចប្រើឃ្លា* "**ដូចជា**"*។ ពេលកូនប្រាប់ថាគេខ្លាចភាពងងឹត សួរទៅគេថា "តើមានអ្វីទៅដែលមានលក្ខណៈដូចនឹងភាពងងឹត?" ដែលការសួរបែបនេះវាធ្វើអោយគេវិភាគទៅលើការភ័យខ្លាចរបស់គេ។ ប្រហែលជាអ្នកមិនបានទទួលនូវជោគជ័យទេនៅសំណួរដំបូង ប៉ុន្តែបើអ្នកព្យាយាមដោយអត់ធ្មត់ នោះអ្នកនឹងទទួលបានចម្លើយឆាប់ៗ ដែលប្រាប់អ្នកពីឧប្បត្តិហេតុដែលកូនជំពាក់ចិត្តជាមួយ ពេលនោះហើយអ្នកអាចជួយដោះស្រាយកូន ដោយការនាំគេនិយាយពីរឿងរ៉ាវដែលបានកើតឡើងទាំងស្រុង ស្តាប់ទាំងអស់គ្នា គិតទាំងអស់គ្នា ដោះស្រាយទាំងអស់គ្នា។*

## ***<u>ភាពសោកសៅ</u>***

*ពេលកូនកំពុងមានទុក្ខព្រួយ ការចាប់ផ្តើមដ៏ប្រសើរគឺសួរគេថា "តើគេកំពុងយំពីរឿងអី?" ហើយក្រោយពេលដែលគេឆ្លើយរួច សួរគេពីដំណើររឿងអោយបានក្បោះក្បាយ។ បន្ទាប់មក នៅពេលដែលកូនអន់យំហើយ អ្នកអាចសួរគេថា "តើកូននឹងយំរឿងអីទៀត?"។ ការពិតទៅ ការដែលបណ្តោយអោយកូនយំរហូតគេឈប់ (អស់ខ្យល់) ជាការជួយគ្រប់គ្រាន់មួយរួចទៅហើយ ជាពិសេសនៅពេលអ្នកជាមនុស្សជំនិតនឹងកូន គេអាចទុកចិត្ត និងពំនាក់អាស្រ័យបាន។*

*កុំហាមឃាត់គេមិនអោយយំដោយប្រើពាក្យថា***ឈប់យំ***អោយសោះ។ ដោះស្រាយបុព្វហេតុដែលបណ្តាលអោយគេយំ ដោយការសួរពីអ្វីដែលបានកើតឡើង ហើយអោយគេនិយាយវាចេញអោយអស់រហូតទាល់តែគេអស់ព្រួយ មានសំណើច*

វិញបាន រឺក៏ទុកអោយគេយំអោយអស់ចិត្តខណៈអ្នកកំពុងបបោសអង្អែល រឺអោបគេនោះ។ ទេសៈកាលៈនេះ មិនចាំប្រើពាក្យសម្តីអ្វីទេ ក្រៅពីអត់អោន។

## ចិត្តស្រាល

ពេលកូនមួម៉ៅក្តៅក្រហាយប៉ះមិនបាន យើងអាចជួយគេបានដោយបង្វែរសតិរបស់គេ ដូចយ៉ាងនិយាយរឿងនិទានថ្មីៗដែលទាក់ចិត្តរបស់គេ បង្ហាញសៀវភៅគំនូររូបភាព រឺក៏របស់លេងចម្លែកៗ.....ដែលវាមានការស្រូបទាញណាស់ចំពោះកូនតូចៗ។ ថ្វីត្បិតតែនេះជាវិធីចាស់កំរិលបន្តិច ប៉ុន្តែគេអាចយកជាការបាន។ ចូរសង្កេតថា បើកូនមិនសប្បាយចិត្តទេ នោះវាបញ្ជាក់ថាគេកំពុងតែធុញទ្រាន់នឹងរឿងអ្វីមួយជាមិនខាន ហើយគេកំពុងស្វែងរកអ្វីដែលថ្មី ប៉ុន្តែគេនៅរកមិនទាន់ឃើញនៅឡើយ នេះហើយជាឱកាសដែលយើងអាចធ្វើអោយគេរីករាយឡើងវិញ ដោយការផ្តល់អោយគេនូវរបស់អ្វីម្យ៉ាងដែលទាក់ចិត្ត ស្រស់ស្រាយ......។

បើនៅតែមិនទាន់មានប្រសិទ្ធភាពទៀត អ្នកអាចធ្វើអោយគេបានស្បើយតាមការនាំគេមកបង្ហឹកសាច់ដុំកាយ ដូចការលេងកីឡាចំបាប់ជាមួយគេ រឺក៏លំហាត់ប្រាណផ្សេងទៀតដែលធ្វើអោយគេស្វាហាប់មាំមួន។ ពេលដែលស្គាល់ចិត្តគេបានហើយ ពេលនោះយើងអាចសួរគេបានខ្លះៗ ពីរឿងសប្បាយៗដែលគេធ្លាប់បានជួបកន្លងមក ហើយច្បាស់ណាស់នៅគ្រាដំបូងគេពិតជាស្ទាក់ស្ទើរក្នុងការនិយាយប្រាប់បន្តិច តែមិនថ្វីទេ សូមព្យាយាមលើកទឹកចិត្តគេបន្តទៅទៀត នោះចុងក្រោយគេនឹងរៀបរាប់ចេញមកយ៉ាងក្បោះក្បាយពីអនុស្សាវរីយ៍ដ៏រីករាយ ដែលមិនអាចបំភ្លេចបានរបស់ខ្លួនជាក់ជាមិនខាន ហើយរំពេចនោះអ្នកនឹងឃើញច្បាស់នឹងភ្នែកថាគេបានត្រឡប់មកសភាពស្រស់ស្រាយឡើងវិញហើយ។

"!!!" វានៅមានការជួយច្រើនយ៉ាងច្រើនរបៀបទៀត ដែលយើងអាចប្រើសម្រាប់ជួយកូនៗបាន ដែលអ្នកអាចស្រាវជ្រាវពីឯកសារដទៃផ្សេងទៀត។ ជាថ្មីម្តងទៀតចំណុចសំខាន់ធំៗដែលប្រើក្នុងការដោះស្រាយជាមួយនឹងការរកាំចិត្ត និងរបួសរបស់កូនមានដូចជា:

១. ជួយគេតិចតួចបានហើយចំពោះរបួសស្នាមរបស់កូនបើស្ថិតនៅក្នុងការចាំបាច់ រឺក៏បណ្តោយអោយគេយំអោយអស់ចិត្តគឺជាការស្រេច។

២. រំលឹកកូនពីរឿងអតីតដែលបានកើតឡើង រឺក៏លើកទឹកចិត្តកូនអោយបកស្រាយអោយអស់សេចក្តីពីអ្វីដែលបណ្តាលអោយគេមិនសប្បាយចិត្ត។

៣. បង្រៀនកូនអោយចងចាំពីអនុស្សាវរីយ៍ដ៏រីករាយរបស់គេ

៤. ប្រើការនឹកឃើញដល់អនុស្សាវរីយ៍ដ៏រីករាយ រឺវិធីសាស្ត្រដទៃទៀតដែលអាចទាញស្រូបគេពីសភាពពិបាកចិត្តអោយមកកាន់សភាពធម្មតាបច្ចុប្បន្នវិញ។

វិធីព្យាបាលទាំងនេះនឹងធ្វើអោយកូនមានសុខភាពល្អ និងមានសុភមង្គលជាក់ជាមិនខាន។

សូមបន្ថែមបន្តិចទៀត ខាងក្រោមនេះជាតម្រាដែលគេដក់ស្រង់ចេញពីគម្ពីរគ្រិស្តសាសនាជាសង្ខេបដោយរៀបលំដាប់ពីអក្សរ A-Z ស្តីពីវិធីចិញ្ចឹមបីបាច់កូន ៖៖៖៖

**១. អោយពួកគេជឿថាពួកគេត្រូវបានការថែរក្សាពីព្រះជាម្ចាស់ជានិច្ច**

**២.នាំពួកគេមកព្រះវិហារ**

**៣. ជំរុញពួកគេអោយមានគោលដៅខ្ពស់**

**៤. អបអរសាទរ រាល់ការទទួលជោគជ័យរបស់ពួកគេ**

**៥. លើកតម្កើងព្រះជាម្ចាស់នៅចំពោះមុខពួកគេ**

**៦. ចងចិញ្ចើមដាក់ អំពើអាក្រក់ គ្មានសីលធម៌ ឃោរឃៅ កាចសាហាវរបស់គេ**

៧. ផ្តល់ក្តីស្រលាញ់ទៅពួកគេ

៨. ស្តាប់បញ្ហារបស់ពួកគេ

៩. មិនព្រងើយកន្តើយចំពោះ ការភ័យតក់ស្លុតរបស់ពួកគេនោះទេ

១០. សប្បាយត្រេកអរនឹងទទួលយកការសុំខមាទោសរបស់ពួកគេ

១១. ជួយថែរក្សាជំហររឹងពឹង អង់អាច និងការជឿជាក់លើខ្លួនឯងរបស់ពួកគេ

១២. ធ្វើជាគំរូល្អម្នាក់សំរាប់ពួកគេ

១៣. ចាត់ទុកពួកគេជាមិត្តរបស់អ្នក

១៤. មិនព្រងើយកន្តើយចំពោះសំណួរដ៏គ្មានទីបញ្ចាប់របស់ពួកគេជាដាច់ខាត

១៥. បើកចំហរពីខ្លួនអ្នកអោយពួកគេដេញដោល

១៦. បួងសួងអោយពួកគេដោយចំៗឈ្មោះ

១៧. បញ្ជ្រាបការចង់បាន រឺចំណូលចិត្តរបស់អ្នកទៅក្នុងចិត្តរបស់ពួកគេអោយបានឆាប់រហ័សបំផុត

១៨. ចងចាំអ្វីដែលពួកគេត្រូវការចាំបាច់

១៩. បង្ហាញពួកគេពីវិធីជួយសង្គ្រោះស្រោចស្រង់អ្នកដ៏ទៃ

២០. បង្រៀនពួកគេធ្វើកិច្ចការងារផ្សេងៗ

២១. ត្រូវយល់ថាពួកគេនៅក្មេងនៅឡើយទេ

២២. ត្រួតពិនិត្យការនិយាយស្តី ពាក្យពេចន៍របស់អ្នក

២៣. ផ្តាច់ពួកគេចេញពីការសេពគប់ជាមួយមនុស្សអាក្រក់

២៤. មានក្តីសង្ឃឹមជឿជាក់ថាពួកគេនឹងគោរពស្តាប់បង្គាប់

២៥. ប្រាថ្នាពរដ៏ប្រពៃពីព្រះជាម្ចាស់ដល់ពួកគេ

២៦. នាំផ្លូវពួកគេអោយស្លុងស៊ប់នឹងការពិតនៃគម្ពីរគ្រិស្តសាសនា !!(ពិចារណា)!!

# ២.វិធីសាស្ត្ររបស់អ្នកគោរពព្រះពុទ្ធសាសនា

គ្រប់បេះដូងរបស់លោកឪពុក និងអ្នកម្តាយទាំងអស់ វាមានសេចក្តីប្រាថ្នាដូចគ្នាមួយ គឺ "**អនាគតដ៏ត្រចះត្រចង់សម្រាប់កូនៗ**"។ ដើម្បីសម្រេចគោលបំណងនេះ វាទាមទារការលះបង់ច្រើនណាស់ ទឹកចិត្ត ពេលវេលា.........បើពុំដូច្នេះទេ លទ្ធផលដែលពួកគាត់នឹងទទួលបាន វានឹងផ្ទុយពីការរំពឹងទុកជាមិនខាន។ ក្នុងនោះ ចំណុចសំខាន់មួយដែលមិនអាចអវត្តមានបាន គឺ**ការទទួលខុសត្រូវ** វាមិនចប់ទេដរាបណាក្មេងនៅតែត្រូវបានបង្កើតឡើង។ អ្នកមិនអាចគិតថា ការមានផ្ទះប្រណិតនៅ គ្រែល្អសម្រាប់ដេក ខ្នើយទន់ល្មើយសម្រាប់កើយ អាហារសម្បូរណ៍ជីវជាតិ សំលៀកបំពាក់ថ្មីៗ................ វាគ្រប់គ្រាន់សម្រាប់ការផ្គត់ផ្គង់ដល់តំរូវការកូននោះ វាគឺជាការយល់ខុសមួយ ប្រការសំខាន់ គឺជាការបង្ហាញផ្លូវពីសិល្បៈនៃការរស់នៅ ដែលនាំទៅរកអនាគតត្រចះត្រចង់ដល់កូនទៅវិញទេទើបជាការសំខាន់ហើយចំបាច់នោះ។ ខាងក្រោមនេះជាមេរៀនខ្លះដែលឪពុកម្តាយទាំងឡាយអាចសិក្សាស្វែងយល់ ហើយប្រើជាប្រយោជន៍បាន ៖៖៖៖៖៖

## ១. ជាគ្រូទីមួយរបស់កូន

ឪពុកម្តាយមិនមែនមានងារថា ជាអ្នកចិញ្ចឹមកូនតែម្យ៉ាងនោះទេ ពួកគាត់ថែមទាំងមានងារជាគ្រូកូនៗថែមទៀត ដែលព្រះពុទ្ធទ្រង់មានដីកាថាឪពុកម្តាយ គឺជាគ្រូទី១របស់កូន ដូច្នេះពួកគាត់ត្រូវតែប្រកាន់ករណីយកិច្ចរបស់ខ្លួននេះអោយបានខ្ជាប់ខ្ជួន។ គ្រប់សកម្មភាព ពាក្យសម្តី ចរិយាមាយាទ...............អោយដឹងខ្លួនឯងថាគឺជាគ្រូរបស់កូន។

ឪពុកម្តាយគ្រប់រូបស្រលាញ់កូនចៅ ហើយចង់អោយពួកគេខ្ពស់មុខខ្ពស់មាត់ និងមិនដែលគិតប៉ងធ្វើអាក្រក់ដោយចេតនាលើពួកគេឡើយ ប៉ុន្តែពាក្យចាស់និយាយថា "**បើស្រលាញ់គោក្របី អ្នកត្រូវចងពួកវា ហើយបើស្រលាញ់កូន អ្នកត្រូវទះគូទ**

**(ធ្វើទណ្ឌកម្មពួកគេ**"។ ជាឧទាហរណ៍ បើយើងចិញ្ចឹមគោក្របី ស្រលាញ់ពួកវា ហើយអនុញ្ញាតអោយពួកវាដើរពាសវាលពាសកាលនោះ ពួកវានឹងស៊ីបន្លែបង្ការ និងរបស់របរនៅក្នុងចំការរបស់អ្នកដទៃ ពេលនោះយើងនឹងត្រូវចេញថ្លៃចំណាយសងការខូចខាតអស់ទាំងនោះ ដូច្នេះហើយចាំបាច់ត្រូវតែចងពួកវា។ ដូចគ្នានឹងកូនចៅដែរ យើងស្រលាញ់ពួកគេ ប៉ុន្តែយើងក៏ត្រូវស្តីបន្ទោសពួកគេដែរ ដែលវាមិនមានន័យថា ជាការវាយដំគេរហូតដល់ស្លាប់នោះទេ គ្រាន់តែជាទណ្ឌកម្មមួយដែលនាំពួកគេអោយគិតសារឡើងវិញមុនពេលពួកគេផុងខ្លួនប្រព្រឹត្តកំហុសដដែលៗ។

ជាដាច់ខាត **កុំនិយាយជាមួយនឹងកំហឹងអោយសោះ** ព្រោះការបង្រៀននរណាម្នាក់ជាមួយកំហឹង មិនដែលនឹងទទួលបានលទ្ធផលអ្វីឡើយ។ ត្រូវនិយាយជាមួយក្តីស្រលាញ់ មេត្តា អាណិតអាសូរ ទើបជាការល្អ ដូចយ៉ាងប្រាប់កូនៗពីអ្វីល្អ អ្វីអាក្រក់ ប្រាប់ពួកគេថាប៉ា និងម៉ាក់ស្រលាញ់ចូលចិត្តមនុស្សល្អ និងមិនចូលចិត្តមនុស្សអាក្រក់ទេ ពេលនោះបើសិនកូនចង់បានក្តីស្រលាញ់ពីឪពុកម្តាយ គេច្បាស់ជាជ្រើសយកជាមនុស្សល្អជាមិនខាន។ មួយទៀត បញ្ចៀសការដាក់ទណ្ឌកម្មកូនពេលដែលខ្លួនខឹង ដូចជាការវាយដំមិនប្រណីដៃ និងគ្មានហេតុផល វានឹងឆ្លុះបញ្ចាំងពីភាពសាហាវឃោរឃៅដល់កូន ផ្ទុយទៅវិញសកម្មភាពដែលនាំចិត្តកូនអោយទទួលស្គាល់កំហុសខ្លួនទើបជាកិច្ចការដែលមានតំលៃ ហើយពួកគេនឹងប្តេជ្ញាដោយខ្លួនឯងថានឹងមិនប្រព្រឹត្តកំហុសដដែលទៀតហើយ។

**"ទង្វើល្អត្រូវទទួលបានការសរសើរទង្វើអាក្រក់ត្រូវទទួលការរិះគន់"**

## ២. ការជះឥទ្ធិពលលើបិតាគមន៍(ចរិតមានតគ្នាក្នុងវង្សត្រកូល)

ការបីបាច់រូបរាងកាយកូនគឺជារឿងងាយ គ្រាន់តែផ្តល់ចំណីអាហារអោយបានត្រឹមត្រូវជាការស្រេច ហើយយើងងាយបង្ការពីគ្រោះថ្នាក់បាន ដោយផ្តោតការយកចិត្តទុកដាក់លើសារធាតុ ជីវជាតិ........ដែលមាននៅក្នុងចំណីអាហារទាំងនោះ ប៉ុន្តែការ

*បីបាច់ចិត្តគំនិតកូនវិញ ក៏ដូចគ្នា គឺយើងត្រូវផ្តល់ចំណីអាហារទៅអោយចិត្តរបស់ពួកគេ ជាចំណីអាហារដែលគ្មានជាតិពុល និងមិនបង្កជម្ងឺដល់ចិត្តរបស់កូន។ បើសិនណាយើងមើលរំលងកត្តាទាំងនេះ ហើយបណ្តោលអោយជម្ងឺទាំងឡាយនៅពុំរ៉ៃក្នុងចិត្តកូនដោយមិនស្វែងរកវិធីព្យាបាលនោះវានឹងធ្ងន់ធ្ងរនៅថ្ងៃណាមួយជាមិនខាន។ តើយើងគួរមើលថែរក្សាចិត្តគំនិតកូនចាប់ពីពេលណា?*

*ចូរចងចាំថា លក្ខណៈគ្រប់បែបយ៉ាងនៅខាងក្នុងចិត្តរបស់ឪពុកម្តាយ គឺវាជះឥទ្ធិពលជាខ្លាំងទៅលើចិត្តគំនិតរបស់កូន ដូច្នេះលោកឪពុកអ្នកម្តាយទាំងអស់ ត្រូវដឹងថា នៅពេលដែលពួកគេបានផ្តល់កំណើតកូននោះ វាមានន័យថាពួកគេមានអានុភាពយ៉ាងខ្លាំងក្លាក្នុងការគូសឆ្លាក់កូនអោយទៅជារូបភាពបែបណាមួយបាន។ មិនថាជាការគិតបែបណា រឺមួយក៏ការប្រកាន់អាកប្បកិរិយាយ៉ាងណា(ល្អរឺអាក្រក់)របស់អ្នកនោះទេ គឺវាដើរតួនាទីយ៉ាងសំខាន់ក្នុងការស្ថាបនាជីវិត និងចិត្តគំនិតរបស់កូនអ្នក។ នៅពេលយើងធ្វើសកម្មភាពណាមួយជារឿយៗ នោះវានឹងក្លាយជាទម្លាប់ ក្រោយមកទម្លាប់នេះនឹងក្លាយទៅជាឧបនិស្ស័យ បន្ទាប់មកឈាមយើងនឹងទទួលឥទ្ធិពលពីឧបនិស្ស័យនោះ ហើយវានឹងច្នៃអត្តចរិតយើងទៅជាលក្ខណៈបែបណាមួយជាមិនខាន។ នេះវាដូចគ្នាទៅនឹងរុក្ខជាតិមានផ្លែទាំងឡាយដែរ គឺមិនថារសជាតិវាបែបណានោះទេ(ផ្អែម ល្វីង ជូរ) វានៅតែរក្សារសជាតិដើមដដែលពីគ្រាប់រុក្ខជាតិដែលយើងបានដាំនោះ។*

*យ៉ាងនេះហើយ ទើបគូស្រករទាំងឡាយដែលនឹងបម្រុងខ្លួនក្លាយជាឪពុកម្តាយគេនោះ ត្រូវយកចិត្តទុកដាក់លើពុម្ពនៃអត្តចរិត ចិត្តគំនិតរបស់ខ្លួន បញ្ចៀសការឆ្លងទៅកូននូវសន្តានអាក្រក់ទាំងឡាយ។ តើមានដំណោះស្រាយសម្រាប់ពួកគេទេ? មានជាដំបូង ក្រោយពេលក្លាយជាប្តីប្រពន្ធគ្នារួចមក* ***ការកែប្រែចិត្ត*** *ជារឿងសំខាន់។ ទាំង២នាក់ត្រូវព្យាយាមបង្កើតគ្រួសារមួយប្រកបដោយសុភមង្គល ចុះសម្រុងគ្នា ដែលអាចសិក្សាបានពីការបង្រៀនរបស់ព្រះពុទ្ធ:*

១. **មានជំនឿសាសនា និងចរិតដូចគ្នា:** ទាំង២នាក់មិនគួរជំទាស់ទៅលើការជឿរបស់ដៃគូទេ វាជាការយល់ឃើញផ្ទាល់ខ្លួនប៉ុណ្ណោះ។ ករណីនេះ បើពួកគេមិនមានមូលដ្ឋានគ្រឹះនៃជំនឿដូចគ្នានោះទេ ពួកគេច្បាស់ណាស់មិនអាចរស់នៅជាមួយគ្នាបានយូរអង្វែងទេ ជាលទ្ធផលជម្លោះជាច្រើននឹងកើតមានឡើង ហើយគ្មានសន្តិភាព។ ជាការល្អ ត្រូវមានការកែសម្រួលការយល់ឃើញរៀងៗខ្លួនអោយស៊ីគ្នា ដើម្បីការរស់ចុះសំរុងគ្នា។

២. **មានចរិយាមាយាទដូចគ្នា:** បែបបទនៃការរស់នៅ ការប្រតិបត្តិទំនៀមទម្លាប់ប្រពៃណីត្រូវតែដូចគ្នា បើសិនជាមានការខ្វែងគ្នាពីដំបូងនោះ ពិតណាស់នឹងមានការសម្របខ្លួននៃភាគីម្ខាងអោយចុះសម្រុងនឹងភាគីម្ខាងទៀតជាមិនខាន។

៣. **មានការចេះដឹងដូចគ្នា:** ទោះជាមិនមានកំរិតចំនេះសញ្ញាប័ត្រដូចគ្នាក៏ដោយពួកគេគួរតែអាចនិយាយជាមួយគ្នាជាដដែល។ នៅពេលប្តីនិយាយប្រពន្ធយល់ ហើយនៅពេលប្រពន្ធនិយាយប្តីក៏យល់ នេះហើយជាកត្តាអោយពួកគេអាចធ្វើដំណើរជាមួយគ្នាបានវែងឆ្ងាយទៅមុខទៀតបាន។

៤. **មានចិត្តសប្បុរសដូចគ្នា:** មានន័យថាមានការពេញចិត្តយល់ស្រប និងស្រុះស្រួលគ្នា នៅពេលភាគីណាម្នាក់មានគំនិតចង់ធ្វើបុណ្យ រឺក៏ធ្វើការបរិច្ចាគ។ ពួកគេមិនគួរជំទាស់គ្នា ដែលនឹងនាំទៅរកជម្លោះក្នុងគ្រួសារនោះទេ។

ពេលភាគីសងខាងមានការគិត និងការយល់ឃើញដូចគ្នា នោះវាមានន័យថាពួកគេមានពុម្ពដូចគ្នា ឆ្នាំងនិងគម្របបានត្រូវគ្នាហើយ។ ពួកគេនឹងរស់នៅក្នុងសុភមង្គល និងសន្តិភាព។ នេះហើយជាមូលហេតុនាំអោយកូនចៅពួកគេល្អ ព្រោះពួកគេបានល្អជាមុនរួចហើយ ដូច្នេះត្រូវរៀបចំខ្លួនអោយល្អបន្ទាប់ពីថ្ងៃដែលអ្នករៀបការ។

## ៣. ការផ្ទេរនិស្ស័យ

នៅពេលក្រុមស្ថាបនិកគ្រោងនឹងឆ្លាក់រូបវីរៈបុរសជាតិរបស់ខ្លួន ច្បាស់ណាស់ ពួកគេពិតជាធ្វើវាដោយមានផែនការច្បាស់លាស់ និងយកចិត្តទុកដាក់ជាទីបំផុត គឺធ្វើយ៉ាងណាអោយវាស្អាត ហើយមានអាយុកាលយូរអង្វែង។ មិនមែនជាកិច្ចការដែលនឹងធ្វើអោយរួចពីដៃនោះទេ ប៉ុន្តែជាការងារដែលផុសចេញពីជម្រៅចិត្ត និងប្រកបដោយក្តីស្រលាញ់ដ៏ស្មោះសពិតៗ។ ការខិតខំ ជាមួយនឹងមនោសញ្ចេតនាមិនតិចទេដែលមាននៅក្នុងរូបចម្លាក់មួយនោះ។ ចិញ្ចឹមកូនក៏ដូចគ្នា ការរៀបចំចិត្តគំនិតវាមានសារៈសំខាន់ខ្លាំង ជាជាងការដែលគ្រាន់តែផ្តល់កំណើតអោយគេមានជីវិតទៅទៀត ព្រោះថាចរិតនិស្ស័យ និងទម្លាប់នៃអ្នកផ្តល់កំណើត វានឹងត្រូវបានផ្ទេរទៅអោយកូន។ អ្នកផ្តល់កំណើតចិត្តល្អវាមិនថ្វីទេ ប៉ុន្តែបើគេជាមនុស្សអាក្រក់ នោះកូននឹងគេចមិនរួចពីដានដ៏កខ្វក់នេះទេ "ឪចោរកូនចោរ ឪបណ្ឌិតកូនបណ្ឌិត" ប៉ុន្តែមានកត្តាម្យ៉ាងអាចកែពួកគេបាន គឺឥទ្ធិពលនៃមជ្ឈដ្ឋានដែលពួកគេរស់នៅ។

មើលមកខ្លួនឯងអោយបានច្បាស់សិន ដើម្បីជៀសវាងនូវកង្វល់ដែលយើងមិនចង់បាន ថាតើយើងសក្តិសមធ្វើជាឪពុក រឺក៏ម្តាយគេហើយឬយ៉ាងណា? ហើយបើសិនណានៅមិនទាន់ពេញលក្ខណៈនៅឡើយទេ ពន្យារពេលយកកូនសិនគឺជាជម្រើសដ៏ល្អមួយ ព្រោះការធ្វើបែបនេះជាទង្វើដ៏សមហេតុផលមួយ និងជាវិធីម្យ៉ាងជួយកាត់បន្ថយចំនួននៃមនុស្សអាក្រក់ កាចសាហាវ ឃោរឃៅនៅក្នុងពិភពលោកនេះផង។

## ៤. ក្តីស្រលាញ់បរិសុទ្ធ

ចិត្ត និងមាត់របស់ឪពុកម្តាយនិយាយភាសាមិនដូចគ្នាទេ។ មាត់និយាយថាកូនមិនល្អ ប៉ុន្តែចិត្តវិញចង់អោយតែកូនល្អ គ្មានសោះគំនិតចង់បំផ្លាញកូន ពិបាករកនរណា

មានអត្តចរិតបែបនេះណាស់។ អ្នកម្តាយស្រលាញ់ និងពលីសម្រាប់កូនខ្លួនច្រើន លើសលុប ដែលយើង នឹងគ្មាននរណាម្នាក់អាចគណនាបាន។ អ្វីដែលមាននៅក្នុង សភាវគតិរបស់ខ្លួន គ្រប់សត្វទាំងអស់វាមិនដែលលាក់លៀមទេ គិតឃើញអ្វីវានឹង សម្តែងចេញមកដោយស្មោះត្រង់ គ្មានប្រាថ្នាចង់បានអ្វី គ្មានអំណួតសោះឡើយ នេះផ្ទុយពីមនុស្សស្រលះ មនុស្សមានកលល្បិចច្រើនជំពូក កាយវិការផ្សេងចិត្តផ្សេង ធ្វើពុត និងពិបាកទុកចិត្តបាន។ ដូច្នេះហើយ អោយពិតប្រាកដថា ក្តីស្រលាញ់ដែល អ្នកមានចំពោះកូនៗវាពិតប្រាកដមែន ហើយវាចេញពីបេះដូងផ្ទាល់ មិនមែនជាការ បោកប្រាស់ទេ។ យើងអាចរៀនសូត្រពីធម្មជាតិជុំវិញខ្លួន ជាក់ស្តែងសត្វឆ្មារ ឆ្កែ បក្សី ........) ពួកវាយកចិត្តទុកដាក់កូនដោយរបៀបណា ការថែទាំកូនចៅរបស់ពួកវាដោយ របៀបណា តើវាមានគំនិតអាក្រក់ចំពោះកូន និងចង់ទាញប្រយោជន៍អ្វីពីកូនដូច មនុស្សខ្លះ ដែលចិញ្ចឹមកូនទុកជាឧបករណ៍សម្រាប់ជួយចិញ្ចឹមខ្លួនពេល ខ្លួនចាស់ឬ យ៉ាងណា?

## <u>៥. ជាគំរូសម្រាប់កូន</u>

ឪពុកម្តាយគឺជាកញ្ចក់របស់កូនៗ មិនថាក្នុងទេសកាលបែបណាទេ គ្មានអ្វីដែល អាចអោយពួកគេឆ្លុះក្រៅពីឪពុកម្តាយខ្លួនឡើយ។ កូនទទួលយកគ្រប់បែបយ៉ាង គ្រប់ វិនាទីទាំងអស់ ដោយកុំគិតថាសកម្មភាពរបស់ខ្លួន នៅចំពោះមុខកូនវាមិនបានផ្តិត ជាប់នៅក្នុងចិត្តរបស់កូនអោយសោះ ដូច្នេះត្រូវចងចាំថា គ្រប់ទង្វើគប្បីក្តី មិនគួរគប្បី ក្តីសុទ្ធតែត្រូវបានផ្តិតយកដោយខួរក្បាលកូនទាំងអស់ អញ្ចឹងហើយត្រូវមានការប្រុង ប្រយ័ត្នបន្តិច។ បើយើងធ្វើការសង្កេតដោយប្រុងប្រយ័ត្ន នោះនឹងឃើញថា ពេលដែល យើងញញឹមទៅកាន់ទារក វានឹងហាក់ជាញញឹមតបមកវិញ ធ្វើមុខជូរដូចគ្នាមុខជូរ មកវិញ ធ្វើមុខកំប្លែងលៀនអណ្តាតក៏មិនខុសគ្នា នេះសបញ្ជាក់ថាក្មេងប្រតិកម្មតប

នឹងអ្វីមួយដោយការដឹងដោយវិញ្ញាណទាំងថរបស់គេ ប៉ុន្តែគេមិនយល់នូវអត្ថន័យនៃសកម្មភាពរបស់មនុស្សចាស់នៅឡើយទេ។ អ្វីជាក្តីស្រលាញ់ ការស្អប់ ការរីករាយ ភាពឯកោ..........ក្មេងមិនអាចកាត់ន័យសេចក្តីបានទេ គឺគេគ្រាន់តែអាចបញ្ជាក់ពីអ្វីដែលគេបានឃើញ(ប្រតិកម្មតប) ហើយមិនបានចង្អុលបង្ហាញពីអារម្មណ៍ពិតរបស់ក្មេងទេ ដូច្នេះចងចាំថាក្មេងគឺជាកំពូលអ្នករហ័សទទួល និងរហ័សចាំ។ ចំណេះដឹងយើងបានទទួលកាលពីក្មេង អាចស្ថិតនៅក្នុងចិត្តរបស់យើងយូរអង្វែង និងមិនងាយនឹងភ្លេចទេ ប៉ុន្តែចំណេះដែលយើងទទួលនៅអាយុ២០ឆ្នាំវិញគឺពិបាកនឹងចងចាំណាស់។និយាយពីមជ្ឈដ្ឋានដែលនៅជិតកូនជាងគេ គឺគ្រួសារ ហើយឪពុកម្តាយនេះឯងដែលជាជនគំរូដល់រូបកូនពាក្យសម្តី កិរិយាមាយាទ...ជាគ្រូទី១និងល្អបំផុតសម្រាប់កូន។

## ៦. សភាវគតិកូន

ធាតុផ្សំរបស់មនុស្សមាន២យ៉ាង: កាយ និងចិត្ត។ យើងត្រូវការអាហារសម្រាប់ចិញ្ចឹមកាយ ឯចិត្តក៏ដូចគ្នា វាក៏ត្រូវការអាហារដើម្បីរស់ដែរ។ មនុស្សមិនអាចរស់បានដោយគ្រាន់តែមានកាយនោះទេ គេត្រូវរស់ជាមួយចិត្តទៀត ដែលចិត្តហើយនិងកាយនៅជាមួយគ្នាគ្រប់ពេលវេលា ដូច្នេះចំណីត្រូវតែត្រូវបានផ្តល់អោយទាំងកាយទាំងចិត្ត។ តើអ្វីទៅគឺជាអាហាររបស់ចិត្តទៅ? វាគឺការហ្វឹកហ្វឺន អប់រំនិងបង្រៀនដុះខាតអោយចិត្តល្អជ្រះថ្លាទៅតាមមេរៀននៃព្រះធម៌។ ជាការពិតមែនហើយ យើងត្រូវយកចិត្តទុកដាក់លើបញ្ហាចិត្តនេះ ព្រោះរាល់សកម្មភាព ពាក្យសម្តី ឫកពានៃកាយទាំងអស់ គឺវាឆ្លុះបញ្ចាំងពីលក្ខណៈនៃចិត្តទាំងអស់។

ក្មេងប្រព្រឹត្តដូចនឹងនរណាមួយ រឺអ្វីមួយដែលនៅជុំវិញខ្លួនគេ ដូច្នេះចាំបាច់សិក្សាពីសកម្មភាពនៃចិត្តរបស់គេ ដើម្បីទុកជាមេរៀនសម្រាប់ស្វែងយល់ពីពួកគេ។ អ្វីដែលត្រូវសិក្សាដំបូងរួមមាន: សភាវគតិ អារម្មណ៍ ទម្លាប់ និងចរិត ដែលនឹងត្រូវ

*បានបកស្រាយដូចខាងក្រោម៖*

*១. **សភាវគតិ:** គឺជាការដឹងពីកំណើតតែម្តង ចាប់ពីពេលចិត្តកើតភ្លាម។ វាជាសកម្មភាពដែលចេះធ្វើដោយខ្លួនឯងដោយមិនមាននរណាបង្រៀនឡើយ ហើយពួកយើងគ្រប់គ្នាសុទ្ធតែមានទាំងអស់ និងមិនអាចបដិសេធ រឺចង់លុបបំបាត់វាចោលនោះទេ ប៉ុន្តែយើងនៅតែអាចគ្រប់គ្រងវាបាន។ អ្នកណាដែលអសមត្ថភាពក្នុងការបង្ខឹកចិត្ត ជាទូទៅពួកគេខ្វះខាតនូវការគ្រប់គ្រងសភាវគតិរបស់គេ ហើយគេនឹងធ្វើរឿងគួរអោយអាម៉ាស់នៅក្នុងសង្គម និងភាគច្រើននៃទង្វើទាំងនោះហាក់បីដូចជាទង្វើរបស់សត្វអញ្ចឹង។ ផ្ទុយទៅវិញ អ្នកដែលសិក្សារៀនសូត្រពីវា គេនឹងមានការខ្មាស់អៀនក្នុងការបញ្ចេញសភាវគតិមូលដ្ឋានរបស់គេណាស់។ ហេតុផលនេះហើយ បើចង់អោយខ្លួនមានភាពជាមនុស្ស យើងត្រូវតែរៀនគ្រប់គ្រង់សភាវគតិជាមូលដ្ឋាន កុំបណ្តែតបណ្តោយអោយវាលោតចេញមកខាងក្រៅច្រើនពេក។ សភាវគតិអ្វីខ្លះទៅដែលយើងត្រូវដឹងនៅពេលនេះ ៖៖៖៖៖៖៖៖*

*ក. សភាវគតិចង់រស់: តម្រូវការអាហារកើតមានតាំងពីពេលចាប់កំណើត គឺយើងត្រូវការអាហារដើម្បីរស់។ កូនឆ្មារកូនឆ្កែ នឹងស្វែងរកដោះមេវាបៅដោយខ្លួនឯងក្រោយពេលវាចេញពីពោះមេវា ដូចគ្នាទៅនឹងកូនម៉ាដែរវានឹងយំទារបៅដូចគ្នា។ តម្រូវការអាហារនេះកើតមានតាំងពីកើតរហូតដល់ស្លាប់ទៅវិញ ព្រោះយើងត្រូវការបរិភោគជាចាំបាច់។*

*ខ. សភាវគតិបន្តពូជ: ចិត្ត និងកាយមនុស្សនៅតែមានជីវិតក៏ព្រោះតែមានការបន្តពូជនេះឯង។ បើសិនណាជាគ្មានការបន្តពូជទេ ជីវិតមនុស្សប្រហែលជាត្រូវផុតពូជហើយមើលទៅ ប៉ុន្តែសភាវគតិមួយនេះអាចឈានទៅដល់ការល្មោភកាមតណ្ហាបានបើសិនណាមិនមានការគ្រប់គ្រង និងទប់ស្កាត់ ហើយពេលនោះតំលៃរបស់មនុស្សនឹងចុះថោកជាងសត្វតិរច្ឆានទៅទៀត។ គិតត្រង់នេះបន្តិច សត្វសុនខមានតម្រូវការភេទគឺទៅតាមរដូវវាប៉ុណ្ណោះ ចុះមនុស្សវិញមានរដូវដែលពួកគេមានតម្រូវការភេទអត់?*

គ. សភាវគតិការពារខ្លួន: មនុស្សស្រលាញ់ជីវិតណាស់ គេភ័យខ្លាចបំផុតការសង្កត់សង្កិន។ មួយទៀតគឺការខ្លាចឈឺ និងខ្លាចស្លាប់ ពេលនោះគំនិតចេះការពារខ្លួនបានកើតមានឡើង ហើយបន្ទាប់មកការសម្រេចចិត្តប្រយុទ្ធតទល់ រឺក៏រត់ចេញក៏លេចចេញមកដែរ។ ចំពោះក្មេងពួកគេឆាប់តក់ស្លុតណាស់ ឃើញអ្វីប្លែក រឺលឺសម្លេងខ្លាំងក៏អាចបំភ័យគេបានដែរ ដូច្នេះការប្រយ័ត្នខ្ពស់ត្រូវតែបានអនុវត្តន៍ដើម្បីកុំអោយវាជិតជាប់ក្នុងចិត្តក្មេងអោយសោះ។

ឃ. សភាវគតិខ្លួនឯងសំខាន់: នេះហើយជាដើមហេតុនាំអោយមនុស្សមានភាពភាពអត្តានិយម ដោយសារការគិតថាខ្លួនឯងសំខាន់ជាងគេ និងអស្ចារ្យជាងគេ ទន្ទឹមនោះដែរ មោទនភាពក៏កើតមានឡើង។ វាធ្វើអោយមនុស្សចាប់ផ្តើមមើលងាយមនុស្សដោយផ្អែកទៅលើជោគវាសនានៃពួកគេនីមួយៗ(អ្នកមានមើលងាយអ្នកក្រ)។ ជំពូកមនុស្សប្រភេទនេះ ពេលគេចាប់ចេញដំណើរទៅណាមកណា រឺធ្វើកិច្ចការអ្វីមួយ ទូទៅតែងចង់ចេញមុខចេញមាត់ជាងគេ(នរណាល្អជាងមិនបាន)។ ក្នុងព្រះធម៌និយាយថា ការយល់ថាល្អជាង ស្មើគ្នា អន់ជាងនរណាម្នាក់គឺការគិតដែលនាំទៅរកទុក្ខ។

ង. សភាវគតិសង្គម: មនុស្សជាសត្វនៃសង្គម គេរស់នៅក្នុងសង្គម ក្នុងក្រុមបក្សពួកខ្លួន ហើយគេមិនចង់រស់នៅតែលតោលតែម្នាក់ឯងឡើយ។ ជាទូទៅ មនុស្សតែងប្រមូលផ្តុំគ្នា ដូចអាចឃើញស្រាប់នៅតាមទីសាធារណៈសព្វទីកន្លែង គេតែងជួបជុំគ្នាមិនថាជាក្រុមតូច រឺក្រុមធំឡើយ។ ការចងជាក្រុមជាមួយគ្នាបាន លុះណាសមាជិកក្រុមមានភាពដូចគ្នា ដូចជាភាសាដូចគ្នា ការស្លៀកពាក់ដូចគ្នា ចំណង់ចំណូលចិត្តដូចគ្នា កំរិតជីវភាពដូចគ្នា..........ហេតុផលនេះហើយបានជាមានជាតិសាសន៍ និងភាសាផ្សេងៗគ្នាជាច្រើនក្នុងលោកនេះ។ នៅម្នាក់ឯងគ្មានទេភាពរីករាយ ហើយបើយើងបណ្តោយអោយក្មេងនៅម្នាក់ឯង គេនឹងមានអារម្មណ៍ថាឯកោ និងស្លឹកស្រពន់មិនរហ័សរហួនឡើយទាំងកាយសម្បទាទាំងចិត្តគំនិត។ ផ្ទុយទៅវិញ ពេលគេមានគ្នាលេងជាមួយ គេនឹងសប្បាយត្រេកអរ ដែលអ្នកអាចសង្កេតបាន នៅពេលដែលឪពុកម្តាយត្រឡប់

*ពីធ្វើការវិញ កូននឹងរត់មកអោបនៅពេលពួកគាត់ចូលដល់ក្នុងផ្ទះភ្លាម នេះហើយសបញ្ជាក់បានថាជានិមិត្តរូបនៃសភាវសង្គម។*

*ច. សភាវគតិបន្ថែម: មុនពេលឈានចូលមកដល់នៃរដូវភ្លៀង យើងឃើញរ៉ូងស្រមោចកំពុងមមាញឹកជញ្ជូនអាហាររបស់ពួកវា យ៉ាងមមាញឹកដាក់សំបុក រវ៉ូងឃ្មុំក៏ដូចគ្នាបានហើរពីសួនផ្កាមួយទៅសួនផ្កាមួយទៀត ក្រេបជញ្ជាក់លំអងផ្កាដើម្បីទុកជាទឹកឃ្មុំដ៏ផ្អែមសម្រាប់កូនៗរបស់ពួកវា ចំណែកពួកក្អែកវិញក៏ខិតខំស្វែងរកចំណីយកមកលាក់ទុកក្នុងសំបុកទុកស៊ីនៅថ្ងៃក្រោយដែរ សកម្មភាពអស់ទាំងនេះហើយគឺជាលទ្ធផលនៃសភាវគតិបន្ថែម។ ការប្រមូលទុក ជាពិសេសមនុស្សគឺជារឿងធំដុំណាស់ ពួកគេប្រមូលគ្រប់បែបយ៉ាងដែលវាហាក់ដូចជាពួកគេកើតមានជម្ងឺខ្វះអញ្ចឹង ប្រមូលហើយប្រមូលទៀត ប្រមូលតាំងពីកើតដល់ស្លាប់។ សភាវគតិមួយនេះបើមិនធ្វើការគ្រប់គ្រង រឺទប់ស្កាត់ទេ វានឹងនាំទៅរកសេចក្តីលោភលន់ជាមិនខាន។ ក្មេងនឹងចាប់ផ្តើមប្រមែប្រមូលរបស់តូចតាចទុកជិតខ្លួន ហើយនិយាយថា "កុំប៉ះពាល់អ្វីទាំងអស់ វាជារបស់ខ្ញុំ"។ វានឹងក្លាយជាការកំណាញ់ ហើយប្រមូលទុកជាទ្រព្យសម្បត្តិសម្រាប់កូនចៅរៀងៗខ្លួន ដែលក៏ជាដើមហេតុនៃការប្រព្រឹត្តអំពើពុករលួយដូចយើងឃើញសព្វថ្ងៃនេះស្រាប់។*

*២. **អារម្មណ៍:** លឺពាក្យនេះញឹកញាប់ណាស់មែនទេ ហើយធ្លាប់លឺគេនិយាយថាមនុស្សប្រុសមានស្មារតីនឹងជាងនារី ដែលមានន័យថាមនុស្សប្រុសមានចិត្តនឹងធឹងមិនឆាប់ប្រតិកម្ម ចំណែកមនុស្សស្រីវិញចិត្តឆេវឆាវ ឆាប់ខឹង ប្រកែកតវ៉ាច្រើនត្អូញត្អែនេះត្អូញត្អែនោះសម្បូររឿងណាស់។ អារម្មណ៍មានន័យថា គឺការដឹងនៅក្នុងចិត្តដោយវិញ្ញាណទាំង៥។ អារម្មណ៍គឺជារបស់ម្យ៉ាងដែលយើងអាចបង្ការមិនអោយកើតមានឡើងបាន ហើយយើងអាចបំផ្លាញវាចោលតាមរយៈការអនុវត្តន៍សមាធិ។*

***៣. ទម្លាប់:*** *វាជាលទ្ធផលនៃការធ្វើកិច្ចការអ្វីមួយជាដដែលៗ ពីមួយថ្ងៃទៅមួយថ្ងៃ ដូចយ៉ាងគេសួរសំណួរយើងថា តើអ្នកទម្លាប់ចូលគេងម៉ោងប៉ុន្មាន? រួចយើងឆ្លើយទៅវាថាម៉ោង១១ នេះវាមានន័យជាទូទៅអោយតែម៉ោងជិត១១យើងងងុយ ហើយប្រុងប្រៀបខ្លួនចូលគេងហើយ។ ទម្លាប់ខ្លះត្រូវបានផ្ទេរពីឪពុកម្តាយទៅកូនៗ រឺក៏ពីក្រុមមនុស្សដែលនៅជិតកូនបំផុត ព្រោះក្មេងងាយនឹងទោរទន់ក្នុងការទទួលយកអ្វីមួយឆាប់រហ័សណាស់។ ចង់បណ្តុះទម្លាប់ល្អដល់ក្មេងគឺជារឿងងាយណាស់ គឺវាស្ថិតលើគំរូរបស់មនុស្សចាស់ ជាឧទាហរណ៍ បើឪពុកជាមនុស្សឧស្សាហ៍ និងតែងក្រោកពីព្រលឹមទៅធ្វើការជារៀងរាល់ព្រឹកនោះកូនច្បាស់ជាក្រោកពីព្រឹកព្រហាមដូចនឹងឪពុកគេដែរហើយ។ ចាំទុកថាទម្លាប់នេះគឺជាជម្ងឺឆ្លង ហើយអ្វីទៅជាទម្លាប់របស់អ្នក? ល្អ រឺអាក្រក់? អ្នកត្រូវដឹងអោយប្រាកដជាមុន ព្រោះវានឹងឆ្លងទៅកូនអ្នកជាមិនខាន។*

***៤. អាកប្បកិរិយា និងចរិត:*** *ជាសកម្មភាពដែលអាចសំគាល់ដោយវាចា និងសកម្មភាព យើងអាចលឺ និងឃើញ ហើយអាចធ្វើការវាយតំលៃបាន។ អាកប្បកិរិយាគឺជានិច្ចកាលចង្អុលបង្ហាញតាមរយៈទម្លាប់នៃសកម្មភាពរបស់មនុស្ស ជាឧទាហរណ៍ បើគេមានទម្លាប់ជាមនុស្សឈ្លើយ នោះពាក្យសម្តីដែលគេនិយាយចេញមកគឺសុទ្ធតែជាពាក្យខ្វះការគួរសមទាំងអស់ រួមទាំងសកម្មភាពផ្លូវកាយរបស់គេគឺគួរអោយស្អប់ខ្ពើម និងមិនគួរជាទីចូលចិត្តឡើយ មិនថាពេលគេឈរ ដេក ដើរ រឺអង្គុយនោះទេ គឺបង្ហាញពីភាពពុំសមគួរសោះឡើយ។ ផ្ទុយទៅវិញបើគេមានទម្លាប់ល្អវិញ ឫកពាររបស់គេចេះគួរសម និងគួរជាទីចូលចិត្តណាស់។*

*ក្នុងការចិញ្ចឹមបីបាច់កូនចៅ ជាការល្អត្រូវធ្វើការកត់សំគាល់លើចំណុចសំខាន់ៗអស់ទាំងនោះ ហើយព្យាយាមធ្វើការកែប្រែពួកវាម្តងមួយម្តងមួយ។ ចាំត្រង់នេះថា "សភាវគតិគឺជាមូលដ្ឋាននៃអារម្មណ៍ ហើយអារម្មណាគឺជាមូលដ្ឋាននៃទម្លាប់ ចំណែកទម្លាប់គឺជាមូលដ្ឋាននៃអាកប្បកិរិយា និងចរិត"។*

សេចក្តីអធិប្បាយខាងលើ គឺបានផ្តល់ជាតំរុយដល់ឪពុកម្តាយទាំងឡាយអោយដឹងពីភាពជាមនុស្ស ដែលវានឹងញ៉ាំងអោយពួកគាត់បានយល់ពីឥរិយាបថរបស់កូន។ ហើយនៅពេលណា បានឃើញការប្រព្រឹត្តរបស់កូនចម្លែកមិនប្រពៃ ដែលនឹងនាំគេទៅរកទម្លាប់មិនល្អ លោកឪពុក និងអ្នកម្តាយទាំងឡាយច្បាស់ជាងាយក្នុងការស្វែងរកវិធីសាស្ត្រដើម្បីបង្ការបាន។

!!!!!!!!!!!!!!!!! **មិនទាន់អស់ទេ** ប៉ុន្តែសូមបញ្ចាប់ត្រឹមប៉ុណ្ណឹងចុះ ចំពោះការបកស្រាយពីវិធីសាស្ត្របណ្តុះកូនចៅរបស់ក្រុមអ្នកគោរពព្រះពុទ្ធសាសនា។ វាគ្រាន់តែជាការអធិប្បាយផ្នែក១ ក្នុងចំណោមពាផ្នែកនៃសៀវភៅ១ក្បាលនេះតែប៉ុណ្ណោះ ប៉ុន្តែបើសិនណាមិត្តអ្នកអានចង់បន្តអានអត្ថបទនេះទាំងអស់ អ្នកអាចទទួលសៀវភៅនេះបាន(សូមមើលនៅទំព័រខាងក្រោយ)។

.



# ៣.វិធីសាស្ត្ររបស់អ្នកកាន់សាសនាជ្វីហ្វ

គ្មានសកម្មភាពណាមួយរបស់មនុស្សម្នាយើង ដែលអស្ចារ្យគួរអោយកោតសរសើរជាជាងការអប់រំកូនប្រុសស្រីបានសមរម្យ និងត្រឹមត្រូវនោះទេ។ មានមនុស្សម្នាក់ដែលព្រះជាម្ចាស់ស្រលាញ់ចូលចិត្តជាខ្លាំង គេគឺជាអ្នកដែលបូជាអស់កំលាំងកាយចិត្តរបស់ខ្លួនក្នុងការចិញ្ចឹមបីបាច់ អប់រំកូនប្រុសស្រីរបស់ខ្លួន។

## ១. ជីវិតដែលព្រះជាម្ចាស់ចង់បានសម្រាប់សត្វលោករបស់ទ្រង់

**"មើលទៅឋានសួគ៌ ហើយរាប់ចំនួនវ៉ូងផ្កាយអស់ទាំងនោះ តើអ្នកអាចរាប់វាអស់ទេ? ដូច្នេះបណ្តុះគ្រាប់ពូជរបស់អ្នកអោយដូចនោះទៅ"**។ រាល់ការប្រព្រឹត្តរឿងដែលត្រឹមត្រូវ និងអំពើល្អដែលបុគ្គលម្នាក់ៗធ្វើជាប្រចាំ ជារៀងរាល់ថ្ងៃក្នុងជីវិតរបស់ពួកគេនោះ វាមិនមានតំលៃដូចជាការបណ្តុះបណ្តាលកូនប្រុសស្រីបានល្អទៅតាមផ្លូវដែលព្រះជាម្ចាស់ធ្វើនោះទេ ត្រឹមត្រូវនិងយុត្តិធម៌។ គ្មាននរណាម្នាក់ស្លាប់ទាំងស្រុងនោះទេ បើសិនណាគេនៅតែរស់ក្នុងជីវិតកូនៗរបស់គេ ប៉ុន្តែវាអាស្រ័យថាជីវិតកូនៗពួកគេគឺជានៅតែបន្តនូវទំលាប់ របៀបបទដែលឪពុកម្តាយគេបានប្រព្រឹត្ត ហើយបើសិនណាគេ ប្រាសចាកចេញពីទំលាប់ទាំងនោះ មានន័យថាឪពុកម្តាយគេបានស្លាប់ហើយ។ ម្យ៉ាងមួយទៀត ទោះជាគេព្យាយាមបញ្ជ្រាបទំលាប់ខ្លួនទៅនឹងក្មេងដ៏ទៃ មិនមែនកូនខ្លួនក៏ដោយ ក៏វាមិនមែនជាការប្រសើរឡើយ ហើយនៅទីបំផុតគេនៅតែស្លាប់ជាដដែល ព្រោះក្មេងដ៏ទៃទាំងនោះនឹងប្រាសចេញពីទំលាប់គេទាំងស្រុងមិនដូចកូនខ្លួនឯងឡើយ។

## ២. សៀវភៅចំហ២ក្បាល

នៅពេលដែលមនុស្សម្នាក់ត្រូវបានផ្ដល់កំណើតឡើង ភ្លាមនោះមានសៀវភៅ ២ក្បាលបានបើកឡើងនៅពីមុខគេៈ ១. **សៀវភៅជីវិត និង២. សៀវភៅអប់រំ** (1. The books of life and 2. The books of education)។ គ្រាន់តែសៀវភៅជីវិតបានបើកឡើងសម្រាប់កូនង៉ាទើបនឹងកើត នៅគ្រាចាប់ផ្ដើមដំបូងនៃជីវិតរបស់គេរួចមក ដូចគ្នានេះដែរសៀវភៅអប់រំក៏បានបើកឡើងផងដែរ។ តើជំពូកទី១ នៅក្នុងសៀវភៅជីវិតរបស់ទារកមានចំណងជើងដូចម្ដេចទៅ? "**គំនូរនៃការចិញ្ចឹម**"

ក្មេងមិនចាំបាច់ខំប្រឹងខ្លាំង រឺក៏ធ្វើការនោះទេ ក៏ព្រោះតែគេនៅខ្ចត់ខ្ចោយនៅឡើយសម្រាប់កំលាំងពលកម្ម ដែលវាជាការងារនៅពេលអនាគតរបស់គេប៉ុណ្ណោះ។ គេជាមនុស្សម្នាក់ទៅហើយ គេបានទទួលទានផលផ្លែ ដែលជា**កម្មដំបូង**របស់គេ ជា**កម្ម**ដែលទ្រទ្រង់ជីវិតរបស់គេ អញ្ចឹងអ្វីទៅជាកម្មដំបូងរបស់គេ? ជា**គំនូរនៃការចិញ្ចឹម**ពីសំណាក់ម្ដាយរបស់គេ។

តើឈ្មោះអ្វីដែលយើងគួរដាក់អោយជំពូកដំបូងក្នុង "**សៀវភៅអប់រំ**"? "**ជំពូកនៃការបង្ហូរក្ដីស្រលាញ់**"។ ហើយអ្នកណាគេនឹងធ្វើជាគ្រូបង្រៀនជំពូកដំបូងនេះ? អ្នកម្ដាយ ព្រោះការចាប់ផ្ដើមអ្វីមួយបានល្អបំផុត គឺសុទ្ធតែកើតចេញមកពីអ្នកម្ដាយ។ ជាអ្នកបង្កើត គឺជាអ្នកអប់រំមុនគេ ហើយមេរៀនដំបូងបង្អស់ដែលត្រូវបង្រៀននោះ គឺ**ក្ដីស្រលាញ់**។

## ៣. ពីអ្នកម្ដាយទៅជាអ្នកគ្រូ

អ្នកម្ដាយជាតិថ្វីប ផ្ដល់អស់ទ្រព្យសម្បត្តិទាំងអស់ ដែលមាននៅក្នុងបេះដូងទៅអោយកូនរបស់ខ្លួន ក្ដីស្រមៃដ៏ធំធេងរបស់គាត់គឺក្ដីស្រមៃសម្រាប់កូនៗ ការគិត

ទាំងថ្ងៃទាំងយប់គឺផ្ដោតលើកូន។ កូនៗជាតិជ្វីប មិនអាចទាញយកនូវសោភ័ណភាព និងភាពសមរម្យក្នុងកុមារភាពរបស់ពួកគេ ពីរស្មីព្រះអាទិត្យបានគ្រប់ពេលនោះទេ។ កំឡុងពេលជាច្រើនជំនាន់ដែលអ៊ីស្រាអែល បានចំណាយពេលនិរទេសខ្លួន កូនៗជាតិជ្វីបបានឃើញពន្លឺព្រះអាទិត្យ និងភាពស្រស់បំព្រងនៃធម្មជាតិតិចតួចបំផុត ដែលចំណាយពេលភាគច្រើនក្នុង១ថ្ងៃៗ ទៅលើការនិរទេសខ្លួនហាក់ប្រៀបបានជាច្រវាក់ជាប់នឹងប្រាណអញ្ចឹង។

ទីកន្លែងណាទៅ ដែលពួកគេអាចទាញយកសោភ័ណភាព ភាពសមរម្យ ភាពឆ្លាតវាងវៃ និងដង្ហើមនៃការចេះដឹងរបស់គេបាន? ចម្លើយគឺ បានពីក្ដីស្រលាញ់របស់ម្ដាយរបស់គេ និងមួយទៀត បានពីពន្លឺរបស់ទេវតា ដែលពើបប្រទះនឹងក្លិនក្រអូបឈ្ងប់នៃសម្លេងខ្សឹបៗនៅក្នុងចម្រៀងរបស់អ្នកម្ដាយជាតិជ្វីប ដែលច្រៀងទៅកាន់កូនខ្លួន កំពុងដេកនៅក្នុងអង្រឹង ជាចម្រៀងប្រៀបបានជាចម្រៀងបំពេរ ដែលអ្នកម្ដាយជាតិជ្វីបប្រើដើម្បីបំពេរកូនអោយដេក។ **អោយដេករឺ? ទេ!!** ដើម្បីដាស់វិញ្ញាណកូនដែលកំពុងតែដេកលង់លក់ និងចារឆ្លាក់នៅក្នុងបេះដូងរបស់គេអោយចងចាំពីអត្ថន័យនៃក្ដីស្រលាញ់របស់អ្នកម្ដាយលើកូនទេតើ "**រត់កូន រត់អោយលឿន ចូលទៅក្នុងផ្ទះរបស់គ្រូកូន ម្ដងហើយម្ដងទៀត ស្រាវជ្រាវនេះស្រាវជ្រាវនោះ រាល់អ្វីដែលកូនចង់ដឹង**"។

## ៤. ពេលដែលកូនចាប់ផ្ដើមនិយាយ

អ្វីក៏ដោយដែលឪពុកម្ដាយបង្រៀនទៅកូន ពួកគេត្រូវបន្សល់ការផ្ចិតជាប់មួយនៅនឹងកូន ប៉ុន្តែទោះបីជាមានការបណ្ដុះបណ្ដាលដ៏ប្រណិតយ៉ាងណាក្ដី ក៏មិនអាចធានាបានថាកូនអាចនឹងកេចរួចពីប្រព្រឹត្តកំហុសនោះទេ។ មានកត្តាមួយអាចដោះស្រាយបាននិងធានាថាការបង្រៀនរបស់ឪពុកម្ដាយ នឹងមិនប្រាស់ចាកពីកូនៗរបស់គេឡើយ

គឺការប្រើវិធីល្បួងលោមអោយចាកពីការធ្វើកំហុសនិងធ្វើអំពើបាបផ្សេងៗ។ **កត្តានោះគឺភាពស៊ីគ្នារវាងការបង្រៀនដោយពាក្យសម្តីរបស់ឪពុកម្តាយ ជាមួយនឹងអត្តចរិត និងអាកប្បកិរិយារបស់ពួកគាត់**។ ការប្រព្រឹត្តរបស់ពួកគាត់ត្រូវតែជាឧទាហរណ៍ដ៏គំរូមួយ ដែលឆ្លុះបញ្ចាំងទៅលើអ្វីដែលពួកគាត់បានបង្រៀនជាទ្រឹស្តីនោះ ការធ្វើដូច្នេះ កូនប្រុសស្រីនឹងបានឃើញជាក់ច្បាស់ថាពាក្យសម្តី និងអាការៈខាងក្រៅរបស់ឪពុកម្តាយខ្លួនពិតជាដូចគ្នាគ្មានអ្វីមិនគួរអោយទុកចិត្តទេ។

អ្នកគួរឧស្សាហ៍បង្រៀនកូនអ្នក និងគួរតែនិយាយទៅកាន់ពួកគេ។ និយាយតែមួយមុខគឺមិនគ្រប់គ្រាន់ទេ សូរសម្តីដែលចេញពីមាត់អ្នកទាំងប៉ុន្មានចាំបាច់ត្រូវតែឆ្លុះបញ្ចាំងតាមសកម្មភាពជាក់ស្តែងផងដែរ។ "**នៅពេលដែលអ្នកអង្គុយនៅក្នុងផ្ទះ នៅពេលដែលអ្នកដើរនៅតាមផ្លូវ នៅដែលអ្នកទម្រេតខ្លួនចុះ រឺក៏ងើបឡើង**" រាល់សកម្មភាពទាំងអស់នៅក្នុងផ្ទះ នៅខាងក្រៅ ពេលអ្នកចូលរឺពេលអ្នកចេញ ជាកាលដែលអ្នកត្រូវនិយាយទៅកាន់កូនអ្នក ហើយបង្ហាញទៅកាន់ពួកគេជាសកម្មភាពផ្ទាល់ពីអត្ថន័យនៃពាក្យសម្តីរបស់អ្នក។

## ៥. វិបត្តិដែលអាស្រ័យនឹងឪពុកម្តាយ

លក្ខខ័ណ្ឌចំបង សម្រាប់បង្កអោយមានប្រសិទ្ធភាពនៅក្នុងការបង្រៀនរបស់ឪពុកម្តាយគឺ**គំរូរបស់ឪពុកម្តាយ**។ បើឪពុកម្តាយបង្រៀនកូនៗអោយដើរនៅលើផ្លូវល្អ សុចរិតទៀងត្រង់ ប៉ុន្តែទង្វើរបស់ខ្លួនវិញ វាផ្ទុយនឹងអ្វីដែលបានបង្រៀននោះ សួរថាតើកូននឹងគិតយ៉ាងណាចំពោះមេរៀនអស់ទាំងនោះ? "**ឧត្តមគតិ និងការបង្រៀនរបស់អ្នកនឹងត្រូវបានគោរពដោយកូនៗរបស់អ្នក ល្គឹកណាអ្នកមិនបានបង្ហាញថាអ្នកស្អប់ខ្ពើមតំលៃរបស់វានោះទេ**"។ "**គោរពឪពុក និងម្តាយអ្នក**" មិនមានជាពាក្យដែលត្រូវប្រាប់ទៅកាន់កូនៗតែម្យ៉ាងទេ ឪពុកម្តាយខ្លួនឯងក៏ត្រូវបង្គាប់ខ្លួនអោយសូត្រ និង

ប្រព្រឹត្តតាមពាក្យនេះដែរ។ វាគ្មានការគោរពកើតឡើងទេ លុះត្រាតែឪពុកម្តាយផ្ទាល់ អាចដក់ជាប់នូវការគោរព "**ឪពុក**" និង "**ម្តាយ**" នៅនឹងចិត្តខ្លួន ហើយបង្ហាញវាចេញមកខាងក្រៅថាពួកគាត់មានទំនួលខុសត្រូវចំពោះពាក្យសម្តីខ្លួនឯងណាស់ ថាអីធ្វើហ្នឹង ដែលជៀសវាងមិនបាច់បង្គាប់កូនអោយគោរពខ្លួនទេ គេនឹងធ្វើវាដោយខ្លួនឯងបើគេបានមើលឃើញគំរូរបស់យើង។

## ៦. ទៀងត្រង់ពិតប្រាកដ

"**យើងមិនគួរនិយាយទៅកាន់កូនថា: យើងនឹងអោយរបស់អ្វីមួយទៅគេ ហើយបែរជាខកខានមិនបានអោយគេទៅវិញ នោះវានឹងក្លាយជាមរតកនៃការកុហកសម្រាប់កូនជាមិនខាន**"។ **ការអប់រំដ៏ប្រសើរបំផុត គឺមានមូលដ្ឋានលើការពិត។ ការពិតជាគ្រឹះ**ដ៏រឹងមាំតែមួយគត់ក្នុងរចនាសម្ព័ន្ធរបស់ជីវិតមនុស្ស ហើយបើអ្នកដកគ្រឹះចេញនោះរចនាសម្ព័ន្ធទាំងស្រុងនឹងដួលរលំ។ អោយកូនប្រុសស្រីយើងច្បាស់ថា **ចេញពីមាត់របស់ឪពុកម្តាយពួកគេ គ្មានថ្ងៃនឹងចេញមកឡើយនូវរឿងមិនពិត** គ្មានសោះសូម្បីតែជារឿងតូចតាចមិនសំខាន់ក៏ដោយ សំខាន់នៅក្នុងរឿងលុយកាក់ និងជាពិសេសរឿងដែលនាំអោយប៉ះពាល់ផ្លូវអារម្មណ៍។ ក្រុមអ្នកប្រកបដោយគតិបណ្ឌិតបានអនុញ្ញាតអោយពន្យាការប្រាប់ការពិត ក្នុងករណីចាំបាច់មួយចំនួនដូចជា ការដោះស្រាយវិវាទ រឺក៏ការបង្កភាពស្រុះស្រួលគ្នារវាង ប្តីប្រពន្ធ សមាជិកនៅក្នុងក្រុមគ្រួសារ ..........ប៉ុន្តែការនិយាយពាក្យកុហកស្អីក៏ដោយទៅកាន់កូន គឺជាប្រការដែលត្រូវជៀសវាងបំផុតលើអ្វីៗទាំងអស់។ បើសិនណាកូនត្រូវបានបង្រៀនពីសច្ចៈ ហាក់បីដូចជាគេបានទទួលនូវអ្វីគ្រប់យ៉ាងអញ្ចឹង ប៉ុន្តែបើពុំដូច្នោះទេ តើអ្វីទៅដែលកូននឹងទទួលបាន?

## ៧. ការអប់រំមិនមែនជាការអោយរង្វាន់ និងការដាក់ទណ្ឌកម្មទេ

ទំនាក់ទំនងរវាងឪពុកជាមួយកូនត្រូវតែពឹងផ្អែកលើហេតុផល ជាជាងពឹងផ្អែកទៅលើមនោសញ្ចេតនា។ ទោះក្នុងខណៈដែល កូនប្រុសម្នាក់បង្ហាញពីទេពកោសល្យដ៏អស្ចារ្យ រូបរាងដ៏ស្រស់សង្ហា......របស់ខ្លួន ដែលបន្ទាបតំលៃបងប្អូនរបស់គេឯទៀតក៏ដោយ ក៏គេគួរតែទទួលបានការយកចិត្តទុកដាក់ស្មើគ្នានឹងបងប្អូនគេជាដដែលហ្នឹង ព្រោះអីបើមានការរើសអើងរវាងកូនម្នាក់ទៅកូនម្នាក់នោះ នឹងនាំទៅរកការច្រណែនគ្នាជាមិនខាន។ បើសិនណាឃើញកូនមានទេពកោសល្យលើផ្នែកអ្វីមួយ គេត្រូវតែជាំបណ្តុះទេពកោសល្យនោះ។ ការយកចិត្តទុកដាក់ជាពិសេសទៅលើកូន នៅក្នុងដំណើរការចិញ្ចឹមបីបាច់កូនគឺជារឿងដ៏ត្រឹមត្រូវ និងចាំបាច់មួយ ប៉ុន្តែការធ្វើអំណោយរឺសញ្ញានៃការពេញចិត្តខុសធម្មតា ដែលចាត់ទុកបានជាការរើសអើងកូន(ស្រលាញ់កូនមិនស្មើគ្នា) រវាងកូនៗនោះគឺជារឿងមិនគួរអោយកើតមានឡើយ។

## ៨. ដៃឆ្វេងច្រានទៅអោយឆ្ងាយ ដៃស្តាំទាញមកចូលជិត

កូនអាចនឹងគេចវេសមិនចូលសាលា បើសិនណាឪពុកសម្លុត រឺគំរាមកំហែងគេ ហើយវាអាចធ្វើអោយគេខ្លាចរហូតហ៊ានធ្វើអត្តឃាតទៀតផង។ កត្តានេះហើយទើបធ្វើអោយអ្នកប្រាជ្ញបណ្ឌិតផ្តល់ជាគតិថា: "យើងមិនត្រូវគំរាមកំហែងកូនដោយការប្រើទណ្ឌកម្មលើរាងកាយគេនោះទេ គេត្រូវដោះស្រាយដោយពាក្យសម្តី រឺក៏នៅស្ងៀម"។ ការធ្វើទណ្ឌកម្មលើរូបកាយ វាមិនមែនជាវិធីសាស្ត្រដែលប្រកបដោយគតិបណ្ឌិតក្នុងការចិញ្ចឹមបីបាច់កូនចៅទេ "វិធីបណ្តុះកូនគួរតែអនុញ្ញាតអោយគេដុះដាលទៅតាមនិស្ស័យរបស់គេទើបជាការល្អ ព្រោះគេនឹងមិនចាកឆ្ងាយពីនិស្ស័យនេះឡើយទោះគេឈានចូលវ័យចាស់ក៏ដោយ"។ អ្នកមានដឹងទេថា កូនយើងគេនឹងចាកចេញពី

*ដៃនត្រួតត្រារបស់យើង ហើយគេនឹងលែងខ្លាចយើងទៀតហើយ ដូច្នេះបើសិនណា យើងអប់រំកូនជាមួយនឹងការធ្វើអោយគេភ័យខ្លាច នោះការអប់រំនេះនឹងចាកឆ្ងាយពី រូបកូននៅពេលដែលគេឈប់ខ្លាច ប៉ុន្តែបើយើងអប់រំកូនជាមួយនឹងការធ្វើអោយគេ ទទួលអារម្មណ៍រីករាយ នោះគេនឹងមិនបោះបង់ចោលអ្វីដែលអ្នកបានបង្រៀនគេ ឡើយ ទោះបីគេឈានចូលវ័យចាស់ក៏ដោយ។*

## *៩. គោលសីលធម៌ទូទៅខ្លះ*

*ឪពុកម្តាយចាំបាច់ប្រុងប្រយ័ត្នលើការ ផ្តត់ផ្គង់ចំណីអាហារដល់កូនៗ ពួកគាត់ ត្រូវច្បាស់ថាអាហារទាំងនោះមានជីវជាតិ នឹងជួយដល់កូនអោយមានការលូតលាស់ល្អ ទាំងខាងរាងកាយ និងផ្លូវចិត្ត។ មួយវិញទៀត គួរតែទំលាប់អោយកូនៗ បរិភោគតែ នៅក្នុងពេលជាក់លាក់ប៉ុណ្ណោះ និងមិនមែនឈរហូប ដើរហូប រឺក៏ដេកហូបនោះទេ គឺអង្គុយហូបនៅនឹងតុ។* ***"បើសិនណាជាមានការធ្វើអោយរបួសស្លាកស្នាមដ៏តូចមួយ នៅលើខ្លួនប្រាណកូន ជាលទ្ធផលវានឹងមានស្លាកស្នាមដ៏ធំមួយនៅក្នុងបេះដូងគេ"។***

*វាមានសារៈសំខាន់យ៉ាងក្រៃលែងក្នុងការអប់រំកូនប្រុសស្រីទាន់ពេលពួកគេនៅ ក្មេង បង្រៀនពួកគេពីតំលៃនៃការមានអនាម័យខ្លួនប្រាណ ការទុកដាក់សំលៀក បំពាក់អោយមានសណ្តាប់ធ្នាប់និងស្អាតបាត។ ម្យ៉ាងកូន គួរតែត្រូវបានបង្រៀនអោយ មានការប្រយ័ត្នប្រយែងនៅក្នុងការប្រើពាក្យសម្តី និងការប្រកាន់ឫកពា ចរិយាមាយាទ របស់ខ្លួន មិនមែនសម្រាប់ពេលដែលទាក់ទងទៅអ្នកដ៏ទៃនោះទេ គឺសម្រាប់ខ្លួនឯង ផ្ទាល់ផងដែរ ដែលគតិមួយលើកឡើងថា:* ***"ការប្រកាន់អាកប្បកិរិយាតាមសភាព លក្ខណៈខាងក្រៅជារឿយៗនៃបុគ្គលណាម្នាក់ វាជាការបង្ហាត់យ៉ាងមានសុពលភាព មួយ ដល់ចរិតមាយាទនៅខាងក្នុងរបស់គេ"*** ។

**"ជាការល្អណាស់ កាលដែលលោកឪពុកអ្នកម្តាយទាំងឡាយបានស្តាយជាប់នូវនឹម(សម្រាប់ទឹមគោ ក្របី) នៅនឹងមាត់របស់ពួកគាត់"** ព្រោះវាជាការល្អក្នុងការនាំពួកគេអោយដើរត្រង់ផ្លូវ ជាពិសេសដាក់ទាន់ពួកគេនៅតូចៗនៅឡើយ។ ហើយក៏ជារឿងប្រសើរផងដែរ ក្នុងការបង្រៀនពួកគេអោយមានចិត្តសប្បុរសចំពោះអ្នកដ៏ទៃ និងរួមទាំងសត្វក៏ដូចគ្នា។ លើសនេះទៀត ដាស់តឿនកូនជាមុនថា ហាមដាច់ខាតការហែកកេរ្តិ៍ខ្មាស់អ្នកដ៏ទៃ ការនិយាយដើមគេ និងការនិយាយបង្កាច់បង្ខូចគេជាដើម ព្រោះវាមិនមែនជាការល្អឡើយ និងជាពិសេសកាត់ផ្តាច់ពួកគេអោយចេញឆ្ងាយពីអ្នកជុំវិញខ្លួនគេទាំងឡាយណាដែលនាំពួកគេអោយមាននិស្ស័យបែបនេះ។

!!!!!!!!! ចប់ហើយៗ ការបកស្រាយពីមេរៀននៃការអប់រំកូនចៅរបស់ក្រុមសាសនាទាំងពាខាងលើ សង្ឃឹមថាមិត្តអ្នកអានទទួលបានខ្លះសម្រាប់យកទៅអនុវត្តន៍ជាមួយកូនៗ ប្អូន ក្មួយ ចៅ ទៅតាមការយល់ឃើញរបស់ខ្លួនចុះ។ **បញ្ជាក់:** ទាំងនេះវាគ្រាន់តែជាគតិប៉ុណ្ណោះ ដែលមិនមែនមានន័យថាវាសុទ្ធតែល្អត្រឹមត្រូវ កើតបានជាប្រយោជន៍នោះទេ ប្រើក្បាលអ្នកពិចារណាលើពួកសិនចាំសម្រេចចិត្តធ្វើ។

"សូមដកពាក្យកុហកចេញអោយអស់ពីប្រយោគរបស់អ្នក
មុននឹងនិយាយវាទៅកាន់កូនៗ"

<u>ចុតហ្មាយ</u> 

“ទោះបីជាគេដឹងលឺថា ពួកយើងជាប្រជាជាតិ
ដែលឆ្លាតជាងគេយ៉ាងណាក៏ដោយ
ក៏មិនមានជនណាម្នាក់ពី
សហរដ្ឋអាមេរិច ជប៉ុន អ៊ឺរ៉ុប
មកបំរើផលប្រយោជន៍ពួកយើងឡើយ”



# *រឿងពិតពាយ៉ាង*



## *១ ពាងចៀន*

*ក្រោយពីបញ្ចប់ការសិក្សានៅមធ្យមសិក្សាទុតិយភូមិ ជារៀងរាល់ឆ្នាំសិស្សានុសិស្សរាប់សិបនាក់ពីបណ្តាខេត្តនានាជុំវិញប្រទេស មិនថាខេត្តឆ្ងាយៗដូចជា ព្រះវិហារ រតនៈគិរី បន្ទាយមានជ័យនោះទេ តែងមកបន្តការសិក្សារបស់គេនៅរាជធានីភ្នំពេញ។ ពិតណាស់ កំរិតជីវភាពរបស់ក្រុមគ្រួសារពួកនិស្សិតទាំងនោះហោចណាស់ក៏មធ្យមល្មម ទប់ទល់នឹងការចំណាយ ទាំងថ្លៃសាលា ទាំងការចាយវាយ ក្នុងកំឡុងពេលប៉ុន្មានឆ្នាំដែលពួកគេត្រូវបញ្ចប់ការសិក្សារបស់ពួកគេដែរ ទើបពួកគេអាចមានលទ្ធភាពមកបន្តការសិក្សានៅភ្នំពេញនេះ។ ភាគច្រើននៃអាណាព្យាបាលពួកគេទាំងនោះតែងនិយាយថាថ្លៃសាលា គឺវាមិនជាបញ្ហានោះទេ តែការចាយវាយប្រចាំថ្ងៃទៅវិញទេទើបចោទ ជាពិសេសថ្លៃស្នាក់នៅ តែបើគ្រួសារណាមានញាតិផៅនៅភ្នំពេញផ្ទាល់នោះ វានឹងជួយសំរាលបន្ទុកគេបានមួយកំរិតដែរ។*

*មានបានសង្កេតពីផ្ទះសំរាប់ជួលអោយពួកនិស្សិតនោះទេ គឺវាបានរីកស្គុះស្គាយណាមួយតំលៃវាចេះតែកើនឡើងជាលំដាប់ ហើយចំពោះបញ្ហាសុវិត្ថភាពវិញកន្លែងខ្លះមាន ឯកន្លែងខ្លះទៀតក៏គ្មាន និងជាទូទៅ ក្រុមពួកនិស្សិតទាំងនោះភាគច្រើននៅជុំគ្នា រួចចែកគ្នាចេញថ្លៃផ្ទះ ព្រោះវាអាចជួយកាត់បន្ថយការចំណាយ ណាមួយវាមានសុវត្ថិភាពផង ទាំងផ្ទាល់ខ្លួន និងទ្រព្យធន ព្រោះមានគ្នាច្រើននោះអី។*

*មីងថ្លៃរបស់ធ្លាប់ប្រាប់ពីរឿងក្មួយប្រុសរបស់គាត់ម្នាក់ វាជាកូនរបស់បងប្រុសគាត់ ដែលបានមកជួលផ្ទះនៅជាមួយមិត្តភ័ក្តិដែលរៀននៅវិទ្យាល័យជាមួយ*

ក្រោយពីបានដឹងលទ្ធផលថាពួកគេទទួលបានអាហារូបករណ៍មកបន្តការសិក្សា យ៉ាងដូច្នេះថា៖

ថ្ងៃមួយ ពេលទំនេរពីការងារ គាត់បានទៅលេងផ្ទះជួលរបស់ក្មួយគាត់នោះ ដោយនាំទៅជាមួយនំនែកខ្លះ និង ផ្លែឈើមួយចំនួនផងដែរអោយក្មួយ។ ពេលទៅដល់គាត់ឃើញគេកំពុងបោកខោអាវមួយគំនរ ព្រោះសល់មួយសប្តាហ៍ទៅហើយ ទាល់តែថ្ងៃឈប់សំរាកពីសាលាទើបទំនេរបោកគក់វា។ ឃើញមីងមកលេងដូចនេះ គេក៏ផ្អាកសិន រួចមកទទួលរាក់ទាក់មីង បន្ទាប់មកទាំង២នាក់មីងក្មួយបានជជែកគ្នា ពីនេះពីនោះ ការសិក្សា ការចាយវាយ ការរស់នៅជាមួយមិត្តភ័ក្រ្តថាតើចុះសំរុងគ្នាវីយ៉ាងណា ការសន្ទនាបានបន្តរហូតដល់ពេលថ្ងៃត្រង់ ក្មួយក៏អញ្ជើញមីង អោយនៅបាយថ្ងៃត្រង់ជាមួយគ្នាមួយពេលតែម្តងទៅ ឯមីងក៏មិនជំទាស់ដែរ ណាទៅ ចង់និយាយណែនាំក្មួយអោយបានយូរផង ព្រោះបងប្រុសគាត់បានផ្តាំ អោយគាត់ជួយធ្វើជាភ្នែក ជាច្រមុះផង។

ក្រោយមក ក្មួយក៏សុំទៅផ្ទះបាយធ្វើម្ហូប មីងប្រាប់ថាពេលនោះគេបានស្លសំល ត្រលាចជាមួយនឹងសាច់ជ្រូក ដោយខ្លាចមិនគ្រាន់គេក៏ចៀនពងបន្ថែម ណាត្រូវទុកចំណែកអោយមិត្តភ័ក្រ្តខ្លួន ដែលទៅរៀនមិនទាន់មកផង។ ពេលដែលជិតរួចរាល់ហើយ មីងក៏ទៅចង្ក្រានបាយមើលក្រែងមានអ្វីគាត់អាចជួយបាន តែអ្វីៗត្រូវបានចំអិនអស់ទៅហើយ ទាំងបាយ ទាំងម្ហូប។ អ្វីដែលគាត់លួចឃើញពេលនោះ គឺក្មួយគាត់បានធ្វើអោយជ្រុះពងចៀនមួយចំណែក ដែលទាំងអស់មាន៣ចំណែក តែគេបានរើសឡើងវិញយ៉ាងលឿនរួចដាក់វាដោយឡែកនៅចានមួយផ្សេងទៀត។ បន្ទាប់ពីគ្របម្ហូបអោយមិត្តរបស់ខ្លួនរួច គេក៏លើកបាយម្ហូបចេញមក ដែលមីងប្រាប់ម្ហូបមាន ២ចាន ស្លមួយមុខ ពងចៀនមួយមុខ តែគាត់ឃើញពងចៀនមាននៅសល់តែចំណែកប៉ុណ្ណោះ តែគាត់ឃើញមួយចំណែកដែលជ្រុះនោះ ត្រូវក្មួយគាត់ដួសបាយដាក់ពីលើ។

ពេលកំពុងហូប មីងបានសួរទៅក្មួយគាត់ថាហេតុអីចាំបាច់ដួសបាយដាក់ពីលើពងចៀនធ្វើអី? ក្មួយគាត់ឆ្លើយថា ខ្ញុំទំលាប់ទៅហើយមីងអោយវានៅក្តៅស្រួលហូប។ មីងដឹងច្បាស់ណាស់ ថាវាពិតជាចំណែកដែរជ្រុះពិតមែនព្រោះគាត់បានមើលឃើញផ្ទាល់នឹងភ្នែក គាត់បានលួចសរសើរដួងចិត្តក្មួយគាត់ណាស់ ហើយសួរថាឯងអាចឆ្លើយបានទេ ថាហេតុអ្វីបានជាក្មួយគាត់មិនយកចំណែកដែលជ្រុះនោះទុកសំរាប់មិត្តភ័ក្ត្រវាទៅ ហើយខ្លួនហូបរបស់ដែលល្អ រឺយកចំណែកដែលជ្រុះនោះហូបជាមួយគាត់ទាំងអស់គ្នាទៅព្រោះគ្មាននរណាឃើញថាវាបានជ្រុះផងហ្នឹង!!

## ”តើមិត្តម្នាក់ណារបស់អ្នកមានអត្តចរិតបែបនេះទៅ?”



# ២ បែកកង់ហើយពូមីង

មនុស្សរាប់រយនាក់ អាចដល់ពាន់ក៏មានដែរ ត្រូវបានបាត់បង់ជីវិតជារៀងរាល់ឆ្នាំ ដោយសារតែគ្រោះថ្នាក់ចរាចរណ៍ ដែលជាការខាតបង់ធនធានមនុស្សទទេៗគួរអោយស្តាយណាស់ ប្រជាជនកំពុងតែតិចផង។ តាមយោបល់ផ្ទាល់ខ្លួន ដំណោះស្រាយ ដែលអាចជួយកាត់បន្ថយការស្លាប់នេះបាន គឺមិនមែនជាការសំណូមពរអោយអ្នកដំណើរទាំងអស់គោរពច្បាប់ចរាចរណ៍នោះទេ ហើយក៏មិនមែនសុំកុំអោយពួកគេសេពគ្រឿងស្រវឹងមុនពេលបើកបរនោះដែរ ចំលើយគឺស្រួលបំផុត **ធ្វើយ៉ាងណាអោយអ្នកដំណើរទាំងនោះបើកបរកាន់ស្តាំដូចអ្នកទៅគឺវាចប់ហើយ។**

សូមនិយាយរឿងពិតមួយ:

ជាទូទៅទៅហើយនៅភ្នំពេញ ការស្ទះចរាចរណ៍តែងកើតមាន ជាពិសេសនៅពេលដែលសិស្សានុសិស្ស និងមន្ត្រីរាជការដល់ម៉ោងចូល និងចេញពីធ្វើការនិងចេញពីរៀន។ ផ្លូវកម្ពុជាក្រោមជាផ្លូវមួយ ដែលសំបូរទៅដោយការរកស៊ីជួញដូរ និងហាងលក់ដូរជាច្រើនដូចជា ហាងសំលៀកបំពាក់ ហាងលក់សំភារះអេឡិចត្រូនិច ហាងកុំព្យូទ័រ បណ្ណាគារជាដើម។

នៅលើផ្លូវនេះ ថ្ងៃមួយនាពេលរសៀលម៉ោងប្រហែល៣ មាន២នាក់ប្តីប្រពន្ធអ្នករកស៊ីមួយគូរ ជិះម៉ូតូអាសង់កូរ៉េប្តីជាអ្នកឌុប ឯប្រពន្ធអង្គុយនៅពីក្រោយដោយដាក់ជាមួយល្ពូរផ្តៅនៅសងខាងហាក់ដូចជាកំពុងដឹកត្រី រឺមួយក៏បន្លែអញ្ចឹងធ្វើដំណើរពីទិសខាងលិចចុះពីផ្លូវ៤២៧១មក ឆ្ពោះទៅទិសខាងកើត ទំនងជាផ្សារថ្មីមិនដឹង។

ភ្លើងស្តុបទី១ដែលគាត់ត្រូវឆ្លងកាត់ គឺជាស្តុបដែលនៅខាងស្តាំដៃមានហាង The Pizza Company និងនៅខាងឆ្វេងដៃមានហាង KFC។ ជួនពេលគ្នាណាស់ ជាមួយនឹងមិត្តភ័ក្រ្តម្នាក់ទៀតក៏កំពុងធ្វើដំណើរលើផ្លូវនោះដំណាលនឹងគាត់ដែរ ប៉ុន្តែម៉ូតូគាត់ស្ថិតនៅពីខាងមុខ។ ពេលនោះ មិត្តដែលអង្គុយនៅពីក្រោយវាបានកេះស្មាហើយលើក

ដៃចង្អុលទៅម៉ូតូបុរសនោះ និងនិយាយថា៖ ម៉ូតូនោះកង់ធូរហើយណ៎‼ ឯងស្រែកប្រាប់គាត់ទៅ។ ឃើញនឹងភ្នែកមែនថា កង់ម៉ូតូខាងក្រោយនោះធូរខ្លាំងណាស់ទំនងជាបែកពិតមែន ដូចនេះវាហៀបនឹងហាប្រាប់ទៅហើយ ណាខ្លាចក្រែងកង់នោះបែកពិតមែននឹងនាំអោយខូចដល់ពោះវៀន ប៉ះលែងកើតព្រោះមិនមែនធូរធម្មតានោះទេ ម្យ៉ាងខ្លាចក្រែងមានគ្រោះថ្នាក់ដោយប្រការផ្សេងទៀតផង។ ចៃដន្យអី ម៉ូតូទាំង២របស់ពួកយើងបានមកដល់ស្តុបល្មម គឺពេលនោះពណ៌ភ្លើងស្តុប ដែលនៅពីមុខលោតក្រហមទៅហើយ ដូច្នេះម៉ូតូយើងក៏ឈប់ រួចសង្ឃឹមគាត់ឈប់ដែរនឹងស្រួលប្រាប់គាត់ថាកង់ក្រោយរបស់គាត់បែកហើយ មិននឹងស្មានអី ម៉ូតូ២នាក់ប្ដីប្រពន្ធនោះនៅតែទៅមុខទៀត។

ហួសចិត្តដែរ ចង់ជួយគាត់ដែរតែបើគាត់អញ្ចឹងតើនរណាជួយបាន មិនដល់១នាទីផងគាត់ចាំមិនបាន ម្ល៉េះសមដូរពោះវៀនថ្មីហើយមើលទៅ។



## ៣ ក្រអឺមេ្លះកូនប្រុស

*បដិវត្តន៍ផ្កាម្លិះបានរីកស្គុះស្គាយជាខ្លាំងកំឡុងឆ្នាំ២០១០មក ដែលចាប់ផ្តើមពីប្លុកអារ៉ាប់ និងរាលដាលដល់ទ្វីបអាព្រិចទៀតផង ទន្ទឹមនឹងនោះវិបត្តិប្រេងក៏បានកើតឡើងសារជាថ្មីដែរ កម្ពុជាក៏ដូចគ្នា សាំងឡើងថ្លៃគឺនៅតែជាបញ្ហាចោទដូចតែរាល់ប្រទេសលើសកលលោកដែរ។*

*ទោះជាយ៉ាងណាក្តី តំរូវការប្រើសាំងនៅតែមានព្រោះវាជាការចាំបាច់ គ្រាន់តែថាកាត់បន្ថយជាងមុន បើទៅណាអត់ជិះបានសុខចិត្តដើរ ហើយបើឆ្ងាយពេកអត់ទៅ។ សាំងឡើងថ្លៃអើយឡើង ម្នាក់ៗរអ៊ូអើយរអ៊ូ ប៉ុន្តែនៅមានក្មេងចាក់សាំងម្នាក់ឆ្លៀតកេងចំនេញពីវិបត្តិរបស់អ្នករត់ម៉ូតូឌុបរាប់រយនាក់បានទៀត។*

*តើអ្នកស្គាល់ផ្លូវទេពផនទេ? អ្នកអាចទៅរកមើលបានគឺនៅលើផ្លូវនេះមានស្ថានីយសាំងមួយ។ ទីនេះ សូមនិយាយពីបុគ្គលិកប្រុសធ្វើការវេនយប់នៅទីនោះម្នាក់ដែលរវល់មមាញឹកជាប្រចាំក្នុងការបំពេញការងារ តែនៅតែឆ្ងល់ថាហេតុអីគាត់នៅតែធ្វើរឿងបែបនេះ ក្រខ្លាំងអីណ៎ា?*

*បងប្រុសជីដូនមួយម្នាក់ បានប្រាប់ពីដំណើររឿងដូចតទៅនេះ*

*គាត់រៀនវេនយប់ កាលល្ងាចថ្ងៃមួយពេលគាត់ចេញពីរៀន នឹកចង់ចាក់សាំងព្រោះវាជិតអស់ហើយខ្លាចជិះមិនដល់ផ្ទះ ណាផ្ទះឆ្ងាយផង។ គាត់បានបើកចូលស្ថានីយសាំងមួយនោះ ពន្លត់ម៉ាស៊ីនហើយបុរសអ្នកចាក់សាំងនោះក៏បានសួរថា៖*

*អ្នកចាក់សាំង: បងចាក់ប៉ុន្មានដែរ?*

*បងប្រុស: ១លីត្រ*

*បុរសនោះក៏ចាក់អោយ ពេលនោះបងវាក៏ងាកមើលលេងៗទៅតារាងតំលៃស្រាប់តែគាត់ចាប់អារម្មណ៍ថាវាខុស ព្រោះគាត់ឃើញបុរសនោះ**ចុចប៊ូតុងលេខ១មែនតែសំរាប់ដុល្លាប៉ុណ្ណោះមិនមែនសំរាប់១លីត្រទេ** ហើយគាត់ឃើញតំលៃនៅលើ*

តារាងដូច្នេះ រង្វាស់០,៩៧លីត្រ និងតំលៃ១ដុល្លារ។ ចាក់សាំង១លីត្រ មិនមែន១ដុល្លារនោះទេ ដឹងក្នុងចិត្តណាស់ថាវាខុស តែវាដូចជាចំនួនតិចតួចពេកទើបគាត់ខ្ជិលមាត់ ប៉ុន្តែវាដូចជាអនុញ្ញាតអោយការកេងប្រវ័ញ្ចនេះរីករាលដាលអញ្ចឹងដែរ ថាទៅ សួរទៅ ស្រែកទៅអោយអ្នកមកចាក់សាំងដ៏ទៃបានដឹងផង អំពីទង្វើអាក្រក់របស់ក្មេងចាក់សាំងនោះ ដើម្បីអោយវារាងចាលលែងហ៊ានទៀត ដូចគតិមួយនិយាយថា: ***ការអោបដៃឈរមើលអំពើអាក្រក់ ស្មើនឹងការទះដៃអបអរសាទរអំពើអាក្រក់ អោយរីកដុះដាលអញ្ចឹងដែរ។***



# ប្រស្នា 

## ឧបសគ្គ៤ដំណោះស្រាយ១

មានជ្រូក១ក្បាលមានទំងន់៦៨kg យើងចែកជ្រូកនោះជាខ្លួន និងជើង ដែលជើងរបស់វានីមួយៗមានទំងន់ ៣kg។ ជ្រូកនោះចង់ធ្វើដំណើរពីកន្លែងដែលវាកំពុងរស់នៅទៅកាន់កន្លែងដែលគេពិឃាត ក្រុមគ្រួសារ ជូនតា និងញាតិសន្តានរបស់វា។

ក្នុងតំបន់ទាំង២ មានរដូវដូចគ្នាគឺ ៤រដូវ:

១. រដូវក្តៅដែលព្រះអាទិត្យចាប់រះនៅម៉ោង ៦ និង២៥នាទី

២. រដូវស្លឹកឈើជ្រុះដែលព្រះអាទិត្យចាប់រះនៅម៉ោង ៧ និង២៥នាទី

៣. រដូវផ្ការីកដែលព្រះអាទិត្យចាប់រះនៅម៉ោង ៨ និង២៥នាទី

៤. រដូវរងារដែលព្រះអាទិត្យចាប់រះនៅម៉ោង ៩ និង២៥នាទី

ដើម្បីបានទៅដល់គោលដៅ វាត្រូវឆ្លងកាត់ឧបសគ្គ៤ និងដំណោះស្រាយ១ ហើយលក្ខខ័ណ្ឌ ដែលអាចរក្សាជីវិតវារហូតដល់ទីនោះ លុះត្រាតែទំងន់ដែលនៅសល់បន្ទាប់ពីឆ្លងកាត់ឧបសគ្គទាំង៤របស់វាមិនក្រោម៥0kg។

### ឧបសគ្គទី១ ព្រៃចចក

វាបានចំណាយអស់រយៈពេលអស់ ៣0នាទី និង ក្នុងល្បឿន ៩ 000 km/s។ គេដឹងថាក្នុងពេល ១៥នាទី វាត្រូវបាត់បង់អស់ពាក់កណ្តាលនៃជើង១របស់វា ក្នុងការប្រយុទ្ធជាមួយចចកនោះ។ ពេលវេលា និង ចំងាយដែលប្រើក្នុងឧបសគ្គទី១ និង ទី២ គឺស្មើគ្នា។

**<u>ឧបសគ្គទី២</u>** **វាលខ្សាច់**

ដោយសារកំដៅថ្ងៃក្ដៅខ្លាំងធ្វើអោយវានឿយហត់អស់កំលាំង ហើយបាត់បង់អស់ទំងន់មួយចំនួន គឺថាបើធ្វើដំណើរអស់ 0.៥km វាត្រូវស្រកសាច់អស់ ១.៥Kg។ ទំងន់ដែលបាត់បង់គឺទំងន់ជើងរបស់វាទាំងអស់ និងសល់ពីនោះគឺទំងន់ខ្លួនរបស់វា។

**<u>ឧបសគ្គទី៣</u>** **ទីផ្សារ**

ពេលវេលា និង រយះពេលដែលប្រើក្នុងឧបសគ្គនេះស្មើនឹង ឧបសគ្គទី៤ គឺ ១៥ នាទី និង ៣km។ វាបានភ័យណាស់ដោយរត់គេចពីការតាមចាប់របស់ប្រជាជន និងសត្វសាហាវផ្សេងៗមួយចំនួនទៀត ដូច្នេះទំងន់ ១ភាគ៤ នៃខ្លួនរបស់វាត្រូវបានបាត់បង់។

**<u>ឧបសគ្គទី៤</u>** **អូរ**

វាត្រូវដើរកាត់ទឹកអូរ វាហេវហត់ជាខ្លាំងហើយត្រូវការថាមពលខ្លះដើម្បីបន្តដំណើរតទៅមុខទៀត។ ជាចៃដន្យនៅតាមមាត់អូរមានដើមស្ពៃមួយចំនួនដែលអាចអោយវាធ្វើជាចំនីបាន តែស្ពៃនោះអាចស៊ីបានតែផ្កាទេ គេដឹងថាផ្កាស្ពៃនឹងរីកក្រោយពេលដែលវាត្រូវកំដៅព្រះអាទិត្យអស់រយះពេល ៣៥នាទី។ ឧបសគ្គនេះវាមានពេលសំរាក ៥នាទី ដែលរាល់នាទីវាស៊ីផ្កាស្ពៃបាន១ ដែលផ្កាស្ពៃ១មានទំងន់ ២.៨Kg។ **<u>សំណួរ</u>** តើដំណោះស្រាយមួយនោះគឺជាអ្វី?

ចុតហ្មាយ 

"George Washinton ជាវីរៈបុរសជាតិដ៏ឆ្នើមតែម្នាក់គត់របស់សហរដ្ឋអាមេរិច បើសិនណាមិនមានបុគ្គល Abraham Lincoln រឺ John F.Kenedy ជាដើម"



# *អវសានកថា*

*ចុងក្រោយនេះ គ្មានអ្វីត្រូវនិយាយអោយបានវែងឆ្ងាយនោះទេ គ្រាន់តែចង់ប្រាប់ទៅកាន់អ្នកអានទាំងអស់គ្នាថា ទាំងអត្ថបទក្តី រឿងក្តី ទស្សនៈគ្រប់បែបយ៉ាងដែលមានសរសេរនៅក្នុងសៀវភៅមួយក្បាលនេះ គឺគ្រាន់តែជាការយល់ឃើញរបស់ជនជាតិខ្មែរម្នាក់ប៉ុណ្ណោះ សូមអ្នកទាំងអស់គ្នាកុំទាន់ទុកចិត្តអោយសោះ ប្រើក្បាលរបស់អ្នកគិតពិចារណា ថ្លឹងថ្លែងអោយអស់ចិត្តអស់ចង់សិនចាំទទួលយក។*

*ប្រាប់មនោសញ្ចេតនាផ្ទាល់ខ្លួនបន្តិចចុះ សរសេរសៀវភៅនេះឈឺក្បាលខ្លាំងណាស់ ពេលខ្លះធុញទៀត។ ចប់១អត្ថបទត្រូវអោយខួរក្បាលសម្រាកដល់២ រឺ៣ថ្ងៃឯណោះ ទម្រាំតែអារម្មណ៍ជ្រះថ្លាអាចចាប់សរសេរឡើងវិញបាន។ មានពេលមួយបាក់ទឹកចិត្តមែនទែន សឹងតែស្រក់ទឹកភ្នែក យកដៃដាល់ជញ្ជាំងយ៉ាងខ្លាំងបន្ទោសខ្លួនឯង គឺច្រឡំដៃចំលងឯកសារចាស់ដែលបានរក្សាទុកជិត១ខែមកហើយមកជំនួសឯកសារថ្មី ធ្វើអោយបាត់បង់ឯកសារដែលបានសរសេរអស់ជិត១ខែអស់រលីង ប៉ុន្តែលួងចិត្តខ្លួនឯង លើកទឹកចិត្តខ្លួនឯង ទើបមានកម្លាំងសរសេរវារហូតបានដល់ចប់បែបនេះ។ "**ធ្វើការស្មើចុងស្មើដើម**" ពាក្យនេះល្អណាស់ កុំចង់តែដំបូងលុះចុងក្រោយខ្ជិល។*

*ជាចុងក្រោយម្តងទៀត ក៏មិនភ្លេចដែរនូវការស្វាគមន៍នូវរាល់មតិរិះគន់ទាំងឡាយ។ អ្នកសរសេរគឺជាជនជាតិអ្នកតើស សរសេរភាសាអ្នកទេតើ ខ្លាចអីនឹងស្តីអោយថាអោយ។*

*ថ្ងៃទី ០៩ ខែសីហា ឆ្នាំ២០១១*

.........................................................

# *អាសយដ្ឋានទំនាក់ទំនង:*

*ការស្នើជាសៀវភៅ រឹមតិរិះគន់គ្រប់បែបយ៉ាង................តាមរយៈ*

1. Facebook: Likesus Noone

2. Mail Adress: noonelikesusvol1.gmail.com

